សារព័ត៌មាន
ខ្មែរផុស ស.រ.អា.
# KhmerPost USA
E-mail: info@khmerpost.us / Website : khmerpost.us
Advertising: 978-656-8141/ Hotline news: 1 (267) 253-3947

Free

មាតិការរឿង Vol 07 Issue 138-Sept 27th- Oct10th. 2013



New Office: Tel: (978) 677-7163 Fax: (978) 677-7092
45 Merrimack St. Suite 218A Lowell, MA 01852

## វិចារណកថា

## សង្គ្រោះជាតិ : “ទន់ភ្លន់ តែរឹងមាំ”

**ដោយៈ ពិន សំខុន ខ្មែរផុស ស.រ.អា.**



"តែទន់ភ្លន់ហើយវាមិនដែលរឹងមាំទៅកើតទេ"នេះជាការកត់សំគាល់របស់មនុស្សទូទៅ ចំពោះសភាវៈជាធម្មជាតិនៃវត្ថុធាតុមួយ ហេតុនេះហើយបានជាមនុស្សជាច្រើនមានការព្រួយបារម្ភនឹងភាពទន់ភ្លន់របស់ សម រង្ស៊ី-កឹម សុខា ហើយសង្ស័យថា ការខិតខំគាំទ្ររបស់ពលរដ្ឋនឹងភ្លាត់ស្នៀតចាញ់ប្រាជ្ញាគេ ដូចគ្នានឹងព្រឹត្តិការណ៍ចងសម្ព័ន្ធភាពនយោបាយកម្ពុជានាឆ្នាំ១៩៩៣ ដែលក្នុងនោះ គេនៅចងចាំបាននៅឡើយថា គណបក្សហ៊្វុនស៊ិនប៉ិចឈ្នះឆ្នោតដ៏ទន់ជ្រាយបានចាញ់កល្បរបស់គណបក្សប្រជាជនយ៉ាងអាម៉ាស ។

**អកប្បកិរិយាៈ** ភាពរីករាយនឹង តទៅទំព័រទី ០៦

# រំលឹកពីព្រឹត្តិការណ៍ប្រវត្តិសាស្ត្រនៃនយោបាយចុងក្រោយនៅកម្ពុជា

**ដោយៈ ខ្មែរផុស ស.រ.អា.**




ថ្ងៃ២៣កញ្ញា ២០១៣ ព្រះមហាក្សត្រខ្មែរនរោត្តម សីហមុនីបានយាងជាអធិបតីជាដំបូងបង្អស់ក្នុងឱកាសសម្ពោធន៍សភាជាតិអណត្តិទី៥ ដ៏ចម្រូងចម្រាសមួយដែលគណបក្ស២ជាប់ឆ្នោតមិនទាន់យល់ស្របគ្នាពីលទ្ធផលនៃការបោះឆ្នោតនៅឡើយ ។ គណកម្មការរៀបចំការបោះឆ្នោតបានសម្រេចដោយគ្មានការការត្រួតពិនិត្យគួរឱ្យជឿបានឱ្យគណបក្សប្រជាជនបាន៦៨អាសនៈគណបក្សសង្គ្រោះជាតិបាន៥៥អាសនៈសម្រាប់អាសនៈ១២៣នៃសភាខ្មែរ ។ បើទោះជាមានការស្រែកតវ៉ាដោយប្រជាពលរដ្ឋរាប់សែននាក់ច្រើនថ្ងៃក៏ដោយ ឬក៏ទោះបីសមាជិកសភាជាប់ឆ្នោត តទៅទំព័រទី ១៦

## Lowell City Council
## Preliminary Election Results

*by Richard P. Howe Jr.*


Richard Howe

A total of 6696 of 55,708 registered voters (12%) cast their ballots in the September 24, 2013 Lowell preliminary election. The purpose of this election was to reduce the total number of candidates for the final election on November 5, 2013 from 22 to 18. The four candidates eliminated were Matt Vieira, Darius Mitchell, Brandon Navom and Rick Misitano. Here are the results of the preliminary city council election:

1. Rita Mercier - 3681
2. Rodney Elliott - 2764
3. Bill Martin - 2748
4. Dan Rourke - 2704
5. Ed Kennedy - 2652
6. Jim Milinazzo - 2541
7. Bill Samaras - 2485
8. John Leahy - 2359
9. Marty Lorrey - 2305
10. Joe Mendonca - 2001
11. Vesna Nuon - 1984
12. Corey Belanger - 1926
13. Derek Mitchell - 1908
14. Eric Gitschier - 1906
15. Stacie Hargis - 1774
16. Van Pech - 1478
17. Genevieve Doyle - 1213
18. Fred Doyle - 1096
19. Matt Vieira - 802
20. Darius Mitchell - 569
21. Brandon Navom - 401
22. Rick Misitano - 355

## ទីប្រឹក្សាក្រុងលីន លោក ហុង ណេត ទទួលបានលំដាប់លេខ៣ ក្នុងការបោះឆ្នោត បឋមថ្ងៃ ១៧សីហា

**ដោយ : សុខា**



**ក្រុងលីន, រដ្ឋម៉ាសាឈូសេត :** ផ្ទុយពីឡូវែលក្នុងការបោះឆ្នោតបឋមដែលត្រូវបោះឆ្នោតជ្រើសរើស១៨ ក្នុងចំណោម២២នាក់នៃអ្នកដែលឈរឈ្មោះជាទីប្រឹក្សាក្រុងនៅ ឯក្រុងលីនរដ្ឋម៉ាសាឈូសេតចំនួន៨នាក់នៃបេក្ខជនដែលឈរឈ្មោះជាទីប្រឹក្សាក្រុង គឺមាន៨នាក់មិនលើសមិនខ្វះ ។ដូចនេះសម្រាប់ក្រុងលីននៅក្នុងការបោះឆ្នោតបឋម នាថ្ងៃទី១៧ សីហា កន្លងថ្មីៗនេះ បេក្ខជនទាំង៨នាក់នឹងបន្តដំណើរឆ្លងកាត់ការប្រកួតប្រជែងនៅក្នុងការបោះឆ្នោតទូទៅមួយដែលនឹងប្រព្រឹត្តទៅនៅថ្ងៃទី៥ តទៅទំព័រទី ២៥

## លទ្ធផលនៃការបោះឆ្នោតជំរុះបេក្ខជនក្រុមប្រឹក្សាក្រុងឡូវែល

**ដោយៈ បណ្ឌិត គង់ សេងលី**




នៅថ្ងៃទី ២៤ ខែ កញ្ញា ឆ្នាំ ២០១៣ពលរដ្ឋក្រុងឡូវែលដែលមានសិទ្ធបោះឆ្នោតបានចេញទៅបោះឆ្នោតជំរុះបេក្ខជនឈរឈ្មោះ តទៅទំព័រទី ១៧




# តារាម៉ូដែលខ្មែរអាមេរិកាំងហ្គ្លរៀ ទូច Gloria Touch ឡើងនៅលើទស្សនាវដ្ដីអាមេរិកាំងទំព័រមុខ

**អត្ថបទដោយ : សុខា**

**ស៊ីអាថល្សរដ្ឋវ៉ាស៊ីនតោន :** ស្ត្រីខ្មែរអាមេរិកាំង ហ្គ្លរៀ ទូច (Gloria Touch) វ័យ២៧ឆ្នាំ ជាតារាម៉ូដែលសិចស៊ីមានទីកន្លែងកំណើតនៅក្រុងស៊ីអាថលរដ្ឋវ៉ាស៊ីនតោនសហរដ្ឋអាមេរិក នាពេលថ្មីៗនេះត្រូវបានទស្សនាវដ្ដីអាមេរិកាំងឌីស្ពតអញ្ជើញឱ្យថតជាតារាកិត្តិយសសម្រាប់ដាក់លើគម្របទស្សនាវដ្ដីក្នុងលេខដែលចេញសម្រាប់ខែតុលា ឆ្នាំ២០១៣។ កញ្ញា ហ្គ្លរៀ ទូច (Gloria Touch) បានព្យាយាមស្វិតស្វាញក្នុងអាជីពបង្ហាញម៉ូដខ្លាំងក្នុងអំឡុងមួយឆ្នាំចុងក្រោយនេះ ដោយនាងបានផ្ញើរូបថត និងអាស័យដ្ឋានទំនាក់ទំនងរបស់នាងទៅកាន់ក្រុមហ៊ុនទស្សនាវដ្ដីនានា ព្រមទាំងស្ថាប័នផ្សេងៗក្នុងវិស័យនេះ។ ជាមួយគ្នានេះដែរ នាងក៏បានបង្កើតគេហទំព័រក្នុងបណ្ដាញទំនាក់ទំនងសង្គមមានហ្វេសប៊ុក ធ្វីតឌឺ អ៊ីនស្តាក្រាមសម្រាប់ទាក់ទាញការគាំទ្រ និងឱកាសនាំឱ្យទស្សនិកជនបានស្គាល់នាងផងដែរ ។ និយាយពីដើមចមដែលនាំទៅដល់ចំណុចនៃការថតបង្ហាញម៉ូដនេះ នាងបានរំឭកថា កាលពីនៅក្មេងអ្នកជិតខាងឧស្សាហ៍សរសើរពីរូបសម្ផស្សរបស់នាង ហើយតែងជម្រុញនាងឱ្យពិចារណាចាប់អាជីពបង្ហាញម៉ូដ។ ទីបំផុតនាងក៏ជ្រើសយកវិស័យនេះមែន។ នាងមានកម្ពស់ ៥"៥' និងទម្ងន់១២០ lbs ។

ព្រមទាំងទំហំទាំងបី គឺ ៣៤ជ-២៦-៣៤។ ក្រៅពីថត និងបង្ហាញម៉ូដ ហ្គ្លរៀ ទូច (Gloria Touch)ក៏ជាឌីជេ ក្នុងក្លឹបរាត្រីដែលមានឈ្មោះថា ហ្វោនដេស្សិនខ្លឹប(Foundation Club)។ ពិសេសជាងនេះទៅទៀតនោះ នាងជាបុគ្គលិកពេញម៉ោងសម្រាប់សាជីវកម្មអចលវត្ថុ និងជាប្រូខឺម្នាក់ផងដែរ។ ឪពុកនាម ប៊ុនហន ផាវ និងម្ដាយនាម សុធី ជីប បានមកដល់សហរដ្ឋអាមេរិកកាលពី៣០ឆ្នាំមុន។ ក្នុងចំណោមបងប្អូនទាំងអស់ពុំមាននរណាមានអាជីពជាអ្នកសិល្បៈឡើយ ត្បិតបងស្រី និងបងប្រុសរបស់នាងរៀនផ្នែកវេជ្ជសាស្ត្រ ចំណែកឯប្អូនប្រុសកំពុងបញ្ចប់ការសិក្សា និងកំពុងសម្រេចចិត្តត្រៀមរៀនជំនាញដែលគេពេញចិត្តតែមិនមែនផ្នែកថតម៉ូដែលទេ។ និយាយពីប្រវត្តិនៃការសិក្សា ហ្គ្លរៀ ទូច (Gloria Touch) បានទៅរៀននៅសាកលវិទ្យាល័យវេស្ទើនវ៉ាស៊ីនតោន (Western Washington University) នៅប៊ែលលីងហ៊ែម (Bellingham) នៃរដ្ឋវ៉ាស៊ីនតោន (Washington State) និងទទួលបានបរិញ្ញាប័ត្រផ្នែកជំនួញ (Business Degree) ។ ក្រៅពីការថតរូប និងការងារជា ប្រូខឺ តារាម៉ូដែលរូបនេះចូលចិត្តគូរគំនូរ និងលេងកីឡាដូចជាជិះកង់ និងស្គីទឹកកក។ មានមតិមកកាន់សារព័ត៌មានខ្មែរផុសសរអាហ្គ្លរៀ ទូច (Gloria Touch) មានមោទនភាពដែលមានឈាមជ័រជាខ្មែរ។ នាងបានមើលឃើញពីសេចក្ដីព្យាយាមតស៊ូប្រឹងប្រែងសង្វាតដែលឪពុកម្ដាយរបស់នាងធ្លាប់ឆ្លងកាត់នូវជីវភាពលំបាក ព្រោះចង់ឱ្យកូនៗមានអនាគតបានរៀនចេះដឹងមានការងារធ្វើ និងភាពជាពលរដ្ឋល្អ ៕








On the very left is my nephew Michael Diep, my sister is right next to Michael (Tracey Touch), my big brother is in the back with the red hat (Vathana Touch), my niece is in the middle (Michelle Diep), I'm standing on the right of Michelle, my mom is next to me in the blue shirt (Sothy Chip) my dad is sitting (Bunhorn Pav) and my nephew is in my dad's arms (Mikean Maloy)

# ហ្គោលហ្វ៍មិត្តភាពប្រមូលថវិកា៥ម៉ឺនដុល្លារក្នុង ខួបគម្រប់២០ឆ្នាំរបស់មជ្ឈមណ្ឌលចែកចាយម្ហូបអាហារប្រចាំជ្រលងម៉ារីម៉ាក់

**ដោយៈ សុខា**

**អេន ដូវី រដ្ឋម៉ាសាឈូសេត ៖** កាលពីថ្ងៃទី៩ ខែកញ្ញាឆ្នាំ២០១៣កន្លងទីថ្មី៧នេះមជ្ឈមណ្ឌលចែកចាយម្ហូបអាហារប្រចាំតំបន់ជ្រលងម៉ារីម៉ាក់ ប្រមូលថវិកាបានប្រមាណ៥ម៉ឺនដុល្លារ សម្រាប់សកម្មភាពមនុស្សធម៌ចែកចាយអាហារ ។ ការរៃអង្គាសប្រមូលថវិកានេះប្រព្រឹត្តទៅនៅក្លឹបអ៊ិុឌានរីដជី ខាន់ទ្រី (Indian Ridge Country) ក្នុងក្រុងអេនដូវី រដ្ឋម៉ាសាឈូ សេតក្រោមអធិបតីភាពរបស់លោក ម៉ៃក៏ ឡែន ហ្ស៊ី (Mike Lenzi) ជាម្ចាស់វង្សសាលរៀបចំពិធីការ និងកម្មវិធីមុខការនានានៅក្នុងក្រុងឌ្រីខិត(Dracut) នៃរដ្ឋម៉ាសាឈូសេត ។

លក្ខណៈនៃកម្មវិធីរៃអង្គាសថវិកានេះ ប្រព្រឹត្តទៅដោយមានរបៀបវារៈនៃកម្មវិធីជារួមគឺ ការលេងហ្គោលហ្វ៍មិត្តភាពពិធីភោជនាហារក្នុងពេលរាត្រីរបៀបជាកម្មវិធីរាត្រីសមោសរក្នុងនោះរួមមានអ្នកលេងហ្គោលហ្វ៍ចំនួន១៤០នាក់ និងអ្នកចូលរួមពិសារភោជនាហារចំនួន២០០នាក់ សំដៅគាំទ្របេសកម្មមជ្ឈមណ្ឌលចែកចាយម្ហូបហារប្រចាំជ្រលងម៉ារីម៉ាក់ដែលផ្តល់ជំនួយផ្នែកអាហារជាបន្ទាន់ដល់គ្រួសារជាច្រើននៅតំបន់ឡូវែល និងតំបន់៣០ទៀតដែលនៅក្នុង និងក្រៅជ្រលងម៉ារីម៉ាក់ ។ មានប្រសាសន៍នៅក្នុងខួបគម្រប់២០ឆ្នាំនេះ លោក ជីម មីហ្គូដ (Jimmy Good) អគ្គនាយកមជ្ឈមណ្ឌលចែកចាយម្ហូបហារប្រចាំនៅជ្រលងម៉ារីម៉ាក់ បានថ្លែងថា សូមស្វាគមន៍មកកាន់ខួប២០ឆ្នាំ និងសូមអញ្ជើញភ្ញៀវកិត្តិយសទាំងអស់ចូលរួមលេងហ្គោលមិត្តភាព ដើម្បីប្រមូលថវិកាជួយដល់គម្រោងរបស់មជ្ឈមណ្ឌលចែកចាយម្ហូបហារ ។ ក្នុងនោះដែរ អគ្គនាយក ជីម មីហ្គូដ (Jimmy Good) បានបង្ហាញថា ការរៃអង្គាសប្រមូលថវិកា តាមរយៈការលេងហ្គោលហ្វ៍មិត្តភាពកាលពីឆ្នាំមុនបានទទួលជោគជ័យយ៉ាងធំធេងដោយយើងអាចធ្វើការឧបត្ថមអាហារបានដល់ទៅបរិមាណ៣លានផោន ។

នៅខែសីហាឆ្នាំ២០១២ប្រជាជនប្រមាណ៧ម៉ឺននាក់បានទទួលជំនួយផ្នែកអាហារជារៀងរាល់ខែផ្អែកលើស្បៀងនិងកម្មវិធីអាហារ ។ ក្រុមការងារមជ្ឈមណ្ឌលចែកចាយម្ហូបហារបានធ្វើរបាយការណ៍បញ្ជាក់ថា ជាមធ្យមមានប្រជាជនប្រមាណ៦ម៉ឺននាក់ស្វែងរកជំនួយអាហារប្រចាំខែស្ថិតក្នុងឃុំចំនួន៣២ក្នុងរដ្ឋម៉ាសាឈូសេត និងញូហាំស៊ែ ។

ជាមួយគ្នានោះដែរ ធនាគារអាហារក៏មានកម្មវិធីអាហារថ្ងៃត្រង់នារដូវក្តៅដែលផ្តល់អាហារថ្ងៃត្រង់១១ម៉ឺនកញ្ចប់ដល់ក្មេងៗរស់នៅក្នុងតំបន់ឡូវែល កាលពីខែកក្កដា និងសីហាឆ្នាំទៅ ។

លោកអគ្គនាយក ជីម មីហ្គូដ បានរំឭកថា សកម្មភាពគម្រោង និងកម្មវិធីទាំងអស់នេះអាចធ្វើបានអាស្រ័យដោយមានការជ្រោមជ្រែងពីសប្បុរសជនតួយ៉ាងលោក ម៉ៃរ៍ លែន ហ្ស៊ី (Mike Lenzi) ដែលបានធ្វើការឧបត្ថម្ភគាំទ្រដល់ធនាគារអាហារតាមរូបភាពជាច្រើន ដូចជាពេលវេលា ទ្រព្យសម្បត្តិ និងសេវានានា ៕



The employees of Lowell City Hall, including City Manager Bernie Lynch and Mayor Patrick Murphy have conducted annual food drives to help the Merrimack Valley Food Bank Food Distribution Center.


Photo caption:
l-r Merrimack Valley Food Bank President, Jimmy Good; Golf Tournament Committee Chairman and 2012 Honoree, Terry McCarthy; Tournament Honoree, Mike Lenzi; 2012 Honoree, Tom McKay

## $50,000 Raised For Food Distribution in Merrimack Valley Food Bank 20th Annual Golf Scramble and Awards Dinner

The Merrimack Valley raised over $50,000 for it Food Distribution programs on September 9, 2013 at Indian Ridge Country Club in Andover, MA. The event was held in honor of Mike Lenzi, owner of Lenzi Catering in Dracut, MA. There were over 140 golfers and 200 dinner attendees to help support the Food Bank, which provides emergency food supplies to families in Lowell and 30 other cities and towns in the Merrimack Valley and beyond. Learn more about the Merrimack Valley Food Bank by visiting www.mvfb.org or calling 978-454-7272.

**KhmerPost USA, LLC**
**សារពត៌មានខ្មែរផុសសហរដ្ឋអាមេរិក**
អាស័យដ្ឋាន 45 Merrimack St. Suite 218A. Lowell, MA 01852
លេខទូរស័ព្ទ Phone: 978 677-7163 | Fax: (978) 677-7092
អ៊ីម៉ែល info@khmerpost.us
អានកាសែតនៅគេហទំព័រ www.khmerpost.us
តាមដានយើងនៅទំព័រហ្វេសប៊ុក Like us at: www.facebook.com/KhmerPostUSA
ផ្សាយពាណិជ្ជកម្ម **Advertising**
អគ្គនាយកទីផ្សារ និងគ្រប់គ្រង សុបិន្ត ពិន Soben Pin, *Managing Partner*
លេខទូរស័ព្ទ 978 - 656 - 8141 (Mobile) 978 677-7163 (Office) |
អ៊ីម៉ែលsobenpin@khmerpost.us
អ្នកនិពន្ធ **Editorials**
និពន្ធនាយក ពិន សំខុន Roger Samkhon Pin, *Publisher & Editor-in-Chief*
(978) 942 - 1641 | rogerpin@khmerpost.us

អ្នកនិពន្ធកិត្តិយស **Contributed Writers:**
Kim Phien, Kim Sos, Mao Chan Somnom, Mam Yin,
Richard Howe Esq. Sengly Kong, Ph.D.
ច្នៃសោភ័ណភាពកាសែត **Design Artist**
Heng Chhunleng
ជំនួយការរដ្ឋបាល **Administrative Assistant**
Sokha Lim

KhmerPost USA, LLC is an independent newspaper that aims to facilitate mass communication among the Cambodian communities, their neighboring communities, and families. We aim to address local community, and national news; and give an insight into Cambodian & global news. We also strive to bridge the language and cultural gaps and reduce social isolation by publishing in Khmer & English. It published twice a month in Massachusetts serving Greater Lowell, Lynn, Revere, MA, Providence, RI, CT, NY, NJ, and Philadelphia, PA.

Mail subscription is available within the U.S. & Canada at $60.00 or 70 Euros in Europe per year.

The KhmerPost USA has full authorization from Bernard Krisher, the publisher of the Cambodia Daily to reproduce all the articles that are produced by the Cambodia Daily free of charge effective date: 6/19/2009

# ប្រណាំងកង់ (Bike-a-Thon) ឬ បៃខ៍ខាថុន ឆ្នាំ២០១៣ នឹងធ្វើនៅថ្ងៃទី៥ តុលា ឆ្នាំ២០១៣ ខាងមុខ

**អត្ថបទដោយ : ចេម អស៍ទីស**

**ប្រែសម្រួលដោយ : សុខា**

**ក្រុងឡូវែល:** ថ្ងៃទី៥តុលា ឆ្នាំ២០១៣ គឺជាខួបពីរឆ្នាំនៃការប្រណាំងកង់បៃខ៍ខាថុន (Bike-a-Thon) ដែលនឹងរៀបចំដោយមូលនិធិសហគមន៍ដើម្បីវឌ្ឍនភាពឡូវែល ។ ការប្រណាំងកង់នឹងមានចម្ងាយ១៥ម៉ាយ ហើយទឹកប្រាក់ ១០០ភាគរយនៃអ្នកចូលរួម និងក្រុមរបស់ពួកគេដែលធ្វើការរៃអង្គាសលុយក្នុងកម្មវិធីនោះនឹងផ្តល់ជូនដល់អង្គការមិនស្វែងរកប្រាក់ចំណេញណាមួយដែលសាមីខ្លួនប្រកួតជាអ្នកជ្រើសរើស ។ កាលពីឆ្នាំមុនមានក្រុមចូលរួមប្រកួតចំនួន២០ ហើយបានធ្វើការរៃអង្គាសថវិកាដល់ទៅប្រហែល ២ម៉ឺន៥ពាន់ដុល្លារ($25,000) ។ កម្មវិធីឆ្នាំនេះផ្ទាល់នឹងធ្វើការបង្ហាញនូវអង្គការថ្មីមួយចំនួនក៏ដូចជាក្រុមឆ្នាំមុនផងដែរដែលនឹងចូលរួមសារជាថ្មីក្នុងឆ្នាំនេះ ។

ក្នុងចំណោមក្រុមដែលបានចូលរួមកាលពីឆ្នាំមុន គឺក្រុមរបាំអង្គរ ឬ (Angkor Dance Troupes) ហើយសមាជិកនៃក្រុមអង្គរ "Team Angkor" បានប្រមូលថវិកាប្រមាណ $1400 ដើម្បីប្រារព្ធនូវខួប២៥ឆ្នាំរបស់ខ្លួន និងប្រើប្រាស់ថវិកាដែលប្រមូលបានមកនោះ បង្កើតជាអប្សរាថ្មលំដាប់ខ្ពស់ (World Premiere of Apsara Dancing Stones) កាលពីខែតុលាឆ្នាំ ២០១២ ។ ឆ្នាំនេះថវិកាដែលនឹងប្រមូលបាននឹងត្រូវយកទៅប្រើនៅក្នុងការពង្រីកថ្នាក់រៀនរាំរបាំ និងអភិវឌ្ឍន៍ក្រុមរបាំសំដៅឆ្ពោះទៅកាន់ទស្សនៈវិស័យ ១០ឆ្នាំក្នុងការបង្កើតសភារបាំអង្គរនៃតំបន់ឡូវែល (Lowell Angkor Arts Academy) ។ កម្មវិធីរត់ប្រណាំងឆ្នាំនេះនឹងប្រព្រឹត្តទៅនៅថ្ងៃសៅរ៍ ទី៥ ខែតុលា ឆ្នាំ២០១៣ វេលាម៉ោង៩ព្រឹក នៅបរិវេណវិហារសាសនាគ្រឹះទីមួយក្នុងឡូវែល (Lowell First Church of Nazarene) ផ្លូវ 1195 Varnum Ave, Lowell ។ រាល់ព័ត៌មានបន្ថែមស្តីពីការឧបត្ថម្ភគាំទ្រដល់ក្រុមរបាំអង្គរ ឬចូលរួមចុះឈ្មោះប្រណាំងកង់ សូមចូលកាន់គេហទំព័រ www.gicf.dojiggy.com.



## Second Annual Bike-a-Thon is Coming on October 5th, 2013

*Written By James Ostis*
*Translated by Sokha*

On October 5th, the Greater Lowell Community Foundation will host second annual River Ride Bike-a-Thon. This 15 -mile bike ride is a fundraising event , where 100 % of all money each participant and their team raises goes towards a non-profit of the rider's choice. Last year 20 teams participated and raised approximately $25,000. This year's event will feature several new organizations as well as some returning for another go.

One team participating for a second year in a row is a group of riders representing the Angkor Dance Troupe. Last year, the members of "Team Angkor" raised over $1400 in celebration of the troupe's 25th anniversary and used the funding to help produce the world premiere of Apsara Dancing Stones in October 2012. This year the funds raised will help expand classes and bring the Troupe one step closer to their 10-year vision to open the Lowell Angkor Arts Academy.

The Greater Lowell Community Foundation River Ride Bike-a-Thon and Family Fun Ride kicks off Saturday October 5th at 9:00 a.m. at the Lowell First Church of the Nazarene, 1195 Varnum Ave, Lowell. For more information on how to support Angkor Dance Troupe or any of the other teams participating in the Bike-a-Thon, or to sign up to ride for your own local nonprofit, please visit **www.glcf.dojiggy.com**

## តមកពីទំព័រទី ១ សង្គ្រោះជាតិ : ទន់ភ្លន់ តែរឹងមាំ...

ជួបពលរដ្ឋគ្មានតក់ស្លុតនឹងការសំឡុតប្រើពាក្យសុទ្ធតែស្លូតបូតគ្មានណែនាំឱ្យខឹងសម្បារគោរពព្រះមហាក្សត្រខ្លួនសមតាមឋានន្តរស័ក្តនៃស្តេចមហានគរ... សម រង្ស៊ី-កឹម សុខា បានបង្រៀនដល់ប្រជាជាតិខ្មែរនូវវប្បធម៌ថ្មីស្រឡាងមួយដែលមេរៀននៃទំនាក់ទំនងមួយបាននាំពាក្យគ្រប់ម៉ាត់របស់ថ្នាក់ដឹកនាំសង្គ្រោះជាតិក្លាយជាវត្ថុទិព្វជ្រួតជ្រាបដល់អ្នកស្តាប់បានគ្រប់ម៉ាត់យកទៅគិតពិចារណាបាន ហើយបញ្ចេញប្រតិកម្មមកវិញប្រកបដោយសុភវិនិច្ឆ័យ បើសម្រាប់បច្ចាមិត្រខាងគណបក្សប្រជាជនវិញ ក៏អាចស្តាប់បានតែទទួលបាននូវភាពអាម៉ាស់ជាមួយគ្នាមេៗខំស្វែងរកភាពស្រឡាញ់រាប់អានពីសកម្មជនខ្លួនតែបានលទ្ធផលផ្ទុយទៅវិញ ធ្វើឱ្យគេខ្លាចនឹងស្អប់កាន់តែខ្លាំងឡើង។

**យុទ្ធសាស្ត្រៈ** ប្រើគំនិតចំចំណុចប្រកបដោយន័យសីលធម៌ជា"អាវុធ"ដូចជា"ប្តូរ"ពីអាក្រក់ទៅល្អ "យុត្តិធម៌"ជូនសន្លឹកឆ្នោតប្រជាពលរដ្ឋ "ខ្មែរ"ទាំងអស់ជាបងប្អូនប្រើពាក្យសម្តីទាមទារខ្លីស្រួលយល់ជា"គ្រាប"យកមហាជនជាសាក្សីនៃពីត្រិការណ៍ជា"យុទ្ធជន"គណបក្សសង្គ្រោះជាតិបានផ្តល់ឱ្យប្រជាជនខ្មែរបានក្លាយជាម្ចាស់នៃព្រឹត្តិការណ៍អាចប្រយុទ្ធដោយខ្លួនឯងបាននឹងជាម្ចាស់នៃជ័យជំនះលើជនផ្តេចការជាចោរលួចសន្លឹកឆ្នោតក្នុងចម្បាំងដែលម្ខាងប្រើ "កាំភ្លើង"តែម្ខាងទៀតប្រើ"ខួរក្បាល"។ ដោយសារយុទ្ធសាស្ត្រនេះ សម រង្ស៊ី-កឹម សុខា បានផ្តល់ជូនពលរដ្ឋខ្មែរនូវឃ្លាំងនៃបរិក្ខារជំនួយមិនចេះអស់ គឺបងប្អូនខ្មែរជាសាច់ឈាមនៅក្រៅប្រទេសឱ្យចូលរួមគាំទ្រទៅក្នុងស្រុកនឹងឱ្យប្រមូលបរទេសនៃប្រទេសសេរីមកជាមិត្តនៃការរំដោះប្រជាពលរដ្ឋខ្មែរថែមទៀត ។

**សង្គ្រាមត្រជាក់ៈ** ថ្វីត្បិតតែមានវាគ្មិនជាច្រើនហើយបញ្ចេញយោបល់ឱ្យបោះបង់ការចូលរួមបោះឆ្នោតនៅកម្ពុជា សម រង្ស៊ី-កឹម សុខា នៅតែជឿថា "សម្លេងឆ្នោតរបស់ពលរដ្ឋទើបជាជាមធ្យោបាយសាកសិទ្ធជាងគេ"សម្រាប់ដំណោះស្រាយខ្មែរ ។ អ្នកទាំងពីរបានយក "ខួរក្បាល"ទៅធ្វើសង្គ្រាមត្រជាក់ដែលគ្រប់មជ្ឈដ្ឋានទស្សន៍ទាយថា "ចាញ់ល្បិចគណបក្សប្រជាជន"មុនរួចជាស្រេច។ ការរៀប"យុទ្ធជន" ចូលប្រយុទ្ធដោយយកតែអ្នកមានប្រវត្តិសុច្ចរិតដូចគ្នាបានបង្ករទំនុកចិត្តពីស្រទាប់រាស្ត្រដូច "បាក់ទំនុប" មិនថា តែគណបក្សសេរី ឬរាជានិយមទេ សូម្បីតែគណបក្សប្រជាជនខ្លួនឯងក៏មិនអាចទប់ចិត្តមិនស្រឡាញ់គណបក្សសង្គ្រោះជាតិបានដែរ ដោយសារតែរដ្ឋាភិបាល "ទុច្ចរិត" បានធ្វើបាបរាស្ត្រច្រើនជំនាន់ណាស់ហើយ ។ ហ៊ុន សែន-ជា ស៊ីម-ហេង សំរិន ធ្លាប់ប្រយុទ្ធតែជាមួយមនុស្សកាចដូចគ្នា ឥឡូវប្រយុទ្ធទល់នឹងក្រុមអហឹង្សា គឺ "គ្រាប់រំសេវ"ទល់នឹងខ្យល់គ្មានកំហឹងមិនដឹងជាទប់ទល់របៀបណា? ស្បៀកឯកសណ្ឋានប្រដាប់អាវុធស្មានថា គេខ្លាចដូចមុនៗបែរជាដូចក្រុមតួល្ខោនត្រូវបានរាស្ត្រយកផ្កាមកឱ្យនឹងទឹកមកឱ្យផឹក...បាញ់បាតុករមិនកើត ព្រោះអ្នកទាំងនោះមានគុណយកជីវិតទៅប្តូរនឹងជីវភាពប្រសើរនៃគ្រួសារទាំងកងទ័ពនឹងទាំងក្រុមស្បៀកឯកសណ្ឋានគ្រប់រូបដែរ ។ តើ"នយោបាយឈ្នះឈ្នះ"របស់គណបក្សប្រជាជននៅមានប្រសិទ្ធភាពតទៀតទេ បើទុកស្ថានភាពរំជើបរំជួលនេះយូរទៅបាតុកម្មកាន់តែធំឡើង រាស្ត្រលែងខ្លាចហើយស្អប់គណបក្សប្រជាជនកាន់តែច្រើនសញ្ញាចាញ់រឹមិនរួចកាន់តែខិតចូលមកជិត ហើយត្រូវធ្វើយ៉ាងណា? "បាញ់ ឬចាញ់" ច្រកបាញ់គ្មានច្រកចាញ់មានច្រើននៅច្រកតូចមួយសម្រាប់ចេញដែរ គឺ"ចរចា ដើម្បីទិញពេលចាញ់" ដោយធ្វើសម្បទានឱ្យច្រើន រហូតគណបក្សសង្គ្រោះជាតិសុខចិត្តនេះជាស្ថានភាពទន់ជ្រាយរបស់ ហ៊ុន សែន នាថ្ងៃទី១៧ កញ្ញា២០១៣ នេះ ។

**ព្រះមហាក្សត្រៈ** គេសង្ឃឹមថា ក្នុងរឿងនេះមានព្រះមហាក្សត្រគង់ជាឯករាជនឹងអព្យា

តទៅទំព័រទី ២៦



# អេនីវង្ស (Ani Vong) និង ហ្វ្រេងគី (Franky) : HUMANITY
## នៅដោនថោនឡូវែល (Lowell) រៀបចំតុបតែងខ្លួន មិនចាញ់ក្រុងបុសស្តុន (Boston)

**អត្ថបទដោយៈ សុខា**

ក្រុងឡូវែលៈ “WE ARE ALL BEAUTIFUL! FASHION IS FOR EVERYBODY” "ជាភាសាខ្មែរ" អ្នករាល់គ្នាសុទ្ធតែមានសម្រស់ស្រស់ស្អាតគ្រប់គ្នា ។ ការតុបតែងរៀបចំខ្លួនឱ្យទាន់សម័យកាល គឺជារឿងដែលអ្នករាល់គ្នាអាចធ្វើបានទូទៅមិនចំពោះ។ "អេនី វង្ស (Ani Vong) និយាយដោយទំនុកចិត្ត និងទឹកមុខញញឹម


សុវណ្ណា ពៅ (Sovanna Pouv)

មកកាន់សាពតិមានខ្មែរផុសសរអា។ ស្ត្រីវ័យក្មេងសាច់ចាំ អេនី វង្ស ជាអ្នកគ្រប់គ្រងទូទៅនៅក្នុងហាងលក់សម្លៀកបំពាក់មានឈ្មោះថា យូម៉ែននីធី ឬ HUMANITY មានទីតាំងក្នុងទីប្រជុំជនក្រុងឡូវែល ។ នាងមានសេចក្ដីសោមនស្សផ្ដល់ការចែករំលែកបទពិសោធន៍រៀបរាប់ប្រវត្តិហាង និងលក្ខណៈទូទៅនៃការប្រកបមុខរបរលក់សម្លៀកបំពាក់សម្រាប់ស្ត្រី គ្រប់វ័យដោយបញ្ជាក់ថា ស្ថាបនិកហាងឈ្មោះ ហ្វ្រេងគី (Franky) បានផ្ដើមបើកហាងនៅឆ្នាំ២០០៨ ដោយដាក់ឈ្មោះថា យូម៉ែននីធី ឬ HUMANITY ផ្អែកទៅលើគោលបំណងនៃជំនួញមួយនេះតាមរយៈផលិតផលតុបតែងខ្លួនប្រណិត១នេះជាការចង់បង្ហាញនូវសេចក្ដីស្រឡាញ់ដែលមានចំពោះប្រជាជនក្នុងសហគមន៍ និងចង់ឱ្យសហគមន៍បានទទួលនូវសេវាមួយដែលពួក គេអាចរៀបចំតុបតែងខ្លួនក្លាហានបង្ហាញសម្រស់របស់ពួកគេមិនថា ពួកគេ ចាស់ ក្មេង ទាប ខ្ពស់ ធាត់ ឬស្គមយ៉ាងណាក៏ដោយ ព្រោះស្ថាបនិកហាងនេះជឿជាក់ថា ស្ត្រីទាំងអស់ជាទេពធីតាក្នុងកែវភ្នែកមនុស្សយ៉ាងហោចម្នាក់។ សេចក្ដីចង់បាន ពីអតិថិជនដែលមកកាន់ហាងយូម៉ែននីធី




អេនី វង្ស (Ani Vong)

ឬ HUMANITY គឺ អេនី និង ហ្វ្រេងគីចង់ឮភ្ញៀវនិយាយថា អូ ម៉ាយ ហ្គដ Oh My God ពេលសម្លៀកបំពាក់ដែលគេផ្ដុំតុបតែងសក្ដិសមលើរាងកាយរបស់ពួកគេ។ លោក សុវណ្ណា ពៅ (Sovanna Pouv) ពីខាង អឹមខេ ធីក MKtix បានធ្វើការវាយតម្លៃខ្ពស់ចំពោះការយកចិត្តទុកដាក់បំពេញការងារ និងរៀបចំស្ទីលសម្លៀកបំពាក់ដែលច្នៃចេញពីគំនិតច្នៃប្រឌិតរបស់ អេនី វង្ស (Ani Vong) ។ ហាងយូម៉ែននីធី ឬ HUMANITY ស្ថិតនៅវិថី មែរីម៉ាក (Marrimack Street) ចំកណ្ដាលក្រុងដែលអតិថិជនគ្រប់ស្រទាប់អាចមកទទួលនូវម៉ូដប្លែក១ ស្អាត១ ទាន់សម័យ និងសក្តិសមតាមចំណូលចិត្ត។ បន្ថែមលើនេះ ម៉ូដសម្លៀកបំពាក់សម្រាប់រដូវស្លឹកឈើជ្រុះ(Fall or Autumn) ក៏កំពុងតែដាក់តាំងបង្ហាញបង្អួតខ្លួនរង់ចាំទទួលអតិថិជនទាំងអស់ផងដែរ ៕

# រាត្រីស្វែងយល់ពីការបោះឆ្នោត

**ក្រុងឡូវែល :** រាត្រីស្វែងយល់ពីការបោះឆ្នោត ត្រូវបានធ្វើឡើងកាលពីថ្ងៃទី ២១ ខែកញ្ញា ឆ្នាំ២០១៣ ក្នុងគោលបំណងពង្រីងការយល់ដឹងអំពីការបោះឆ្នោតដល់សហគមន៍ ដូចជាការបញ្ជាក់ឱ្យបានច្បាស់ពីកាលបរិច្ឆេទ


Janet Ng, the owner of Etsogo with Van Pech, Lowell City Council Candidate

ផុតកំណត់ចុះឈ្មោះបោះឆ្នោតត្រឹមថ្ងៃទី១៦ ខែតុលា និងព័ត៌មានពីលទ្ធភាពដែលអ្នកបោះឆ្នោតអាចធ្វើការបោះឆ្នោតគាំទ្របេក្ខជនបាន ៩រូប នៅថ្ងៃបោះឆ្នោតទូទៅនាពេលខាងមុខ ដែលនឹងប្រព្រឹត្តទៅនៅថ្ងៃទី៥ វិច្ឆិកា ឆ្នាំ២០១៣ ។ បន្ថែមលើនេះរាត្រីស្វែងយល់ពីការបោះឆ្នោតធ្វើឡើងសំដៅលើកទឹកចិត្តសហគមន៍ទាំងមូលឱ្យចូលរួមសកម្មជាមួយរដ្ឋាភិបាលក្នុងតំបន់ ។ កម្មវិធីនៃរាត្រីស្វែងយល់ពីការបោះឆ្នោត ឬ Voter Awareness Night ប្រព្រឹត្តទៅនៅទីតាំងចំនួន ៣ គឺភោជនីយដ្ឋាន អេតសូហ្គូ Etsogo អាហារដ្ឋានថៃមអៅកាហ្វេ Time Out Café និងហាងនំលីតថលឌីឡៃថ៍ Little Delights Bakery ។ រាត្រីស្វែងយល់ពីការបោះឆ្នោតអាចនឹងត្រូវបានរៀបចំយ៉ាងហោចណាស់ម្តងទៀតដោយក្រុមឃោសនាគាំទ្របេក្ខជន វ៉េន ពេជ្រ ក្នុងយុទ្ធនាការបោះឆ្នោត ហើយនឹងធ្វើការមុនការបោះឆ្នោតទូទៅឈាន ចូលមកដល់ ត្បិតលក្ខណៈនៃកម្មវិធីនេះជាប្រភេទបែបកំសាន្ត និងផ្តល់ប្រយោជន៍ល្អផ្សព្វផ្សាយវិស័យជំនួញក្នុងសហគមន៍បានប្រសើរឡើង ។ ស្រង់ប្រសាសន៍លោក វ៉េន ពេជ្រ ដែលបានលើកឡើងក្នុងកម្មវិធីដោយមិនសំដៅថា អ្នកបោះឆ្នោតឱ្យអ្នកណាក៏ដោយ តែអ្វីដែលសំខាន់ គឺសម្លេងរបស់អ្នកត្រូវបានគេដឹងឮឱ្យតម្លៃ ហើយនេះអត្ថន័យនៃសង្គមប្រជាធិបតេយ្យ ៕

# Voter Awareness Night at Downtown Lowell

By James Ostis

What do cupcakes, paper fortune tellers, and Plan E Government have in common? Usually it's probably not too much. But in Downtown Lowell on September 21st, they all played a key part in Voter Awareness Night-a celebration of local democracy and local business hosted by the Van Pech for Lowell City Council Team. Volunteers set up tables at three downtown locations, Etsogo, Time Out Café, and Little Delights Bakery and presented games and activities designed to raise excitement and awareness in advance of the city's upcoming local elections.


Lowell resident Dan Adam with Lianna Sachiyo Kushi

Visitors to Voter Awareness Night were each given a "passport" for the evening and earned the right to raffle tickets by attending each of the three Merrimack Continued to Page09

**ប្រែសម្រួលដោយ : សុខា ពីអត្ថបទដើមដោយ ចេនីហ្វឺ មីយឺរ ជំនួយការអភិបាលក្រុង**



ចេញពីគេហទំព័រផ្លូវការសាលាក្រុង Blog Name: Room 50Blog URL: http://room50.wordpress.com

បង្ហោះនៅថ្ងៃទី ២០ កញ្ញា ២០១៣

សកម្មភាពប្រាស្រ័យទាក់ទងលេងជាមួយគ្នាទៅវិញទៅមកនាំឱ្យមានភាពរីករាយ ហើយមានសារប្រយោជន៍ដល់រាងកាយអារម្មណ៍ និងភាតរភាពសង្គម ។

កាលពីថ្ងៃសុក្រ ក្លឹបក្មេងប្រុស និងស្រី ឬបយស៍អេនហ្គីលក្លឹបបានប្រារព្ធនូវទិវានីកកូឡូដេអនលេងកំសាន្តជាសាកល ឬ Nickolodeon's Worldwide Day of Play ដែលជាថ្ងៃផ្តល់តម្លៃទៅលើភាពសកម្មនៃចលនារបស់មនុស្ស និងគុណប្រយោជន៍នៃការប្រតិបត្តិខ្លួនឱ្យសប្បាយរីករាយ ។ ពិបាកនឹងរកមនុស្សដែលមិនចង់សប្បាយណាស់ តើមែនទេ ?

ប្រាកដណាស់ក្មេងៗប្រមាណ២០០នាក់ បានចូលរួមលេងល្បែងផ្សេងៗការដោះស្រាយឧបសគ្គល្បែងទាញព្រ័ត្រ ឬ ធីក អូ វ៉រ (tug-o-war) រាំលេង និងការលងផ្ទាត់ ហិក ពីតារាង ហិក (bounced the heck out of a bounce house) ។ អភិបាលក្រុងផាទ្រីក អូ មឺហ្វី (Mayor Patrick Murphy) បានប្រកាសជាសាធារណៈអំពីការទទួលស្គាល់នូវទិវានីកកូឡូដេអនលេងកំសាន្តជាសាកលក្នុងក្រុងឡូវែល ឬ Nickolodeon's Worldwide Day of Play ដែលប្រព្រឹត្តទៅកាលពីថ្ងៃសុក្រទី២០កញ្ញា ព្រមទាំងតម្លៃតួនាទីដ៏សំខាន់របស់ក្លឹបក្មេងប្រុស និងស្រី ឬបយស៍អេនហ្គីលក្លឹប ក៏ដូចជាការលើកសរសើរដល់នាយកប្រតិបត្តិ ចូ ហាំងហ្គឺ Executive Director Joe Hungler) ។ ខ្លឹមសារជារួមនៃទិវានីកកូឡូដេអន លេងកំសាន្តជាសាកល ឬ Nickolodeon's Worldwide Day of Play ជាគោលដៅអភិបាលកិច្ចល្អក្នុងតំបន់ឡូវែលជាផ្នែកមួយដឹកនាំឱ្យប្រជាជនឡូវែលមានស្ទីលនៃការរស់នៅប្រកបដោយផាសុកភាព និងរីករាយស្រស់ស្រាយ ៕



# យើងត្រៀមខ្លួនហើយ តោះលេង !





## Ready. Set. Play!

*By Jennifer Myers, Mayor's Aid*
*Translated by Sokha*

Playing is fun. And it is good for you - physically, emotionally, socially.

On Friday, the Boys and Girls Club of Greater Lowell celebrated Nickolodeon's World wide Day of Play, a day designed to embrace being active and having fun. Who can argue with that?

More than 200 kids participated in games, obstacles courses, tug-o-war, dancing, musical chairs and bounced the heck out of a bounce house.

Mayor Patrick Murphy presented Boys and Girls Club of Greater Lowell Executive Director Joe Hungler with a proclamation officially proclaimnig Friday September 20 Worldwide Day of Play in Lowell. The essence of the day embodies the goals city government has for all of Lowell's citizens - a healthy lifestyle and more FUN !

*Courtesy by City Hall Official Blog "Room 50" Posted on September 20, 2013*

*Continued from page 08* **Voter Awareness Night**

St locations. Each shop had a different game, Little Delights guests played spin the wheel trivia, Time Out patrons had to figure out which "fact" was incorrect in Two Truths &A Lie, and visitors to Etsogo received election facts from a paper fortune teller. All three locations were also stocked with voter registration forms, sample ballots, polling location info, voter rights cards, and other information about Lowell's election process.Over 50 participants visitedat least one of the three spots over the course of the night.

Many visitors cited the creative way information was presented. Lowell resident Dan Adam thoroughly enjoyed the evening's festivities, noting, "I thought it was a unique idea and a lot more informative than most political events, especially for younger voters. I enjoyed visiting the three locations and learning about the process in a fun way."

Janet Ng, the owner of Etsogo was thrilled that the evening's organizers highlighted local business as well, "I love how they used this event to help out small businesses in downtown. It's the first time in the three years we've been open that something like this took place, I hope they do more in the future."

Building off the evening's success, the team is looking to host one or two more Voter Awareness Nights before the city's general election on November 5th.The goal of these events is to ensure that voters know important facts such as the deadline to register to vote (October 16) and that you can vote for up to nine council candidates in the city council election as well as keep people engaged and excited about local government.



# ONEWORLD PHARMACY

Expect Excellence

# ឱសថស្ថានខ្មែរ

នៅក្រុងឡូវែល ដំបូងបង្អស់




First Khmer Pharmacy in Lowell
12 years as a retail drug store pharmacist

**សួស្តី!ឱសថស្ថានខ្មែរនៅឡូវែល**

- យើងយកថ្នាំជូនដល់ផ្ទះ
- ឱសថការី និយាយនិងសរសេរខ្មែរ
- ពិគ្រោះពីថ្នាំដែលពេទ្យចេញឲ្យ
- អាចស្នើឲ្យចែកថ្នាំ តាមពេលប្រើ
- អាចស្នើឲ្យកាត់ថ្នាំគ្រាប់ជាភាគតូចៗ
- ទទួលយកអ៊ិនស្វ៊ិន ស្ទើរគ្រប់ធុន
- ប្តូរកន្លែងបើកថ្នាំជូនបាន



**Hours of Operation**

Monday-Friday: 9AM-7PM
Saturday: 9AM-4PM
Closed Sunday

## One World Rx

HealthMart Pharmacy
www.pneworldpharmacy.org

138 Highland Ave., Unit 5
Lowell, MA 01851




គ្រូពេទ្យអាចបញ្ជាឲ្យទិញថ្នាំតាមទូរស័ព្ទ ហ្វាក់ និង E-script បាន

Tel: 978-455-4066 Fax: 978-455-1578

# សុខភាពល្អប្រសើរ ក្នុងដៃលោកអ្នក



បើលោកអ្នកមានជំងឺ ឈឺហើមជើងដៃពិបាកធ្វើចលនា -ឈឺនោមច្រើន -ដេកស្រម៉ុកខ្លាំង -មានស្ករច្រើនក្នុងឈាម -ឡើងទម្ងន់ធាត់ -ស្បែកឡើងកន្ទួល លោកអ្នកត្រូវចាំថា មានឱសថសក្តិសិទ្ធមានលក្ខណ:ជាប្រភេទចំណី អាចជួយឱ្យសះស្បើយបានយ៉ាងឆាប់រហ័ស ។ ឱសថធម្មជាតិ ជាប្រេងចម្រាញ់ចេញពីពន្លកគ្រាប់ស្រូវមានការត្រួតពិនិត្យដោយវេជ្ជបណ្ឌិតត្រឹមត្រូវ អាចប្រើដោយមិនប្រឆាំងនឹងថ្នាំពេទ្យ ដែលប្រើប្រាស់រាល់ថ្ងៃទេ ។
លោក វិចិត្រ ភូស៊ីវុឌ ៦២ឆ្នាំ មុនប្រើ"អេមស្កា" គាត់ឈឺទឹក នោមផ្អែម ឈឺបេះដូង លើសឈាម -"អាលើជី"-ឈឺសន្លាក់ ដៃជើង ឈឺក្រពះ... ។ល។

**បន្ទាប់ពីបានប្រើ"អេមស្កា"**

លេប៩គ្រាប់ក្នុង១ថ្ងៃ-បីថ្ងៃក្រោយមក អន់ឈឺសន្លាក់ដៃជើង -១ខែក្រោយអាចរត់ឡើងជណ្តើរបាន-បីខែក្រោយទៀតសរសៃឈាម២លែងស្ទះ-ឥឡូវនេះអាចរត់បាន១០គីឡូម៉ែត្រ-ធ្វើតេស្តឈាមមានភាពហ្នឹងនល្អឡើងវិញ ៕

**ចង់ដឹងបន្ថែមលេខទូរស័ព្ទលេខ**

-ហ្វីឡាខាងត្បូង ២១៥ ២៣៧ ៥៧០៩ សាមន់ថា -ហ្វីឡាខាងជើង ២១៥ ៦៦៧ ៨៤៣១ រីដ័រ

# Lowell Community Health Center

161 Jackson Street, Lowell, MA 01852

## Caring for Lowell




Lowell Community Health Center provides professional health care services to the people of Greater Lowell. The Health Center's caring staff speak Khmer and many other languages. We accept all forms of health insurance, and we can help you apply for insurance coverage for your medical care. Services include:

- Doctor's Visits
- Behavioral Health Counseling
- Social Services
- Traditional healing, acupuncture, massage therapy

**Accepting New Patients**

មណ្ឌលសុខភាពសហគមន៍ក្រុងឡូវែលផ្តល់ជូននូវសេវាសុខភាពដោយអ្នកមានជំនាញច្បាស់លាស់ទៅដល់ប្រជាជនទូទៅដែលរស់នៅក្នុងតំបន់ឡូវែល ។ យើងមានបុគ្គលិកថែទាំសុខភាព ដែលនិយាយភាសាខ្មែរ និងភាសាផ្សេងៗទៀត ។ យើងក៏អាចជួយលោកអ្នក ក្នុងការដាក់ពាក្យសុំការធានាសុខភាព សម្រាប់សេវាថែទាំសុខភាពលោកអ្នកផងដែរ ។ សេវាថែទាំសុខភាពរួមមាន :

- ការពិគ្រោះយោបល់ជាមួយវេជ្ជបណ្ឌិត
- ការប្រឹក្សាអំពីសុខភាពផ្នែកអារម្មណ៍ និងផ្លូវចិត្ត
- សេវាសង្គម
- ការព្យាបាលបែបបុរាណ បែបចាក់ម្ជុលវិទ្យាសាស្ត្រ បែបម៉ាសាធ្វើសរសៃ

**Services in English & Khmer**



**Join Our Team. Now Hiring!**

## Work at Lowell Community Health Center

The Health Center offers rewarding career opportunities to medical and behavioral health professionals and support staff. Visit our website to learn more about joining our diverse team.

មណ្ឌលសុខភាពកំពុងផ្តល់ឱកាសដល់ពេទ្យផ្នែកព្យាបាល ពេទ្យជំនាញផ្នែកអារម្មណ៍ និងផ្លូវចិត្ត និងបុគ្គលិកថែទាំសុខភាព ។ សូមចូលទៅកាន់គេហទំព័រ www.lchealth.org ដើម្បីស្វែងយល់ពីរបៀបចូលរួមជាមួយក្រុមដែលមានលក្ខណ:សំបូរបែបនេះ ។

978-221-6777

www.lchealth.org 

# សហគមន៍ខ្មែរនៅប៉ារីស នៃប្រទេសបារាំង

ដោយ : ពិន សំខុន

ថ្ងៃ២២កញ្ញា២០១៣ យន្តហោះ "ប៊ូអីង ៧៤៧ អ៊ែរហ្វ្រង់"បាននាំដំណើរយើងចេញដំណើរពី"បូស្តុន" នៅម៉ោង៧:៣០ល្ងាចហោះកាត់មហាសាគរ"អាត់ឡង់ទីក"តាមផ្លូវចំណិតកោងនៃប៉ូលខាងជើងកាត់តាមកាណាដា,អៀឡង់ខាងជើង,អង់គ្លេសសំដៅទៅកាន់ទីក្រុងប៉ារីសនៃប្រទេសបារាំងក្នុងល្បឿន១ពាន់គ.ម ក្នុងមួយម៉ោងនឹងក្នុងកំពស់១០គ.ម មកដល់ក្រុងប៉ារីសនៅម៉ោង៨.១៥នាទីនៃថ្ងៃ២៣ គឺ១ថ្ងៃបន្ទាប់ ដោយប្រទេសបារាំងនឹង ស.រ.អា. រស់ម៉ោងខុសគ្នាចំនួន៦ម៉ោង ។

អេរីកជាអ្នករស់នៅស្រុកបារាំងម្នាក់បានមកទទួលយើងយកទៅសំណាក់នៅដំបន់ខាងលិចក្រៅក្រុងប៉ារីសមួយដែលសំបូរខ្មែររស់នៅឈ្មោះ "ម៉ានឡាវ៉ា eLMa rne la Vallee" ។



ប្រជាពលរដ្ឋភៀសខ្លួនអាស៊ីអគ្នេយ៍បានមកដល់កាលពី៤០ឆ្នាំមុន ចូលចិត្តមកនៅតំបន់ពាណិជ្ជកម្មខាងត្បូងក្រុងប៉ារីសសង្កាត់លេខ១៣ ឬខាងជើងនៅសង្កាត់លេខ២០ និងលេខ១៧ ជាពិសេសបន្ទាប់មក នា២០ឆ្នាំចុងក្រោយនេះ សហគមន៍ខ្មែរបាននាំគ្នាមករស់នៅយ៉ាងច្រើនកកកុញនៅតំបន់ថ្មីស្រស់ស្អាត នា"ម៉ានឡាវ៉ាឡេ" រួមប្រជុំដោយក្រុងតូចដែលខ្មែរ ឡាវ ចិន ចូលចិត្តរស់ជុំគ្នា គឺ"ឡូញ Lognes-ទ័រស៊ី Torcy-ស្ហង់សួម៉ាន Champs sur Marne-ណ័រស៊ីឡឺ ក្រង Noisy le Grand-ក្រេតីយ




Creteil..." មានលំអដោយសួនឧទ្យានទីផ្សារអាស៊ីធំៗ មានសមាគមសិល្បៈវប្បធម៌ខ្មែរមានថ្នាក់បង្រៀនសិល្បៈនឹងអក្សរខ្មែរ នឹងមានវត្ត៣ នៅបំរើជំនឿសាសនាថេរវាទនៃសហគមន៍មាន : វត្តក្រេតីយ វត្តស្ទង់ និងវត្តបាញ្ញើ...តែនៅមិនទាន់មានតំណាងរាស្ត្រក្រុងនៅឡើយទេ ។ តំបន់ថ្មីជាងគេដែលអ្នកមានជំនាន់ថ្មីនឹងចាស់នាំគ្នាមករស់នៅប្រមាណជាង១០ឆ្នាំចុងក្រោយបង្អស់នេះ គឺក្រុង"កូឡេស្ហាង Collegiens" ដែលស្ថិតនៅជាប់គ្នានឹងឧទ្យាន "ឌីស្នេឡឺន- Disney Land" អាមេរិកាំងដ៏ធំសម្បើម និងដ៏ល្បីល្បាញ ។ ចំណែកតំបន់ខាងលិច និងខាងជើងនៃប៉ារីស មានខ្មែររស់នៅរប៉ាត់រប៉ាយមិនជុំគ្នាទេ ។

ប៉ារីស និងតំបន់ជុំវិញ ជាតំបន់ដែលបញ្ញាវន្តមកបន្តកម្មសិក្សាពីកម្ពុជាច្រើនមកតាំងទី ហើយរស់មុំនេះបន្តបន្ទាប់គ្នា ។ គេសង្កេតក្នុងចំណោមនោះមានសាស្ត្រាចារ្យ ឌុក រ៉ាស៊ុ និងភរិយាសាស្ត្រាចារ្យ កេង វ៉ាន់សាក់ នឹងភរិយា (ស្លាប់)លោកស៊ឹម វ៉ា(ស្លាប់) លោក សុខ ឆុង (ស្លាប់)វិស្វករ ស៊ាន ប៉េងសែ លោក វ៉ាន់ឌី កាអុន បណ្ឌិត ចក់ សុខុន បណ្ឌិត ស៊ាន មាសាវ៉ាង លោកគ្រូ សាគូ សាមុត អ្នកគ្រូ

សិល្បៈ យក់ នារី វេជ្ជបណ្ឌិត ស៊ាន ម៉ារី និងវេជ្ជបណ្ឌិតច្រើនទៀត... សូម្បីតែលោកតំណាងរាស្ត្រឈៀង វុន និងលោករដ្ឋមន្ត្រី អង់ វង្សវត្តនា ក៏បានរស់នៅតំបន់នេះ ហោចណាស់ក៏២០ឆ្នាំម្នាក់ដែរ ។ បុព្វហេតុដែលបញ្ញាវន្តសម្បូរហូហៀរនៅទីនេះ ពីព្រោះខ្មែររៀនភាសាបារាំងបានជ្រៅជ្រះពីកម្ពុជាមក ដូច្នេះក្រុងប៉ារីសជាចំណតដំបូងគេបង្អស់នៅប្រទេសបារាំងមានធនធានបញ្ញាច្រើនជួបអ្នកសិក្សាដូចគ្នាច្រើនអាគារសិក្សាក៏សម្បូរជ្រើសរើសមុខវិជ្ជាបានស្រួលការងារក៏ស្រួលរក បើនឹងប្តូរចំណេះក៏មិនពិបាក... រីឯមនុស្សដែលគិតពីបញ្ហាជាតិជាអ្នកនយោបាយ ឬមិននយោបាយក៏សម្បូរដូចគ្នា ។

តំបន់ប៉ារីសនឹងជុំវិញនេះ ជាទីចូលចិត្តរបស់សហគមន៍ខ្មែរយ៉ាងហោចណាស់ក៏មាន៤-៥ម៉ឺននាក់ដែរ ហើយចំនួននេះមានលើសពីពាក់កណ្តាលមករស់នៅជុំគ្នាចាប់ពីតំបន់លាតសន្ធឹងពីខាងកើតនៃសង្កាត់លេខ១៣ទៅរហូតដល់"ឌីស្នេឡិន" ។

លើកក្រោយយើងនឹងជម្រាបជូនពីសម្ផស្សក្រុងប៉ារីសវិញម្តង ៕

ឌឹ ខេមបូឌា ដេលី The Cambodia Daily

# ព្រះមហាក្សត្រកោះប្រជុំសភាដែលមានគណបក្សជាប់ឆ្នោតតែមួយចូលរួម

*ដោយ : Zsombor Peter and Hul Reaksmey - September 24, 2013*

ព្រះមហាក្សត្រនរោត្តម សីហមុនី បានធ្វើជាព្រះអធិបតីនៅក្នុងការបើកសម័យប្រជុំសភាដែលអវត្តមានសមាជិកជិតពាក់កណ្តាលកាលពីម្សិលមិញ ព្រោះសមាជិកសភាជាប់ឆ្នោតទាំង៥៥រូបរបស់គណបក្សសង្គ្រោះជាតិបានធ្វើតាមការគំរាមរបស់ខ្លួនធ្វើពហិការរដ្ឋសភា ដើម្បីតវ៉ានឹងលទ្ធផលបោះឆ្នោតជាតិ កាលពីខែកក្កដា។

ព្រះមហាក្សត្រនរោត្តម សីហមុនី (ឆ្វេង) លោកនាយករដ្ឋមន្ត្រី ហ៊ុន សែន (ស្តាំ) ទទួលស្វាគមន៍មន្ត្រីស្ថានទូតប្រចាំប្រទេសកម្ពុជានៅខាងក្រៅបងរដ្ឋសភាជាតិ អំឡុងពេលបើកកិច្ចប្រជុំសភាលើកដំបូងកាលពីម្សិលមិញ ទោះបីជាគណបក្សសង្គ្រោះជាតិមិនបានចូលរួមនៅក្នុងសម័យប្រជុំក៏ដោយ។ (ស៊ីវ ចាន់ណា)



ដូចដែលខ្លួនបានសន្យានោះសមាជិកសភាគណបក្សសង្គ្រោះជាតិបានធ្វើដំណើរទៅក្រុងសៀមរាប ដែលនៅទីនោះពួកគាត់បានចាត់ទុកសម័យប្រជុំសភាលើកដំបូងនេះថា មិនស្របតាមរដ្ឋធម្មនុញ្ញ ហើយបានចាត់ទុកប្រទេសកម្ពុជាថា ជាប្រទេសឯកបក្ស។

អ្នកវិភាគ និងអ្នកសង្កេតការបោះឆ្នោតក៏បានចោទសួរពីភាពស្របច្បាប់របស់រដ្ឋសភាថ្មីនេះផងដែរ ហើយបារម្ភខ្លាចមានភាពច្របូកច្របល់ជាសាធារណៈកាន់តែខ្លាំងប្រសិនបើសមាជិកសភាគណបក្សប្រជាជនកម្ពុជាបន្តអនុម័តច្បាប់នានានោះ។

ទោះជាយ៉ាងណា ព្រះមហាក្សត្រនរោត្តម សីហមុនី និងសមាជិកជាប់ឆ្នោតទាំង៦៨រូបនៃគណបក្សប្រជាជនកម្ពុជារបស់លោកនាយករដ្ឋមន្ត្រី ហ៊ុន សែន បានបន្តសម័យប្រជុំសភាដែលមានការចូលរួមពីអ្នកការទូតបរទេសប្រចាំកម្ពុជា ជាច្រើនរូបរួមទាំងគណៈប្រតិភូអឺរ៉ុបមួយចំនួនដែលបានរិះគន់ដំណើរការបោះឆ្នោតនេះ និងមិនបានទទួលស្គាល់លទ្ធផលផ្លូវការនៃការបោះឆ្នោតនេះទេ។

ពេលយាងចូលព្រះសុវណ្ណកោដ្ឋៈ (កៅអីពណ៌មាស) របស់ព្រះអង្គនៅមុខសាលរដ្ឋសភាព្រះមហាក្សត្រ សីហមុនី មិនបានមានបន្ទូលអំពីសមាជិកសភាគណបក្សប្រឆាំងដែលអវត្តមានទាំង៥៥រូបនោះទេ ហើយបានស្វាគមន៍សមាជិកសភាគណបក្សប្រជាជនកម្ពុជាទាំង៦៨រូប។ ព្រះមហាក្សត្របានមានបន្ទូលថា "ការបើកសម័យប្រជុំសភានីតិកាលទី៥នេះ គឺជាទំព័រថ្មីមួយនៅក្នុងប្រវត្តិសាស្ត្រនៃអង្គនីតិបញ្ញត្តិរបស់យើងដោយសម្តេចឯកឧត្តម និងលោកជំទាវចំណាយទាំងកម្លាំងកាយ និងកម្លាំងចិត្តដើម្បីបម្រើប្រទេសជាតិ ដោយការយកផលប្រយោជន៍ជាតិជាធំជាងអ្វីៗទាំងអស់។ ខ្ញុំសង្ឃឹមថា រដ្ឋសភានីតិកាលទី៥នេះនឹងដំណើរការដោយរលូន និងបំពេញតួនាទី និងភារកិច្ចរបស់ខ្លួនប្រកបដោយផ្លែផ្កា ដើម្បីផលប្រយោជន៍មាតុភូមិ និងប្រជាជនកម្ពុជា"។

បន្ទាប់ពីការចាប់ដៃ និងថតរូបជាមួយព្រះមហាក្សត្រ សីហមុនី នៅខាងក្រៅរដ្ឋសភា សមាជិកសភាគណបក្សប្រជាជនកម្ពុជា បានត្រឡប់ចូលទៅក្នុងរដ្ឋសភាវិញ ហើយលោក ហេង សំរិន ប្រធានចុងក្រោយនៃរដ្ឋសភានេះ និងទំនងជាអាចធ្វើនៅអាណត្តិក្រោយទៀតនោះ បានអានឈ្មោះសមាជិកសភាជាប់ឆ្នោតទាំង១២៣រូប រួមទាំងសមាជិកសភាគណបក្សសង្គ្រោះជាតិដែលអវត្តមានទាំងនោះផងដែរ។

លោកបានថ្លែងថា "ខ្ញុំសូមប្រកាសជាឱឡារិកថា ឈ្មោះសមាជិកសភាជាប់ឆ្នោតដែលគណៈកម្មាធិការជាតិរៀបចំការបោះឆ្នោតបញ្ជូនមកឱ្យរដ្ឋសភាត្រូវបានអនុម័តនៅថ្ងៃទី២៣ ខែកញ្ញា ឆ្នាំ២០១៣។ ខ្ញុំសូមអបអរសាទរដល់ឯកឧត្តម និងលោកជំទាវទាំងអស់"។

បន្ទាប់មកសមាជិកសភាគណបក្សប្រជាជនកម្ពុជាទាំង៦៨រូប បានអនុម័តបទបញ្ជាផ្ទៃក្នុងថ្មីរបស់រដ្ឋសភាដោយការលើកដៃយ៉ាងលឿន ហើយនៅថ្ងៃនេះនឹងបោះឆ្នោតជ្រើសរើសថ្នាក់ដឹកនាំថ្មីរបស់រដ្ឋសភា បន្ទាប់នាយករដ្ឋមន្ត្រី និងគណៈរដ្ឋមន្ត្រីរបស់លោក។

នៅពេលព្រឹកនោះព្រះមហាក្សត្រ សីហមុនី បានចេញព្រះរាជក្រឹត្យ **តទៅទំព័រទី ២៤**

## With Just One Party Present, King Convenes New Parliament

*By Zsombor Peter and Hul Reaksmey - September 24, 2013*

King Norodom Sihamoni presided over a nearly half-empty opening session of the National Assembly on Monday as all 55 elected lawmakers of the opposition CNRP followed through with their threat to boycott parliament to protest disputed results of July's national election.

As promised, the CNRP lawmakers spent the day in Siem Reap City where they dismissed the opening session as being unconstitutional and deemed the country to be operating as a single-party state.

King Norodom Sihamoni, left, and Prime Minister Hun Sen, right, greet foreign dignitaries outside the National Assembly on Monday during the inaugural session of parliament after July's national election. Opposition CNRP lawmakers did not attend. (Siv Channa)

King Norodom Sihamoni, left, and Prime Minister Hun Sen, right, greet foreign dignitaries outside the National Assembly on Monday during the inaugural session of parliament after July's national election. Opposition CNRP lawmakers did not attend. (Siv Channa)

Analysts and election monitors also questioned the new Assembly's legitimacy and feared more public unrest if CPP lawmakers press ahead with passing laws. ***Continued to page 20***

## លោក ហ៊ុន សែន បន្តតំណែងជានាយករដ្ឋមន្ត្រីមួយអាណត្តិទៀត

ដោយ Hul Reaksmey and Zsombor Peter - September 25, 2013

មួយថ្ងៃបន្ទាប់ពីសភាបើកសម័យប្រជុំលើកដំបូងរបស់ខ្លួន ដែលមិនមានវត្តមានរបស់សមាជិកសភាជាប់ឆ្នោតទាំង៥៥រូបរបស់គណបក្សសង្គ្រោះជាតិនោះ រដ្ឋសភាថ្មីដែលមានគណបក្សតែមួយនេះបានបោះឆ្នោតគាំទ្រលោក ហ៊ុន សែន ឱ្យធ្វើជានាយករដ្ឋមន្ត្រីមួយអាណត្តិប្រាំឆ្នាំទៀត កាលពីម្សិលមិញ និងបានអនុម័តលើការរុះរើគណៈរដ្ឋមន្ត្រីដ៏ធំរបស់លោក។

នៅក្នុងការបោះឆ្នោតជាកញ្ចប់ដែលមានការអនុម័តយល់ព្រមជាឯកច្ឆន្ទ ពីសមាជិកសភាគណបក្សប្រជាជនកម្ពុជាទាំង៦៨រូបនេះក៏បានបោះឆ្នោតឱ្យលោក ហេង សំរិន អាយុ៧៩ឆ្នាំ ធ្វើជាប្រធានរដ្ឋសភាម្តងទៀត និងបានបោះឆ្នោតបង្កើតក្រសួងថ្មីមួយ គឺក្រសួងមុខងារសាធារណៈព្រមទាំងបង្កើតតួនាទីថ្មីចំនួន១៣សម្រាប់រដ្ឋមន្ត្រីប្រគល់ទៅឱ្យនាយករដ្ឋមន្ត្រីផងដែរ។

ដោយបានត្រឡប់មកកាន់តំណែងចាស់របស់លោកវិញ លោក ហេង សំរិន បានស្វាគមន៍សហការីនៅក្នុងគណបក្សប្រជាជនកម្ពុជារបស់លោកទាំងថ្មីទាំងចាស់ដែលបានត្រឡប់មកកាន់តួនាទីរបស់ខ្លួនវិញ។

លោក ហេង សំរិន បានមានប្រសាសន៍អំពីសមាជិកសភាមួយចំនួននៅក្នុងគណបក្សរបស់លោកថា "ឈ្មោះប្រធាន និងអនុប្រធានរដ្ឋសភា និងឈ្មោះសមាជិកគណៈកម្មការបច្ចេកទេសនៃរដ្ឋសភា និងឈ្មោះសមាជិករដ្ឋាភិបាលអាណត្តិទី៥នេះ ត្រូវបានរដ្ឋសភាអនុម័តយល់ព្រម ដោយសំឡេង៦៨លើ៦៨សំឡេង នៅថ្ងៃអង្គារ ទី២៤ ខែកញ្ញា ឆ្នាំ២០១៣"។

**តទៅទំព័រទី ២១**

ឌឹ ខេមបូឌា ដេលី The Cambodia Daily

ច្បាប់ចេញផ្សាយថ្ងៃ ពុធ ទី២៥ ខែកញ្ញា ឆ្នាំ២០១៣

# គណបក្សសង្គ្រោះជាតិចង់បានតំណែងប្រធានសភាមុនពេលទទួលយកអាសនៈក្នុងរដ្ឋសភា

ដោយ Colin Meyn - September 25, 2013

នៅពេលគណបក្សប្រជាជនកម្ពុជាកំពុងកាន់អំណាចបោះឆ្នោតនៅក្នុងរដ្ឋសភា ដើម្បីជ្រើសរើសថ្នាក់ដឹកនាំសភា និងរដ្ឋមន្ត្រីនៅក្នុងជួររដ្ឋាភិបាលរបស់ខ្លួនកាលពីម្សិលមិញ មន្ត្រីមកពីគណបក្សសង្គ្រោះជាតិបានលើកឡើងថា សមាជិកសភាមកពីគណបក្សនេះនឹងមិនទទួលយកអាសនៈរបស់ខ្លួននៅក្នុងសភាឡើយ លុះត្រាតែគណបក្សនេះទទួលបានតំណែងជាប្រធានសភា។

លោក សុន ឆ័យ ជាប្រធានក្រុមតំណាងរាស្ត្ររបស់គណបក្សសង្គ្រោះជាតិបានលើកឡើងកាលពីថ្ងៃម្សិលមិញថា "ខ្ញុំគិតថា កិច្ចចរចារយៈពេលពីរថ្ងៃនោះ គឺជាឱកាសចុងក្រោយសម្រាប់គណបក្សប្រជាជនកម្ពុជាក្នុងការទទួលយកសំណើរបស់យើង ប៉ុន្តែគេមិនចាប់អារម្មណ៍នឹងសំណើនេះឡើយ។ ខ្ញុំទទួលបានដំណឹងថា ឥឡូវនេះពួកគេកំពុងតែហៅយើង ឱ្យធ្វើសច្ចាប្រណិធាន ដើម្បីទទួលយកតំណែងជាសមាជិករដ្ឋសភាមុនពេលកិច្ចចរចាថ្មីអាចចាប់ផ្តើម ក៏ប៉ុន្តែរឿងនេះគឺមិនអាចទទួលយកបានទេ"។ លោកបានបន្ថែមថា លោកមិនសូវមានជំនឿថា គណបក្សទាំងពីរអាចវិលត្រឡប់ទៅកាន់តុចរចាវិញឡើយ។

លោកបានមានប្រសាសន៍ថា "គណបក្សសង្គ្រោះជាតិនឹងមិនចូលរួមប្រជុំនៅរដ្ឋសភាឡើយ លុះត្រាតែថ្នាក់ដឹកនាំកំពូលនៃគណបក្សទាំងពីរព្រមព្រៀងគ្នាជាមុនសិន ប៉ុន្តែរហូតមកទល់ពេលនេះ ឱ្យនៅមិនទាន់មានកិច្ចព្រមព្រៀងនៅឡើយទេ ហេតុដូច្នេះខ្ញុំគិតថា ឱ្យយើងនឹងមិនចូលរួមប្រជុំនៅក្នុងសភាឡើយ"។ លោកបានមានប្រសាសន៍បន្ថែមទៀតថា "អាសនៈរបស់យើងគឺជារបស់យើង។ យើងមិនចាំបាច់ប្រញាប់ធ្វើសច្ចាប្រណិធានចូលកាន់តំណែង និងផ្តល់ភាពស្របច្បាប់ដល់រដ្ឋាភិបាលរបស់គណបក្សប្រជាជនកម្ពុជាទេយើងនៅមានសិទ្ធិ និងពេលវេលាដើម្បីធ្វើការតវ៉ា ពីព្រោះបញ្ហានេះ គឺមានសារៈសំខាន់ណាស់សម្រាប់ប្រទេសជាតិ"។ លោកបានមានប្រសាសន៍បន្តទៀតថា "យើងគួរតែឈរលើជំហររឹងមាំ ដើម្បីធ្វើឱ្យប្រទេសជាតិមានការផ្លាស់ប្តូរ គឺមិនត្រូវព្រួយបារម្ភតែពីអាសនៈរបស់ខ្លួនឡើយ"។

ថ្លែងទៅកាន់អ្នកយកព័ត៌មានក្រោយការបោះឆ្នោតសម្រាប់តំណែងនៅក្នុងរដ្ឋសភាកាលពីម្សិលមិញ លោកនាយករដ្ឋមន្ត្រី ហ៊ុន សែន បានមានប្រសាសន៍ថា ការទាមទាររបស់គណបក្សសង្គ្រោះជាតិដែលចង់បានតំណែងជាប្រធានរដ្ឋសភានោះ គឺជារឿងដែលមិនធ្លាប់មាននៅក្នុងប្រព័ន្ធរដ្ឋសភា ។ លោក ហ៊ុន សែន បានសួរថា "កិច្ចចរចាបានជាប់គាំងហើយ? ប៉ុន្តែវាមិនអាចទៅរួចទេ។ តើអស់លោកធ្លាប់ឃើញគណបក្សដែលមានសំឡេងភាគតិចកាន់តំណែងជាប្រធានរដ្ឋសភាលើពិភពលោកនេះដែរឬទេ?"។ លោកបានមានប្រសាសន៍ថា "ឱ្យការទាមទាររបស់គណបក្សសង្គ្រោះជាតិ គឺចង់ធ្វើជាប្រធានរដ្ឋសភា..យើងផ្តល់តំណែងជាប្រធានគណៈកម្មការចំនួន៤និងអនុប្រធានគណៈកម្មការចំនួនប្រាំ"។

លោកបានមានប្រសាសន៍បន្ថែមថា ការស្នើរបស់គណបក្សសង្គ្រោះជាតិឱ្យមានការស៊ើបអង្កេតឯករាជ្យចំពោះភាពមិនប្រក្រតីនៃការបោះឆ្នោតត្រូវបានដកចេញពីតុចរចានៅថ្ងៃទី២ នៃកិច្ចចរចា។ លោក ហ៊ុន សែន បានថ្លែងថា "យើងនៅតែរក្សាជំហររបស់យើង ប៉ុន្តែវាហាក់បីដូចជាលំបាកបន្តិចហើយ។ ខ្ញុំនឹងផ្តល់ឱ្យតំណែងជាប្រធានគណៈកម្មការរបស់រដ្ឋសភា ប៉ុន្តែវាត្រូវតែធ្វើឡើងដោយមានការបោះឆ្នោតគាំទ្រពីសមាជិកសភាគណបក្សប្រជាជន"។

ទោះបីជាការអះអាងរបស់លោក ហ៊ុន សែន ជារឿងផ្ទុយក្តី តែគណបក្សចាញ់ឆ្នោតដែលទទួលបានតំណែងជាប្រធានរដ្ឋសភានេះ គឺធ្លាប់កើតមានរួចហើយ។ កាលពីខែកក្កដា ឆ្នាំ២០០៤ ព្រះអង្គម្ចាស់ នរោត្តម រណឫទ្ធិ ដែលគណបក្សហ៊្វុនស៊ិនប៉ិចរបស់ព្រះអង្គបានចាញ់គណបក្សប្រជាជនកម្ពុជាក្នុងការបោះឆ្នោតជាតិនោះ ត្រូវបានផ្តល់តំណែងជាប្រធានរដ្ឋសភាជាង១១ខែក្រោយពីការបោះឆ្នោត គឺបន្ទាប់ពីព្រះអង្គបានយល់ព្រមចូលរួមនៅក្នុងរដ្ឋាភិបាលចម្រុះជាមួយលោក ហ៊ុន សែន។

លោកស្រី ជូឡុង សូម្មូរ៉ា សមាជិកសភាមកពីគណបក្សសង្គ្រោះជាតិ និងជាភរិយារបស់លោក សម រង្ស៊ី ជាប្រធានគណបក្សសង្គ្រោះជាតិបានបដិសេធមិននិយាយថា តើនៅពេលណាសមាជិក

តទៅទំព័រទី ២៨

## CNRP Wants Presidency of Assembly Before Taking Seats

*By Colin Meyn - September 25, 2013*

With the ruling CPP having voted in its National Assembly leadership and government ministers on Tuesday, officials from the CNRP said opposition lawmakers would not take their seats in parliament unless the party is guaranteed control over the National Assembly.

"I think that the two-day meeting was the last chance for the CPP to accept our proposal, but they ignored it. I heard that [now they are asking] us to swear in as members before the new talks can begin, but that is not acceptable," CNRP chief whip Son Chhay said Tuesday, adding that he doubted the two parties would return to the negotiating table.

"The party will not accept to take part unless an agreement… [is] made between the top leaders, but so far [there is] no agreement, so I don't think [we will join the Assembly]," he said.

"Our seats are our seats. We don't need to hurry to swear in and to legitimize the CPP government. We still have the right and the time to protest, because this is important to the country."

"We ought to stay strong and firm to bring about change in the country, not just worry about our seats," he added.

Speaking to reporters following Tuesday's vote for positions in the National Assembly, Prime Minister Hun Sen said that the CNRP's demands that it be given the presidency of the National Assembly were unprecedented in parliamentary systems.

"The negotiations were stalled but it was impossible because has anyone seen the minority voice take the position of president of the National Assembly anywhere in the world?" Mr. Hun Sen asked.

"[The CNRP's] demand was to be president of the National Assembly…. We offered the positions of chairman of four committees and vice chairman of five committees," he said, adding that calls by the CNRP for an independent investigation into election irregularities had been taken off the table by the second day of talks.

"We still maintain our stance and our offer, but it's a bit difficult. I will offer [National Assembly committee leadership positions], but it has to be undertaken by vote," Mr. Hun Sen said.

Despite Mr. Hun Sen's claim to the opposite, the minor party taking the presidency of the National Assembly has precedent.

In July 2004, Prince Norodom Ranariddh, whose Funcinpec party was handily defeated by the CPP at the polls more than eleven months earlier, was given the position as president of the National Assembly after agreeing to join in a coalition government with Mr. Hun Sen.

CNRP parliamentarian Tioulong Saumura, the wife of CNRP President Sam Rainsy, declined to say when opposition lawmakers would take their seats in the Assembly but she said that they would eventually be filled.

"These seats are a result of votes that have been expressed by the people-Cambodian voters-and they have voted for CNRP candidates. So these seats are seats that should be occupied by CNRP staff," she said.

Others also signaled that the boycott of parliament would not be permanent.

CNRP lawmaker Ou Chanrith said that with the CPP pushing ahead in forming a government, the CNRP had "changed its stance" though he declined to elaborate on what the new stance was.

"They [the CPP] don't stop, that is why we need to change our stance. If there is no meeting [of the National Assembly], we would postpone and negotiate. But today, [the CPP] had meetings and pushed ahead," he said.

Mr. Rainsy announced on his Facebook page Tuesday that the CNRP will hold a press conference 9 a.m. this morning "to denounce the constitutional coup being perpetrated by the CPP."

Independent political analyst Kem Ley said the chances of further talks between the two parties were slim, though he said he believed that CNRP lawmakers would soon take their Assembly seats and continue to fight for reform inside parliament and, at the same time, continue to exert public pressure on the CPP through mass protests.

"They will go into the National Assembly and have unity pushing for reform," Mr. Ley said.

*(Additional reporting by Hul Reaksmey, Khuon Narim and Phorn Bopha)*

# ប្រើធនាគារឲ្យប្រសើរ គឺនៅក្នុងកាបូប



FREE

$150 gift card to Coach®

## កាតរង្វាន់$150ទិញកាបូបល្បីឈ្មោះ"ខូច"

ជាមួយការបើកសេវាសម្រាប់ប្រើធនាគាររាល់ថ្ងៃ




washingtonsavings.com

* Restrictions apply
Ask for details.



Customer will receive a free gift within 30 days after redeeming a "FREE GIFT Certificate" and implementing the following combination of new services after 12/10/2012: A monthly direct deposit of at least $1,000 from an unaffiliated third party, at least one monthly automatic withdrawal that is not web or card based and an active debit card with 12 or more completed purchases is eligible for a $150 Coach® gift certificate. Promotion ends 06/30/2013. Coach® is a trademark of Coach, Inc. The program is not endorsed by Coach, Inc. nor is there any actual or implied joint venture, partnership or relationship of any kind between Washington Savings Bank and Coach, Inc. Promotions cannot be combined, one gift per customer, per account, per household. Available to personal accounts only. Fee of $150 applies for account closure or change of services within 6 months of free gift receipt. Washington Savings Bank reserves the right to disqualify any account/ person from this promotion if, in its sole discretion, it determines the account and/or services are solely designed to qualify for the free gift. Limited time offer, while supplies last.

តមកទំព័រទី ១៦

# រំលឹកព្រឹត្តិការណ៍ប្រវត្តិនៃនយោបាយ...

ជិតពាក់កណ្តាលនៃគណបក្សសង្គ្រោះជាតិប្រកែកមិនព្រមចូលប្រជុំក្តី ក៏ស្តេចខ្មែរអង្គនោះនៅតែមកបើកអង្គប្រជុំសភាជាតិដោយមិនខ្វល់ខ្វាយពីភាពខ្វះខាតសុច្ចរិតយុត្តិធម៌នៃលទ្ធផលបោះឆ្នោតនៃការគោរពរដ្ឋធម្មនុញ្ញដែរទង្វើនេះអាចនឹងប៉ះពាល់ដល់ភាពចុះសម្រុងគ្នារបស់ប្រជាជាតិនៅក្រោមម្លប់ស្វេត្រឆ័ត្រយ៉ាងខ្លាំងខ្លាទៅអនាគត ។

មុននេះបន្តិចក្នុងរយៈពេល៣ថ្ងៃ៣យប់ផ្តើមពីថ្ងៃទី១៩កញ្ញា២០១៣ មហាបាតុកម្មអហិង្សារបស់ប្រជាពលរដ្ឋដែលខ្លះថា មាន២ម៉ឺន ខ្លះថាច្រើនរហូតដល់១០ម៉ឺននាក់ គឺជាចំនួនមតិដ៏សន្ធឹកសន្ធាប់មិនដែលមានពីមុនមកចេញមកទាមទារឱ្យរកយុត្តិធម៌បង្កើតគណកម្មការឯករាជ្យមួយមកត្រួតពិនិត្យលទ្ធផលនៃសម្លឹកឆ្នោតឆន្ទៈរាស្ត្រទាំងនោះពុំបានត្រូវទទួលដឹងឮដោយព្រះមហាក្សត្រខ្មែរទេ ។ ឆន្ទៈនោះ គឺជាតំណាងសម្លេងនៃម្ចាស់ឆ្នោតដែលគ.ជ.ប.ប្រកាសឱ្យចំនួន៥៥អាសនៈទប់ស្កាត់កុំឱ្យមានការផ្លាស់ប្តូររបបនៅកម្ពុជា ប្រសិនបើចំនួនឆ្នោតនេះឡើងដល់៦៣អាសនៈ ។ គណកម្មការឯករាជ្យនោះអាចនឹងរកឃើញថាមានភាពមិនប្រក្រតីតែបើរកមិនឃើញវិញ ក៏អស់ចិត្តដែរ... តែហិបឆ្នោតមិនបានត្រូវអនុញ្ញាតិឱ្យបើក ហើយរាប់សាជាថ្មីសម្រាប់ឱ្យមានភាពអស់ចិត្ត ដូចដែលប្រទេសសេរីទាំងអស់ក្នុងលោកធ្លាប់ធ្វើដើម្បីឱ្យអ្នកចាញ់ទទួលយកលទ្ធផលបាននោះទេ ។







ក្នុងពេលជាមួយគ្នានោះ តំណាងគណបក្សប្រជាជនដែលនៅកាន់អំណាចជាឆ្នាំផ្ទះបានសុខចិត្តចរចាគ្នាជាមួយតំណាងគណបក្សសង្គ្រោះជាតិ តែនៅក្នុងកិច្ចចរចានោះ គណបក្សប្រជាជន "យកលទ្ធផលដែលប្រកាសហើយជាធំសុខចិត្តចែកអំណាចរដ្ឋគ្នា ហើយសិមកែរទម្រង់ជាក្រោយ" តែគណបក្សសង្គ្រោះជាតិស្នើឱ្យ "បង្កើតគណកម្មការឯករាជ្យមួយសម្រាប់រាប់សន្លឹកឆ្នោតឱ្យបានត្រឹមត្រូវជាមុនសិមជជែកពិរដ្ឋាភិបាលជាក្រោយ" ។ នៅពេលប្តើមចរចាគ្នាគណបក្សប្រជាជនបានបញ្ចេញប៉ូលិសពិសេសប្រដាប់អាវុធមានទាំងយោធាបើករថក្រោះសម្រាប់បង្ក្រាបបាតុករ រីឯគណបក្សសង្គ្រោះជាតិវិញ បានបង្ហាញពីការចូលរួមពីបណ្តាជនអ្នកគាំទ្ររាប់ម៉ឺននាក់ក្នុងកិច្ចប្រជុំម្តងៗជាកម្លាំងអហិង្សាតែមេដឹកនាំគឺ សម រង្ស៊ី នឹង កឹម សុខា មិនធានាថា "ចលនាអហិង្សានោះនឹងទប់បានយូរប៉ុណ្ណាទេ ដោយប្រជារាស្ត្រខឹងខ្លាំងណាស់ បើមិនផ្តល់យុត្តិធម៌ឱ្យការបាត់សន្លឹកឆ្នោតរបស់គេទេនោះ" ។ ឃើញគណបក្សសង្គ្រោះជាតិមានកម្លាំងគាំទ្រពីប្រជាពលរដ្ឋក្រីក្រពីចាស់ៗពីយុវជននៅក្នុងចលនាបាតុកម្មមុននឹងក្រោយការបោះឆ្នោតពីប្រជាពលរដ្ឋខ្មែរក្រៅស្រុកជុំវិញពិភពលោករួមទាំងមានសេចក្តីថ្លែងការណ៍ថ្កោលទោសរបស់ប្រទេសសេរីមានស.រ.អា. សហភាពអឺរ៉ុបអ.ស.ប. ចំពោះប្រព័ន្ធបោះឆ្នោតដែលធ្វើឡើងនៅកម្ពុជា...រីឯខាងគណបក្សប្រជាជនវិញពុំឃើញមានបាតុកម្មស្ម័គ្រចិត្តរបស់ពលរដ្ឋអ្វីក្រៅពីកងកម្លាំងប៉ូលិសយោធាឯកសណ្ឋានប្រដាប់អាវុធរាប់រយចេញមកការពារមន្ត្រីគណបក្សប្រជាជនក្រុមប្រទេសសង្គមនិយមនឹងក្រុមអ្នកទទួលសេចអញ្ជើញពីរដ្ឋាភិបាលឱ្យមកសង្កេតការណ៍បោះឆ្នោតខ្មែរនោះទេ ។ ពីកិច្ចព្រមព្រាងគ្នាក្នុងជំនួបគណបក្សទាំងពីរមាន "ការទទួលយល់ព្រមមិនប្រើអំពើហឹង្សាទាំងសងខាង" ដែលជាគំនិតវត្តមានតែមួយ ។

សម រង្ស៊ី - កឹម សុខា នៃគណបក្សសង្គ្រោះជាតិនៅពេលសម្រេចចិត្តប្រឆាំងនឹងលទ្ធផលនៃកាបោះឆ្នោតថ្ងៃទី ២៨កក្កដា២០១៣ប្រកាសដោយ គ.ជ.ប. នោះ ដោយសារអ្នកទាំង២ ទទួលបានលទ្ធផលនៃការាប់សន្លឹកឆ្នោតដោយចំពោះពីមណ្ឌលទាំង២ម៉ឺនដូចគ.ជ.ប.ដែរ តែលទ្ធផលនោះ គឺគណបក្សសង្គ្រោះបាន៦៣អាសនៈឈ្នះគណបក្សប្រជាជនបានសម្លេងឆ្នោត៦០អសនៈ



តែអ្នកប្រកាសលទ្ធផលបណ្តោះអាសន្ននារាត្រីទី២៨កញ្ញានោះ បែរជា ខៀវ កញ្ញារីទ្ធ អ្នកនាំពាក្យរបស់គណបក្សប្រជាជនថា "គណបក្សប្រជាជនបាន៦៨អាសនៈទល់នឹងគណបក្សសង្គ្រោះជាតិបាន៥៥អាសនៈ"ទៅវិញ ។២ថ្ងៃក្រោយមក ទើប គ.ជ.ប.ប្រកាសលទ្ធផល ដូចខាងគណបក្សប្រជាជនបានផ្សព្វផ្សាយដែរ... តែគេនៅចាំបានថា នៅថ្ងៃបោះឆ្នោតនោះ ប្រជាពលរដ្ឋខ្មែរបានចេញមកបំពេញករណីកិច្ចបញ្ចេញឆន្ទៈរបស់ខ្លួនយ៉ាងក្លាហានមិនដូចពេលមុនៗទេ លើសពីនេះ មានសេចក្តីរាយការណ៍ជាច្រើនថា "ពួកគាត់បានកាពារហិបឆ្នោតមិនឱ្យបរទេសចូលមកបោះឆ្នោតមិនឱ្យ គេរាប់សន្លឹកឆ្នោតបន្លំមិនឱ្យអាជ្ញាធរប្រើអំណាចការពារជនដែលគ្មានសិទ្ធឱ្យមកបោះឆ្នោតទេ..." សេចក្តីរាយការណ៍មួយទៀតនិយាយថា "បន្ទាប់ពីថ្ងៃបោះឆ្នោតនោះ ព្រះមហាក្សត្រមិនបានគង់ប្រថាប់នៅក្នុងប្រទេសទេ ទ្រង់ប្រឈូនយាងចេញទៅព្យាបាលនៅបេយ៉ីង ដូចព្រះបិតាព្រះអង្គដែរ ហើយព្រអង្គបានជួប ហ៊ុន សែន នាយករដ្ឋមន្ត្រីឆ្នាំផ្ទះនៅទីនោះ" ។

យើងបញ្ចប់អត្ថបទនេះនៅកណ្តាលព្រឹត្តិការណ៍ក្តៅគគុកដែលមិនដឹងមានមុខធ្លាយទៅទីណានៅឡើយ ពីព្រោះ:

**១**-គណបក្សសង្គ្រោះជាតិប្រដាប់ដោយប្រជាពលរដ្ឋមិនសប្បាយចិត្តច្រើនគ្នានឹងមិនស្ថិតនៅស្ងៀមរង់ចាំព្រឹត្តិការណ៍ថ្មីមកដល់ដោយឯកឯង ។

២-គណបក្សប្រជាជនប្រដាប់ដោយកងទ័ពនិងអាវុធរីករាយដោយបានព្រះមហាក្សត្រជាកម្លាំងបន្ថែមសម្រាប់អនុវត្តន៍គម្រោងការណ៍ដោយគ្មានគណបក្សសង្គ្រោះជាតិ...ធាតុភ្លើងញី-ឈ្មោលទាំង២ និងទង្គិចគ្នាជៀសមិនរួច ។ នេះជាប្រភពអគ្គីភ័យដ៏សែនគ្រោះថ្នាក់ដល់ប្រជាជាតិនឹងពលរដ្ឋខ្មែរ ដែលចេញមកតែពី "ការមិនព្រមបើករាប់សន្លឹកឆ្នោតរកការពិត"រួមគំនិតដោយស្ថាប័នអំណាចរដ្ឋគ្រប់ជាន់ថ្នាក់ដែលមិនព្រមស្ថិតនៅជាអព្យាក្រឹតនឹងឯករាជ្យ ។ ព្រឹត្តិការណ៍របៀបនេះមានដំណើរទៅរកវិបត្តិនយោបាយធ្ងន់ធ្ងរដែលប្រវត្តិសាស្ត្រនឹងកត់ត្រាចងចាំជាគំរូសម្រាប់ជនជំនាន់ក្រោយមិនថា ខ្មែរឬបរទេសនោះទេ ៕



តមកពីទំព័រទី ១

## លទ្ធផលនៃការបោះឆ្នោតជំរុះបេក្ខជន...

ជាសមាជិកក្រុមប្រឹក្សាក្រុងឡូវែល។ ជាគោលការណ៍អនុវត្តកន្លងមកកាលណាមានបេក្ខជនលើសពី ១៨នាក់ឈរឈ្មោះសម្រាប់ក្រុមប្រឹក្សាក្រុង តម្រូវឱ្យមានការបោះឆ្នោតពីរដំណាក់កាល។ ដំណាក់ទីមួយ គឺការបោះឆ្នោតជំរុះ (primary election) និងដំណាក់ កាលទីពីរ គឺការបោះឆ្នោតផ្តាច់ព្រ័ត្រ (final election) ។ ក្នុងអាណត្តិនេះមានបេក្ខជនចំនួន២២នាក់ ដែលបានឈរឈ្មោះជាបេក្ខជនសមាជិកក្រុមប្រឹក្សាក្រុងឡូវែល។ ហេតុនេះគណៈកម្មការរៀបចំការបោះឆ្នោតក្រុងឡូវែល (Lowell Election Commission) ចាំបាច់ត្រូវរៀបចំការបោះឆ្នោតជំរុះនេះ។ ជាលទ្ធផលបេក្ខជនដែលបានទទួលជោគជ័យក្នុងការបោះឆ្នោតជំរុះ កាលពីថ្ងៃទី២៤ ខែកញ្ញា ម្សិលមិញនេះ មានរាយនាមក្នុងតារាងឈ្មោះតាមលេខរៀង និងចំនួនសន្លឹកឆ្នោតដែលទទួលបាន :

| លេខរៀង | ឈ្មោះបេក្ខជន | សន្លឹកឆ្នោត |
|---|---|---|
| 1 | Rita M. Mercier | 3,681 |
| 2 | Rodney M. Elliot | 2,764 |
| 3 | William F. Martin Jr. | 2,748 |
| 4 | Daniel P. Rourke | 2,704 |
| 5 | Edward J. Kennedy Jr | 2,652 |
| 6 | James L. Milinazzo | 2,541 |
| 7 | Williams Samaras | 2,485 |
| 8 | John J. Leahy | 2,359 |
| 9 | Martin Marty Lorrey | 2,305 |
| 10 | Joseph M. Mendonca | 2,001 |
| 11 | Vesna Nuon | 1,984 |
| 12 | Correy A. Belanger | 1,926 |
| 13 | Derek A. Mitchell | 1,908 |
| 14 | Erick A. Gitschier | 1,906 |
| 16 | Vandoeun Pech | 1,478 |
| 17 | Genevieve K. Doyle | 1,213 |
| 18 | Frederick J. Doyle | 1,096 |

ជ័យលាភីទាំង១៨នាក់នេះនឹងប្រជែងគ្នាម្តងទៀតនៅក្នុងការបោះឆ្នោតផ្តាច់ព្រ័ត្រដែលនឹងធ្វើឡើងនៅថ្ងៃអង្គារ ទី៥ ខែវិច្ឆិកា ឆ្នាំ២០១៣ ខាងមុខនេះ ដើម្បីជ្រើសរើសសមាជិកក្រុមប្រឹក្សាក្រុងឡូវែលចំនួន៩នាក់សម្រាប់អាណត្តិថ្មីដែលមានរយៈពេល២ឆ្នាំ គឺ២០១៣- ២០១៥។

ឡូវែលជាទីក្រុងដែលមានពលរដ្ឋរស់នៅច្រើនលំដាប់ទី៤ ក្នុងរដ្ឋម៉ាស្សាឈូសេត្ស ហើយក៏ជាទីក្រុងដែលមានពលរដ្ឋខ្មែររស់នៅច្រើនលំដាប់ទីពីរបន្ទាប់ពីក្រុងឡុងប៊ីចរដ្ឋកាលីហ្វ័រញ៉ា។ តាមលទ្ធផលជំរឿនពលរដ្ឋឆ្នាំ២០១០ឡូវែលមានពលរដ្ឋសរុបចំនួន១០៦,៥១៩នាក់ ក្នុងនោះមានពលរដ្ឋខ្មែរប្រមាណប្រហែល៣៥.០០០នាក់ គឺប្រហែល១ភាគ៣នៃពលរដ្ឋសរុបរបស់ក្រុងឡូវែលទាំងមូល។ តាមស្ថិតិនៃគណៈកម្មាការរៀបចំការបោះឆ្នោតក្រុងឡូវែលមានពលរដ្ឋចំនួន៥៤.៥៤៣នាក់ ដែលបានចុះឈ្មោះបោះឆ្នោត ក្នុងនោះមានស្ត្រីចំនួន៥១%។ រូបទី១ (ធិង. ១) បង្ហាញនូវភាគរយនៃអ្នកដែលបានចុះឈ្មោះបែងចែកតាមក្រុមអាយុដូចជា: អាយុ២០ឆ្នាំចុះ, ២០-២៩, ៣០-៣៩, ៤០-៤៩, ៥០-៥៩, ៦០-៦៩, ៧០-៧៩, ៨០-៨៩ និងអាយុ ៩០ ឡើង។ តាមរូបភាពនេះ យើងឃើញថា ពលរដ្ឋអាយុ២០-២៩ឆ្នាំ បានចុះឈ្មោះបោះឆ្នោតច្រើនជាងក្រុមអាយុដទៃទៀត គឺមានដល់២០%នៃចំនួនអ្នកចុះឈ្មោះបោះឆ្នោតសរុប។ ដោយឡែកតាមការសិក្សាទៅលើបញ្ជីឈ្មោះអ្នកចុះឈ្មោះបោះឆ្នោត យើងបានរកឃើញថា មានពលរដ្ឋអាមេរិកាំងដើមកំណើតអាស៊ីអគ្នេយ៍ចំនួនជាង៧,៣០០ ដែលបានចុះឈ្មោះបោះឆ្នោត ហើយភាគច្រើនលើសលប់នៃក្រុមនេះ គឺជាពលរដ្ឋខ្មែរអាមេរិកាំង។

ការបោះឆ្នោតក្រុមប្រឹក្សាក្រុង ក៏ដូចជាការបោះឆ្នោតគណៈកម្មាការសាលាសាធារណៈ គឺមានសារសំខាន់ណាស់ និងមានឥទ្ធិពលផ្ទាល់លើជីវភាពរស់នៅប្រចាំថ្ងៃនៃពលរដ្ឋទីក្រុងឡូវែល។ សមាជិកក្រុមប្រឹក្សាក្រុងទាំង៩នាក់ជាអ្នកកំណត់គោលនយោបាយសាធារណៈផ្សេងៗ ដូចជាការឡើង ឬបញ្ចុះពន្ធដារផ្ទះសម្បែង ឬពន្ធដីធ្លី (property tax), ការបែងចែករបបផ្ទះសង្គមកិច្ចប្រកបដោយសមធម៌ (public housing), ការចេញអាជ្ញាប័ណ្ណពាណិជ្ជកម្មដោយយុត្តិធម៌ (fair business licensing), សមធម៌នៃឱកាសការងារតាមទីរ ឬស្ថាប័ននានានៃសាលាក្រុងឡូវែល (fair employment opportunity with the City of Lowell government) ឬសមធម៌នៃឱកាសការងារនៅសាលាសាធារណៈ (equal employment opportunity at Lowell public school) ដែលឆ្លុះបញ្ចាំងសមាមាត្រនៃពលរដ្ឋខ្មែរដែលមានចំនួន១ភាគ៣នៃពលរដ្ឋសរុបក្រុងឡូវែល។

ពលរដ្ឋខ្មែរអាមេរិកាំង ក៏ដូចជាពលរដ្ឋអាមេរិកាំងអាស៊ីអគ្នេយ៍អាចទាមទារឱ្យមានគោលនយោបាយ ឬកម្មវិធីសង្គមសេដ្ឋកិច្ចរបស់សាលាក្រុងដែលបម្រើ និងការពារផលប្រយោជន៍របស់សហគមន៍យើង។ ការទាមទារទាំងនេះអាចសម្រេចបានលុះត្រាតែពលរដ្ឋដែលមានសិទ្ធបោះឆ្នោតត្រូវចុះឈ្មោះបោះឆ្នោតឱ្យបានគ្រប់ៗគ្នា យើងត្រូវចេញទៅបោះឆ្នោតឱ្យបានកុះករ និងបោះឆ្នោតជ្រើសរើសបេក្ខជនក្រុមប្រឹក្សាក្រុងណាដែលការពារ និងបម្រើផលប្រយោជន៍សហគមន៍យើងពិតប្រាកដ។ តាមចំនួនពលរដ្ឋខ្មែរ ឬអាស៊ីអគ្នេយ៍ដែលបានចុះឈ្មោះចំនួនជាង ៧,៣០០ នាក់ យើងអាចបោះឆ្នោតឱ្យបេក្ខជនដែលការពារ និងបម្រើផលប្រយោជន៍យើង រហូតដល់ ៣ នាក់ និងរហូតអាចបោះឆ្នោតជ្រើសរើសតំណាងរាស្ត្រខ្មែរអាមេរិកាំងប្រចាំរដ្ឋម៉ាស្សាឈូសេត្សទៀតផង៕



# កាណុងកាម៉ើរ៉ាថតរូបយុវជនឡូវែល

*ប្រែសម្រួលសង្ខេបដោយ សុខា ពីអត្ថបទដើម ដោយចេនីហ្វឺ មីយ៉ឺរ ជំនួយការអភិបាលក្រុង ចេញពីគេហទំព័រផ្លូវការសាលាក្រុង Blog Name: Room 50Blog URL: http://room 50.word press.com បង្ហោះនៅថ្ងៃទី ២៤កញ្ញា ២០១៣*

ទិដ្ឋភាពទីក្រុងឡូវែល ត្រូវបានផ្តិតយកដោយយុវជនមួយក្រុមដែលទទួលបានការហ្វឹកហ្វឺនបណ្តុះបណ្តាលអស់រយៈពេល៣ខែក្នុងគម្រោងមួយឈ្មោះថា ហ្វូតូហ្គ្រាហ្វីប្រូចិចថ៍ (Photography Project) ដែលរៀបចំឡើងដោយស្ថាប័នមួយគឺ ហ្វូតូវ៉យស៍ (Photovoice) ក្រោមការដឹកនាំរបស់អ្នកសម្របសម្រួលឃែរី ដេតស៍។ ទទួលបានជំនួយពីក្រុមប្រឹក្សាគម្រោងសម្រាប់ពហុវប្បធម៌ចម្រុះក្នុងតំបន់ និងនាយកដ្ឋានសុខភាពសាធារណរដ្ឋម៉ាសាឈូសេត (Metropolitan Area Planning Council and Massachusetts Department of Public Health)។

ទាក់ទិនខ្លឹមសារនេះ កាលពីថ្ងៃទី១៩កញ្ញា

តទៅទំព័រទី ២១



# Lowell - Through the Lens of Youth

*By Jennifer Myers, Mayor's Aid*
*Translated by Sokha*
*Courtesy by City Hall Official Blog "Room 50" Posted on September 24, 2013*

A once white door on the side of a red brick building; today it is "tagged" by graffiti. To some, it is just an unavoidable reality of urban life, an eyesore you walk by and don't give a second thought.

Matthew Pomerleau sees something more.

"The tagging could represent possible gang-related graffiti," he wrote in the description of the photo he took in the city's Acre neighborhood. "The best way to make this area safer would be to clean and/or re-paint the door."

Matthew was one of 12 young men, all of whom have been affected by violence and understand the truths of the streets of Lowell better than anyone, who recently participated in a three-month photography project.

The project, dubbed Photovoice, gave the participants the opportunity to express what places and situations make them feel safe or unsafe in the city through the camera lens. They met several times a week, guided by Photovoice Coordinator Kerry Dates. Funding was provided through a grant by the Metropolitan Area Planning Council and Massachusetts Department of Public Health.

On Thursday September 19, three months of work were displayed in the Mayor's Reception Room in the Photovoice Safety Summit, an art show attracting dozens of community members as well as former Lowell Police Superintendent Ken Lavallee and City Manager Bernie Lynch.




Photovoice participants included: Saun- ders Khath, Brendon Ly, Brian Mao, Luis Mateo, Timothy Nuth, Tyrone Nuth, Matthew Pomerleau, Nelson Rodriguez, Angel Ruiz, Sarin Ruom, Matthew Sekayi, and Ricky Wainaina.

Saunders Khath showcased a photo titled "The Brave," depicting Lowell Fire Department Engine 3 driving through the city's Highlands neighborhood.




"The reason that I took this photo was that it made me feel safe to see the fire truck in the neighborhood," he wrote. "Alt- ough I am unsure of what the reason was that they are in this particular area, it is nice to see them. I also took this picture because the American flag was flying in the photo next to the Engine."

Another of Khath's photos depicts kids playing in the playground at Clemente Park. It looks like a nice scene of kids having fun, but he sees it differently.

Khath explains the scene made him feel unsafe because the kids were playing unsupervised and the park is close to the road in a neighborhood that can be dangerous.

"The park is also littered and the children are playing with it," he added. "This is a concern of mine because it is common to see young children outside by themselves without supervision. We can encourage the community to pick up litter in the parks so that people do not get hurt."

City Manager Bernie Lynch was particularly taken by Ricky Wainaina's "Happy Place," an interestingly-angled photo that shows a bench downtown where Wainaina often went to think.

"I could sit here and clear my head and was able to have the courage to keep pushing forward, which has gotten me to where I am today," he wrote. "I hope the city and the community continue to do a good job in maintaining the beauty of this area."

Lowell Police Department Deputy Supe rintendent William Taylor was impressed by the work the young men put into the project and the work they produced.

"This project gave these youth a positive alternative and an opportunity to showcase their artistic talent," said Taylor. "Additionally, it gave them a chance to have their voice heard by city leaders and residents."

"The feedback was overwhelmingly positive, with several attendees expressing their admiration for the young men and the photos they took," Taylor added. "I personally was very pleased with the event and the number of city leaders and community members who expressed their support for these young men and this project."

# វិធីការពារកុំឲ្យកើតមុនខ្សាច់



ការទទួលទានអាហារមួយចំនួនដែលសម្បូរទៅដោយសារធាតុដែលមានជាតិខ្លាញ់ ជាតិផ្អែម ឬគ្រឿងផ្អាប់ជាពិសេស មិនបានលុបលាងសម្អាតផ្ទៃមុខជាប្រចាំផង វាអាចបង្កជាជម្ងឺ ឬរោគផ្សេងៗដោយមិនដឹងខ្លួន ជាក់ស្តែងដូចជាមុនខ្សាច់នេះជាដើម ។

យើងបានធ្វើកិច្ចសម្ភាសន៍ជាមួយហាងកែសម្ផស្សមួយនឹងធ្វើការបកស្រាយអំពីវិធីការពារកុំឱ្យកើតមុនខ្សាច់ ដើម្បីឱ្យលោកអ្នកនាងកញ្ញាបានជ្រាប និងយល់កាន់តែច្បាស់អំពីបញ្ហានេះ ។

### មុនខ្សាច់ជាអ្វី ?



មុនខ្សាច់គឺជាមុនដែលមានគ្រាប់តូចៗដែលធ្វើឱ្យរលាកគល់រោម ហើយរាំរ៉ៃរួចបង្កទៅជាមុនខ្សាច់ ។ មូលហេតុដែលបណ្តាលឱ្យកើតមុនខ្សាច់នេះ ដោយសារតែការស្ទះក្រពេញខ្លាញ់ក្រោមស្បែកទើបមានមុនខ្សាច់នេះ ។ ក្រោយពេលដែលកើតមុនខ្សាច់ វាបង្កឱ្យមានផលប៉ះពាល់ទៅដល់ស្បែកមុខមានសភាពគ្រើម ឬស្បែករលាកក្រហម និងខ្ទុះជាដើម ។

### វិធីព្យាបាលការកើតមុនខ្សាច់

កុំព្យាយាមតុបតែងមុខ ឬលាបម្សៅក្រាស់ពេកក្នុងពេលដែលមុខរបស់លោកអ្នកកំពុងចេញមុន ក៏ដូចជាមុនខ្សាច់ ។

ក្នុងករណីកើតមុនអង្គាមល្អិតៗ ចូរយកស៊ុតសលាបមុខប្រមាណ១៥នាទី រួចចាំលាងសម្អាតចេញ ព្រោះការធ្វើបែបនេះ ដើម្បីកាត់បន្ថយការកើតមុន ។

លាបក្រែម ឬឡេព្យាបាល ដែលផ្សំពីអាស៊ីដសាលីសាយលិក ។

### វិធីការពារកុំឱ្យកើតមុនខ្សាច់

ត្រូវសម្អាតស្បែកឱ្យបានស្អាត និងត្រឹមត្រូវ ហើយលាបថ្នាំ ឬលេបថ្នាំដែលមានជាតិរ៉េទីណុល (វីតាមីនអា) ។

ត្រូវលាងសម្អាតមុខមុនពេលទទួលទានដំណេក ។

ថែរក្សាស្បែកមុខឱ្យស្អាតជាប្រចាំ ។

លុបលាងមុខមួយថ្ងៃ២ទៅ៣ដង ។ លោកអ្នកត្រូវដឹងថា ការមិនលុបលាងសម្អាតផ្ទៃមុខ គឺធ្វើឱ្យស្បែកមុខខ្វះអនាម័យ ហើយធ្វើឱ្យស្បែកមុខស្ងួត និងប្រតិកម្មទៀតផង ។

កុំតឹងតែងធុញថប់អារម្មណ៍ ព្រោះការតានតឹងតប់ប្រមល់ គឺជាដើមហេតុនៃការកើតមុន ។

កាត់បន្ថយអាហារមានជាតិខ្លាញ់ ជាតិផ្អែម និងគ្រឿងផ្អាប់ ។

កុំញ្ចេច ឬក្តិច ព្រោះធ្វើបែបនេះ វាបង្កឱ្យស្បែកមុខរលាកផ្នែកខាងក្នុង ។

### ដំបូន្មានរបស់អ្នកជំនាញ

លោកអ្នកកុំព្យាយាមប្រើគ្រឿងសម្អាងប្រភេទណាដែលមានជាតិប្រេងច្រើន និងកុំឧស្សាហ៍ញ្ចេចឬក្តិច ព្រោះធ្វើបែបនេះវាបង្កឱ្យស្បែកមុខរលាក ។ ចំពោះការទទួលទានអាហារដែលមានជាតិខ្លាញ់ ជាតិផ្អែម និងគ្រឿងផ្អាប់ ត្រូវកាត់បន្ថយផងដែរ ៕

*Continued From Page12*

## With Just One Party ...

Still, King Sihamoni and the 68 elected lawmakers of Prime Minister Hun Sen's CPP pressed on with the opening session with much of the country's foreign diplomatic corps in attendance, including some Western delegations that were critical of the way the election was conducted and have refrained from endorsing the official results.

Taking to his gilded chair at the front of the Assembly hall, King Sihamoni avoided any mention of the 55 absent opposition members and welcomed the 68 CPP lawmakers.

"This inaugural session of the Fifth Legislature is a new chapter in the history of our legislative body, with your Samdechs and Excellencies… expending and exhausting every physical and mental effort to serve the nation by putting the nation's interests before any others," the King said.

"It is my hope that this National Assembly of the Fifth Legislature will proceed smoothly and fruitfully fulfill its roles and duties in the best interest of the Cambodian motherland and people."

After handshakes and photos with King Sihamoni outside the National Assembly, the CPP lawmakers returned to the Assembly hall, where Heng Samrin, the Assembly's last president and likely its next, read out the names of all 123 elected lawmakers, which included those absent from the CNRP.

"I solemnly declare that the names of the elected lawmakers submitted by the National Election Committee to the National Assembly have their mandates approved on September 23, 2013," he said. "I would like to congratulate you."

The 68 CPP lawmakers then approved their new internal rules with a quick show of hands and agreed to return today to vote on the Assembly's new leadership, the next prime minister and his cabinet.

Earlier in the morning, King Sihamoni issued a Royal Decree nominating Prime Minister Hun Sen to resume his role and inviting him to form the next government. In a letter to the King obtained Monday, Mr. Hun Sen graciously accepted.

In stark contrast to the pomp and ceremony occurring in the capital, the opposition CNRP put out a fiery statement from Siem Reap City dismissing the opening session as an illegitimate sham.

"The opening of the first session of the National Assembly without the presence of the elected lawmakers from the CNRP is an act that violates the Constitution," the party said. "The National Assembly formed today is a single party National Assembly that doesn't represent the entire Khmer nation, meaning it violates democracy, freedom and pluralist principles and drives Cambodia once again to dictatorship."

From Siem Reap, CNRP spokesman Yim Sovann said the opposition's elected lawmakers would start trickling back to Phnom Penh today but still had no plans to take their seats until they settled their differences over the disputed election results at the negotiating table.

Two days of talks between Mr. Hun Sen and opposition leader Sam Rainsy last week stalled after making modest progress and have yet to resume.

"There is no unity, no solidarity, no justice, so the CPP must reconsider what it has done so far," Mr. Sovann said of Monday's opening session of parliament. "The best option is for the CPP to come back to negotiations."

The CPP's Prak Sokhon, a secretary of state at the Council of Ministers who took part in last week's talks, said that he was unaware of any imminent plans to continue talks with the opposition.

He also dismissed the opposition's rejection of the Assembly's opening session.

"If it doesn't comply with the law or the Constitution, why did His Majesty come to chair the meeting and why did all the ambassadors to Cambodia come as honored guests?" Mr. Sokhon asked.

The U.S. Embassy has been highly critical of the elections and quickly issued a statement after Monday's opening of parliament to insist that Ambassador William Todd's participation in the ceremony was not an endorsement of any results or party.

"We believe that a functioning National Assembly requires the participation of *Continued to Page 23*

តមកពីទំព័រទី ១៨ **កាណុងកាមើរថត...**

កន្លងទៅលទ្ធផលចេញពីបីខែនៃការហ្វឹកហ្វឺន និងថតរូបរបស់យុវជនជំទង់ទាំង១២រូប ត្រូវបានយកមកដាក់តាំងពិពណ៌នៅសាលទទួលភ្ញៀវរបស់អភិបាលក្រុងដល់សាធារណៈ និងសហគមន៍ ហើយកិច្ចការនេះត្រូវបានចាប់អារម្មណ៍ពីសំណាក់ អតីតប្រធានប៉ូលីសនៅឡូវែល លោក ខេន ឡាវីលី (Former Lowell Police Superintendent Ken Lavallee) និងប្រធានក្រុងឡូវែលលោក បឺនី លីនឆ៍ (City Manager Bernie Lynch) ។

យុវជនទាំង១២ ដែលបានចូលរួមដាក់តាំងបង្ហាញ ស្នាដៃថតរូបរួមមាន : សនដឺ ខាត់(Saunders Khath) Rbindin II (Brendon Ly)




ប្រៃអិន ម៉ៅ (Brian Mao) lUGuls emetGU (Luis Mateo) FIm:UtSI nut (Tim- othy Nuth) ថាយរ៉ូន នុត (Tyrone Nuth) ម៉ាត់ធ្យូ ផូម៉េឡូ (Matthew Pomerleau) ណែលសិន រ៉ដរីក្ស (Nelson Rodriguez) អេនជែល រូអ៊ីស (Angel Ruiz) sarin rYm( Sarin Ruom) ម៉ាត់ធ្យូ សេខាយី (Matthew Sekayi) និង រីកគី វ៉ាអ៊ីណាអ៊ីណា(Ricky Wainaina) ។

រូបថតពីររូបរបស់យុវជនសនដឺ ខាត់(Saunders Khath) មានអត្ថន័យគួរឱ្យកត់សម្គាល់ ។ រូបទីមួយ ដាក់ចំណងជើងថា អ្នកក្លាហានលើរូបថតឡានពន្លត់អគ្គីភ័យ ។ សនដឺ ខាត់ (Saunders Khath) បានពន្យល់ពីអត្ថន័យ នៃរូបនោះយ៉ាងដូច្នេះថា គេមានអារម្មណ៍ថា មានសុវត្ថិភាពនៅពេលឃើញឡានពន្លត់អគ្គីភ័យនេះ ព្រោះមិនចំពោះថា ឡានពន្លត់អគ្គីភ័យនៅលើផ្លូវហៃឡែននោះក្នុងមូលហេតុអ្វីទេ តែវាបញ្ជាក់ដល់ខ្ញុំពីការសង្គ្រោះសុវត្ថិភាព។ រូបមួយទៀតគឺចាប់យកនូវទិដ្ឋភាពកូនតូចលេងនៅផាកប៉ៃលិន ដែលសនដឺ ខាត់ (Saunders Khath) បញ្ជាក់ថាមានអារម្មណ៍មិនសុវត្ថិភាព។

អត្ថន័យនៃរូបនេះ គឺកូនតូចដែលលេងនៅសួនប៉ៃលិន ដោយពុំមានឪពុកម្តាយជួយមើល អាចប្រឈមនឹងគ្រោះថ្នាក់ដោយប្រការផ្សេងៗ ព្រោះសួនប៉ៃលិន នៅប្របនឹងមាត់ថ្នល់ ហើយកូនតូចៗអាចប្រឈមនឹងគ្រោះថ្នាក់ចរាចរ ឬ ឧបទ្ទវហេតុផ្សេងៗ។

គម្រោងនេះ រួមចំណែកលើកទឹកចិត្តដល់យុវជនបង្ហាញទស្សនៈ ទូលំទូលាយពីសហគមន៍ដែលគេរស់នៅ ហើយបកស្រាយពីការពិតនៃចំណុចដែលគេគិតថា មាន ឬមិនមានសុវត្ថិភាពក្នុងសហគមន៍ ។ ក្នុងន័យនេះក៏ជាចំណុចនាំឱ្យមានការកែលម្អក្នុងសហគមន៍ដើម្បីភាពរីកចំរើន៕

តមកពីទំព័រទី ១២ **លោក ហ៊ុន សែន បន្តតំណែងជានាយករដ្ឋមន្ត្រីមួយអាណត្តិទៀត...**

បន្ទាប់ពីសម័យប្រជុំរយៈពេលខ្លីលើកទី២ របស់រដ្ឋសភា រដ្ឋាភិបាលថ្មីនេះបានបញ្ចេញបញ្ជីឈ្មោះជាផ្លូវការនៃរដ្ឋមន្ត្រីថ្មីរបស់នាយករដ្ឋមន្ត្រី ដែលក្នុងនោះមានការផ្លាស់ប្តូរថ្នាក់ដឹកនាំក្រសួងចំនួន ១០ក្នុងចំណោមក្រសួងទាំង២៧។

លោក ចម ប្រសិទ្ធ រដ្ឋមន្ត្រីក្រសួងពាណិជ្ជកម្មត្រូវផ្លាស់ទៅក្រសួងឧស្សាហកម្ម រ៉ែ និងថាមពល ហើយលោក ស៊ុយ សែម អតីតរដ្ឋមន្ត្រីក្រសួងឧស្សាហកម្ម រ៉ែ និងថាមពលពេលនេះគឺជាសមាជិករដ្ឋសភា។ លោក ស៊ុន ចាន់ថុល អតីតអគ្គលេខាធិការក្រុមប្រឹក្សាអភិវឌ្ឍន៍កម្ពុជា ឥឡូវនេះជារដ្ឋមន្ត្រីក្រសួងពាណិជ្ជកម្ម។

លោក អ៊ុក រ៉ាប៊ុន រដ្ឋលេខាធិការក្រសួងសេដ្ឋកិច្ច និងហិរញ្ញវត្ថុ នឹងជំនួសលោក ច័ន្ទ សារុន ជារដ្ឋមន្ត្រីក្រសួងកសិកម្ម។ ឥឡូវនេះលោក ច័ន្ទ សារុន គឺជាទេសរដ្ឋមន្ត្រីទទួលបន្ទុកបេសកកម្មពិសេសនៅក្រោមលោក ហ៊ុន សែន។

លោក អូន ព័ន្ធមុនីរ័ត្ន រដ្ឋលេខាធិការក្រសួងសេដ្ឋកិច្ច និងហិរញ្ញវត្ថុ នឹងជំនួសលោក គាត ឈន់។ ពេលនេះលោក គាត ឈន់ គឺជាសមាជិករដ្ឋសភា និងជាឧបនាយករដ្ឋមន្ត្រី។ លោក ហង្ស ជួនណារ៉ុន រដ្ឋលេខាធិការក្រសួងសេដ្ឋកិច្ច និងហិរញ្ញវត្ថុនឹងជំនួសលោក អ៊ឹម សិទ្ធី រដ្ឋមន្ត្រីក្រសួងអប់រំ។ ពេលនេះលោក អ៊ឹម សិទ្ធី គឺជាសមាជិករដ្ឋសភា។

លោក ប្រាក់ សុខុន រដ្ឋលេខាធិការទីស្តីការគណៈរដ្ឋមន្ត្រី នឹងជំនួសលោក សូរ ឃុន ជារដ្ឋមន្ត្រីក្រសួងប្រៃសណីយ៍ និងទូរគមនាគមន៍។ ពេលនេះលោក សូរ ឃុន គឺជាសមាជិករដ្ឋសភា។ លោក ភឿង សកុណា រដ្ឋលេខាធិការក្រសួងវប្បធម៌ និងវិចិត្រសិល្បៈនឹងជំនួសលោក ហ៊ឹម ឆែម ជារដ្ឋមន្ត្រី។ លោក ហ៊ឹម ឆែម ក៏ក្លាយជាទេសរដ្ឋមន្ត្រីទទួលបន្ទុកបេសកកម្មពិសេសនៅក្រោមលោក ហ៊ុន សែន ផងដែរ។

លោក វង សូត រដ្ឋមន្ត្រីក្រសួងការងារ និងលោក អ៊ិត សំហេង រដ្ឋមន្ត្រីសង្គមកិច្ច និងប្តូរក្រសួងគ្នា។ លោក ម៉ុក ម៉ារ៉េត រដ្ឋមន្ត្រីក្រសួងបរិស្ថានជំនួសដោយលោក សាយ សំអាល់ ដែលធ្លាប់ជាប្រធានគណៈកម្មការវិនិយោគរបស់រដ្ឋសភា។ ឥឡូវនេះលោក ម៉ុក ម៉ារ៉េត គឺជាសមាជិករដ្ឋសភា។

លោក ឈាង វុន សមាជិករដ្ឋសភាមកពីគណបក្សប្រជាជនកម្ពុជា និងជាអ្នកនាំពាក្យរដ្ឋសភាបាននិយាយជាមួយអ្នកយកព័ត៌មានថា ការដោះដូររដ្ឋមន្ត្រីមួយចំនួននេះគឺជាការឆ្លើយតបទៅតាមតម្រូវការរបស់ប្រជាជន។ លោកបាននិយាយថា "ពីរដ្ឋាភិបាលមួយអាណត្តិទៅរដ្ឋាភិបាលមួយអាណត្តិ និងពីរដ្ឋសភាអាណត្តិថ្មីនីមួយៗ ត្រូវតែមានការផ្លាស់ប្តូរនៅក្នុងរដ្ឋាភិបាល។ វាមានន័យថា ការផ្លាស់ប្តូរនេះ គឺដើម្បីឆ្លើយតបទៅនឹងតម្រូវការរបស់ប្រជាជន"។

មុនពេលសម្រាកកិច្ចប្រជុំរដ្ឋសភារយៈពេលខ្លីនេះ លោក ហ៊ុន សែន ដែលបានកាន់អំណាចអស់រយៈពេល២៨ឆ្នាំមកហើយនេះ បានឡើងថ្លែងជាចុងក្រោយអំពីអវត្តមានគួរឱ្យកត់សម្គាល់នៃសមាជិកសភាជាប់ឆ្នោតទាំង៥៥រូបរបស់គណបក្សសង្គ្រោះជាតិ ពីកិច្ចប្រជុំសភានេះ។

គណបក្សសង្គ្រោះជាតិ កំពុងធ្វើពហិការមិនចូលរដ្ឋសភា ដើម្បីតវ៉ានឹងលទ្ធផលផ្លូវការនៃការបោះឆ្នោតកាលពីថ្ងៃទី២៨ ខែកក្កដាដែលខ្លួនអះអាងថាត្រូវបានលួចបន្លំដើម្បីធ្វើឱ្យគណបក្សប្រជាជនកម្ពុជាឈ្នះ និងអះអាងថា ខ្លួនជាអ្នកឈ្នះពិតប្រាកដ។ សមាជិកសភាជាប់ឆ្នោតទាំង៥៥រូបរបស់គណបក្សនេះបានធ្វើដំណើរទៅក្រុងសៀមរាបរង់ចាំឱ្យព្រះមហាក្សត្រ នរោត្តម សីហមុនី បញ្ចប់ការបើកសម័យប្រជុំសភានេះ ហើយកាលពីថ្ងៃច័ន្ទ គណបក្សសង្គ្រោះជាតិបានចាត់ទុករដ្ឋសភាថ្មីនេះថា មិនស្របតាមរដ្ឋធម្មនុញ្ញ។

លោក ហ៊ុន សែន បានច្រានចោលការអះអាងនេះ។ លោកមានប្រសាសន៍ថា "យើងទាំងអស់គ្នានៅទីនេះមិនមែនជាចំណាប់ខ្មាំងរបស់ក្រុមណាមួយទេ ពីព្រោះយើងបានមកបំពេញភារកិច្ចរបស់យើងទៅតាមរដ្ឋធម្មនុញ្ញ។ ពួកគេនិយាយថា រដ្ឋសភាឯកបក្ស ហើយកិច្ចប្រជុំរបស់យើងខុសច្បាប់ ប៉ុន្តែទ្វារទាំងអស់នៅជាន់ក្រោម និងនៅក្នុងអគារនេះមិនបានចាក់សោរាំងសមាជិកដែលមកពីគណបក្សនយោបាយមួយទៀតមិនឱ្យចូលរួមកិច្ចប្រជុំនេះទេ"។

នាយករដ្ឋមន្ត្រីរូបនេះបានបន្តថា "ពួកគេដើរចេញដោយខ្លួនឯង បើអ៊ីចឹងមានន័យថា តើយើងគួរទៅខេត្តសៀមរាប ដើម្បីចូលរួមជាមួយពួកគេនៅទីនោះឬ ឬយើងគួរចូលមកក្រោមដំបូលរដ្ឋសភា រដ្ឋធម្មនុញ្ញចែងថា កិច្ចប្រជុំសភាត្រូវស្ថិតនៅក្រោមអធិបតីភាពរបស់ព្រះមហាក្សត្រ ហើយកន្លែងប្រជុំសភាត្រូវស្ថិតនៅភ្នំពេញ លើកលែងតែមានករណីពិសេស"។

រួមជាមួយនឹងការបោះឆ្នោតតែងតាំងនាយករដ្ឋមន្ត្រី តែងតាំងប្រធានរដ្ឋសភា និងការដោះដូររដ្ឋមន្ត្រីនោះការបោះឆ្នោតកាលពីម្សិលមិញនេះ ក៏បានបោះឆ្នោតផ្លាស់ប្តូររដ្ឋលេខាធិការដ្ឋានមុខងារសាធារណៈនៃទីស្តីការគណៈរដ្ឋមន្ត្រី ដែលទទួលបន្ទុករៀបចំការងារ និងប្រាក់ខែរបស់មន្ត្រីរាជការនោះទៅជាក្រសួងមុខងារសាធារណៈផងដែរ ដែលត្រូវដឹកនាំដោយលោក ពេជ្រ ប៊ុនធិន រដ្ឋលេខាធិការនៃរដ្ឋលេខាធិការដ្ឋាននេះតែម្តង។

រដ្ឋសភាក៏បានបង្កើតតួនាទីថ្មីចំនួន ១៣ សម្រាប់រដ្ឋមន្ត្រីប្រគល់ឱ្យនាយករដ្ឋមន្ត្រីផងដែរ ដែលតួនាទីទាំងនេះធ្លាប់ស្ថិតនៅក្រោមក្រសួងនីមួយៗរៀងៗខ្លួន ហើយនឹងទទួលខុសត្រូវចំពោះវិស័យមួយចំនួនដែលស្ថិតនៅក្រោមការគ្រប់គ្រងដោយផ្ទាល់របស់លោក ហ៊ុន សែន។

យោងតាមឯកសារដែលត្រូវបានផ្សព្វផ្សាយកាលពីម្សិលមិញ លោក ហ៊ុន សែន ក៏មានឧបនាយករដ្ឋមន្ត្រីតិចជាងមុនដែរ គឺមានតែប្រាំបួនរូបប៉ុណ្ណោះ។

ឈ្មោះរបស់លោក គង់ សំអុល រដ្ឋមន្ត្រីក្រសួងព្រះបរមរាជវាំងក៏បាត់ពីបញ្ជីឈ្មោះឧបនាយករដ្ឋមន្ត្រីទាំង១១នេះដែរ ហើយលោក ញឹក ប៊ុនឆៃ អគ្គលេខាធិការគណបក្សហ៊្វុនស៊ិនប៉ិច ដែលគណបក្សរបស់លោកមិនទទួលបានមួយអាសនៈសោះនៅក្នុងការបោះឆ្នោតកាលពីខែកក្កដានេះក៏បាត់ឈ្មោះពីតំណែងឧបនាយករដ្ឋមន្ត្រីដែរ និងគ្មានតួនាទីផ្សេងទៀតនៅក្នុងរដ្ឋាភិបាលទេ។ លោក ហ៊ុន សែន នឹងធ្វើជាអធិបតីក្នុងកិច្ចប្រជុំគណៈរដ្ឋមន្ត្រីរបស់លោកនៅថ្ងៃនេះ។

*ប្រែសម្រួលដោយ មូល គីមហឿន*

# After 50 Years, US Soldier's Body Discovered

*Cambodia daily*
*By Simon Henderson - September 24, 2013*

The remains of a Vietnam Warera U.S. serviceman who has been missing in action (MIA) since his plane was shot down over Mondolkiri province near the border with Vietnam in 1964 have been found, according to media reports.

Staff Sergeant Lawrence Woods, born in 1925 in Clarksville, Tennessee, was aged 38 when his crew of eight from the 5th Special Forces Airborne division was hit by enemy fire during an aerial resupply mission from Nha Trang to a point near the Vietnam-Cambodia border, ac-cording to official records.

The Fairchild C-123 "Provider" aircraft crashed inside Cambodian ter-ritory and was completely de-stroyed by fire except for the tail section, and no parachutes were seen leaving the aircraft. A post-crash search of the aircraft recovered seven bodies but Lawrence Woods' remains were never found.

"They couldn't find my father's remains because he was in the back of the plane, and that's where the plane blew up," Lisa Szy-manski, who was 13 when her father went to Vietnam, told the Associated Press, adding that despite being informed of the crash, the lack of a body gave the family hope that he was being held as a prisoner of war.

Details of when and how the remains were actually located or the precise position of their retrieval were not immediately available. The U.S. Embassy referred questions to the U.S. Joint POW/MIA Accounting Command (JPAC) in Hawaii, which has not yet replied to questions.

But according to a newspaper report from Lawrence Woods' home-town, Ms. Szymanski was informed that DNA evidence obtained from family members at an earlier stage of the investigation had established the identity.

Mondolkiri provincial police chief Nhem Vanny said on Sunday that police were unaware of any recent investigations in the area and had heard no reports of remains being found in years, though it is possible that the remains were recovered some time ago.

"In 2004, some U.S. soldier's remains were found here, though it wasn't a body, just small pieces of bones," he said.

Those remains, which were dis-covered after a 26-member U.S. recovery team carried out multiple searches in Mondolkiri in January and February 2004, were sent for testing to JPAC's headquarters in Hawaii fol-lowing a military ceremony at Phnom Penh Airport.

U.S. officials at the time declined to elaborate on the nature of the Mondolkiri remains and no further information was ever released.

On Monday, the U.S. POW/MIA specialist in Cambodia, Peter Loverde, declined to speculate on whether the Mondolkiri search mis-sion almost a decade ago led to the identification of Lawrence Woods.

The crash in 1964 happened early in the Continued to page 23

*Continued From Page 20*

## With Just One Party ...

both major political parties," the embassy said, while also calling on the two parties to return to negotiations and repeating its call for a transparent review of election irregularities.

Koul Panha, executive director of the Committee for Free and Fair Elections in Cambodia, said the embassy's letter would not stop the government, and the mostly government-aligned media, from making the foreign delegates' presence at the ceremony look like an endorsement.

"The media of the ruling party will do that, to make people think…they come to legitimate the National Assembly and the outcome of the election," he said.

Cambodians who see foreign ambassadors shaking hands with the CPP lawmakers on television will believe they have endorsed the contentious results, Mr. Panha said.

Political analysts and lawyers are split on whether the Assembly is a legitimate law-making body without the opposition's 55 lawmakers.

"You have two parties but only a single party goes ahead…. It does not follow the spirit of the Constitution," Mr. Panha said. "In terms of legitimacy it's very controversial."

Lao Mong Hay, a political analyst and law professor, called it "one of the saddest days in our history."

"It's not legitimate, it's just common sense," he said of the new parliament.

"The National Assembly is the depository of the people's power…. But at the moment the power deposited with the National As-sembly is just 55 percent," Mr. Mong Hay said, referring to the CPP's share of the 123 seats.

Any laws the Assembly goes on to pass, he added, may be "legal but not legitimate."

Mr. Mong Hay said he also worried that the new government might have a tough time enforcing such laws and that they could lead to more unrest, maybe not right away but eventually.

"People will not respect those laws and force may have to be used to enforce those laws," he warned. "The opposition and the people will continue to protest in one form or another."

Independent analyst Kem Ley called the new Assembly "illegal completely" and also foresaw more unrest unless the CPP and CNRP settled their differences before the Assembly started passing laws.

"The people will fight and a strong movement will happen with nationwide demonstrations if the government does not bring the opposition on board," he said.

The CNRP has attracted tens of thousands of supporters to protests in central Phnom Penh in recent weeks to demand an independent investigation of the election. The party says it may call for more protests soon.

Continued from page 22

## After 50 Years, US Soldier's...

Vietnam War, with Lawrence Woods and his 5th Special Forces Airborne—which had been recently created for the purpose of waging "unconventional warfare" —were among the first U.S. combat troops committed to the campaign.

Declassified case files show that a 30-man joint U.S.-Vietnamese investigating team had previously visited a crash site in Mondolkiri and across the border in Vietnam in May 1997, carrying out an extensive search and mapping mission accompanied by two local witnesses of the crash.

"A large amount of aircraft wreckage was found…but [the search] located no evidence of remains, personal effects or life support equipment," the case report said.

Most of the U.S. servicemen lost in Cambodia were airmen whose planes were shot down later in the war during secret bombing raids on the Ho Chi Minh Trail, which wound through eastern Cambodia and was the major supply route for the North Vietnamese.

The first mission to recover MIAs in Cambodia was carried out in July 1990. Since then, 28 U.S. service personnel have been recovered by JPAC search teams, leaving 53 Americans still unaccounted for.

In May, almost 38 years after they were shot down in 1975 during fighting that followed the Khmer Rouge's seizure of U.S. merchant vessel S.S. Mayaguez, the remains of 13 U.S. Marines whose helicopter crashed during a subsequent U.S. assault on Koh Tang were buried together at Arlington National Cemetery in Virginia, after the remains of private Daniel Benedett were ac-counted for on January 30.

*(Additional reporting by Saing Soenthrith)*

## តមកពីទំព័រទី ១២ ព្រះមហាក្សត្រកោះប្រជុំសភា...

ចាត់តាំងលោកនាយករដ្ឋមន្ត្រី ហ៊ុន សែន ឱ្យបន្តតួនាទីរបស់លោក និងអញ្ជើញឱ្យលោកបង្កើតរដ្ឋាភិបាលថ្មី។ នៅក្នុងលិខិតផ្ញើថ្វាយព្រះមហាក្សត្រ កាលពីម្សិលមិញ លោក ហ៊ុន សែន បានទទួលយកដោយការគួរសម។

ផ្ទុយទាំងស្រុងពីពិធីដែលធ្វើឡើងនៅរាជធានីនេះ គណបក្សសង្គ្រោះជាតិ បានចេញសេចក្តីថ្លែងការណ៍ខ្លាំងៗពីក្រុងសៀមរាប ដោយចាត់ទុកការបើកសម័យប្រជុំសភានេះថា ជាការខុសច្បាប់។ គណបក្សនេះបានលើកឡើងថា "ការបើកសម័យប្រជុំសភាលើកដំបូងដោយគ្មានវត្តមានរបស់សមាជិកសភាជាប់ឆ្នោតមកពីគណបក្សសង្គ្រោះជាតិ គឺជាទង្វើមួយដែលបំពានរដ្ឋធម្មនុញ្ញ។

រដ្ឋសភា ដែលបង្កើតឡើងនៅថ្ងៃនេះ គឺជារដ្ឋសភាឯកបក្សដែលមិនតំណាងឱ្យជាតិខ្មែរទាំងមូល មានន័យថា រដ្ឋសភានេះបំពានគោលការណ៍លទ្ធិប្រជាធិបតេយ្យ សេរី ពហុបក្ស ហើយធ្វើឱ្យកម្ពុជាត្រឡប់ទៅរកភាពផ្តាច់ការម្តងទៀត"។

លោក យឹម សុវណ្ណ អ្នកនាំពាក្យគណបក្សសង្គ្រោះជាតិ មានប្រសាសន៍ពីសៀមរាបថា សមាជិកសភាជាប់ឆ្នោតរបស់គណបក្សប្រឆាំងនឹងចាប់ផ្តើមធ្វើដំណើរបណ្តើរៗត្រឡប់ទៅភ្នំពេញវិញនៅថ្ងៃនេះ ប៉ុន្តែនៅតែមិនមានផែនការទទួលយកអាសនៈរបស់ខ្លួនដដែលរហូតដល់ពួកគេដោះស្រាយការខ្វែងគំនិតគ្នាលើលទ្ធផលបោះឆ្នោតនៅតុចរចារួចហើយសិន។

ការចរចាររយៈពេលពីរថ្ងៃ រវាងលោក ហ៊ុន សែន និងលោក សម រង្ស៊ី មេដឹកនាំគណបក្សប្រឆាំង បានជាប់គាំង កាលពីសប្តាហ៍មុន បន្ទាប់ពីមានការវិវឌ្ឍតិចតួចណាស់ និងមិនបានបន្តទៀតទេ។

លោក យឹម សុវណ្ណ មានប្រសាសន៍អំពីការបើកប្រជុំសភា កាលពីម្សិលមិញថា "គ្មានឯកភាព គ្មានសាមគ្គីភាព គ្មានយុត្តិធម៌ ដូច្នេះគណបក្សប្រជាជនកម្ពុជាត្រូវតែពិចារណាឡើងវិញនូវអ្វីដែលខ្លួនបានធ្វើរហូតមកទល់ពេលនេះ។ ជម្រើសល្អបំផុតសម្រាប់គណបក្សប្រជាជនកម្ពុជា គឺត្រឡប់មករកតុចរចាវិញ"។

លោក ប្រាក់ សុខុន រដ្ឋលេខាធិការនៅទីស្តីការគណៈរដ្ឋមន្ត្រីមកពីគណបក្សប្រជាជនកម្ពុជាដែលបានចូលរួមក្នុងការចរចាកាលពីសប្តាហ៍មុនបានមានប្រសាសន៍ថា លោកមិនបានដឹងពីផែនការណាមួយក្នុងការបន្តការចរចាជាមួយគណបក្សប្រឆាំងទេ។ លោកក៏បានច្រានចោលការជំទាស់របស់គណបក្សប្រឆាំងចំពោះការបើកសម័យប្រជុំសភានេះដែរ។

លោក ប្រាក់ សុខុន បានសួរថា "ប្រសិនបើវាមិនស្របតាមច្បាប់ ឬស្របតាមរដ្ឋធម្មនុញ្ញទេ ហេតុអ្វីបានជាព្រះករុណាយាងធ្វើជាអធិបតីបើកកិច្ចប្រជុំនេះ និងហេតុអ្វីបានជាឯកអគ្គរដ្ឋទូតប្រចាំកម្ពុជាទាំងអស់អញ្ជើញចូលរួមជាភ្ញៀវកិត្តិយស "។

ស្ថានទូតអាមេរិកបានរិះគន់យ៉ាងខ្លាំងចំពោះការបោះឆ្នោតនេះ និងបានចេញសេចក្តីថ្លែងការណ៍មួយភ្លាមៗ បន្ទាប់ពីការបើកប្រជុំសភាកាលពីម្សិលមិញនេះ ដើម្បីបញ្ជាក់ថា ការចូលរួមរបស់លោក



វីល្លៀម ថត ឯកអគ្គរដ្ឋទូតអាមេរិកនៅក្នុងពិធីនេះមិនមែនជាការទទួលស្គាល់លទ្ធផលណាមួយ ឬគណបក្សណាមួយទេ។

ស្ថានទូតអាមេរិកបាននិយាយថា "យើងជឿថា ការបើករដ្ឋសភាតម្រូវឱ្យមានការចូលរួមពីគណបក្សនយោបាយធំៗទាំងពីរ"។ ហើយលោកក៏បានអំពាវនាវឱ្យគណបក្សទាំងពីរត្រឡប់មកចរចាផងដែរ និងបានលើកឡើងជាថ្មីម្តងទៀតអំពីការអំពាវនាវរបស់ខ្លួនឱ្យមានការស៊ើបអង្កេតដោយតម្លាភាពលើភាពមិនប្រក្រតីក្នុងការបោះឆ្នោតនេះ។

លោក គល់ បញ្ញា នាយកគណៈកម្មាធិការដើម្បីការបោះឆ្នោត ដោយសេរី និងយុត្តិធម៌នៅកម្ពុជាបានមានប្រសាសន៍ថា លិខិតរបស់ស្ថានទូតនេះនឹងមិនអាចរារាំងរដ្ឋាភិបាល និងប្រព័ន្ធផ្សព្វផ្សាយដែលមានទំនាក់ទំនងជាមួយរដ្ឋាភិបាលមិនធ្វើឱ្យវត្តមានរបស់គណៈប្រតិភូបរទេសនៅក្នុងពិធីនេះដូចជាការទទួលស្គាល់នោះបានទេ។

លោកបានមានប្រសាសន៍ថា "ប្រព័ន្ធផ្សព្វផ្សាយរបស់គណបក្សកាន់អំណាចនឹងផ្សព្វផ្សាយឱ្យប្រជាពលរដ្ឋគិតថា ពួកគេមកចូលរួមធ្វើឱ្យរដ្ឋសភា និងលទ្ធផលបោះឆ្នោតនេះស្របច្បាប់"។ លោកបានមានប្រសាសន៍ថា ប្រជាពលរដ្ឋខ្មែរដែលឃើញឯកអគ្គរដ្ឋទូតបរទេសចាប់ដៃជាមួយសមាជិកសភាគណបក្សប្រជាជនកម្ពុជានៅតាមទូរទស្សន៍នឹងជឿថា ពួកគេបានទទួលស្គាល់លទ្ធផលដ៏ចម្រូងចម្រាសនេះ។

អ្នកវិភាគនយោបាយ និងមេធាវីមិនយល់ស្របថា រដ្ឋសភានេះជាស្ថាប័នបង្កើតច្បាប់ស្របច្បាប់ទេ បើគ្មានសមាជិកសភាទាំង៥៥រូបរបស់គណបក្សប្រឆាំង។

លោក គល់ បញ្ញា បានមានប្រសាសន៍ថា "យើងមានគណបក្សពីរ ប៉ុន្តែមានគណបក្សតែមួយប៉ុណ្ណោះចូលប្រជុំសភា។ វាមិនស្របតាមស្មារតីនៃរដ្ឋធម្មនុញ្ញទេ។ ចំពោះភាពស្របច្បាប់វិញ វាចម្រូងចម្រាសណាស់"។

លោក ឡៅ ម៉ុងហៃ អ្នកវិភាគនយោបាយ និងជាសាស្ត្រាចារ្យច្បាប់បានចាត់ទុកថ្ងៃនេះថា ជាថ្ងៃមួយដ៏ក្រៀមក្រំបំផុតនៅក្នុងប្រវត្តិសាស្ត្ររបស់យើង"។ លោកមានប្រសាសន៍អំពីរដ្ឋសភាថ្មីនេះថា "វាមិនស្របច្បាប់ទេ គ្រាន់តែធ្វើឱ្យល្អមើលប៉ុណ្ណោះ"។

លោក ឡៅ ម៉ុងហៃ បានមានប្រសាសន៍អំពីអាសនៈរបស់គណបក្សប្រជាជនកម្ពុជានៅក្នុងចំណោមអាសនៈទាំង១២៣នេះថា "រដ្ឋសភា គឺជាឃ្លាំងអំណាចរបស់ប្រជាពលរដ្ឋ ប៉ុន្តែនៅពេលនេះអំណាចដែលមាននៅក្នុងរដ្ឋសភាមានតែ៥៥ភាគរយប៉ុណ្ណោះ"។

លោកបានបន្ថែមថា "ច្បាប់ណាមួយដែលរដ្ឋសភានេះអនុម័តអាចធ្វើទៅបាន ប៉ុន្តែមិនស្របតាមផ្លូវច្បាប់ទេ"។ លោកបានមានប្រសាសន៍ថា លោកក៏ព្រួយបារម្ភដែរថា រដ្ឋាភិបាលថ្មីប្រហែលជាមានការលំបាកក្នុងការអនុវត្តច្បាប់បែបនេះ ហើយអាចនាំឱ្យមានចលាចលកាន់តែខ្លាំងប្រហែលជាមិនមែនពេលនេះទេ ប៉ុន្តែអាចនៅពេលក្រោយ។

លោកបានព្រមានថា "ប្រជាពលរដ្ឋនឹងមិនគោរពច្បាប់ទាំងនោះទេ ហើយប្រហែលជាត្រូវប្រើកម្លាំងដើម្បីអនុវត្តច្បាប់ទាំងនោះ។ គណបក្សប្រឆាំង និងប្រជាពលរដ្ឋនឹងបន្តតវ៉ាតាមវិធីផ្សេងៗ"។

លោក កែម ឡី អ្នកវិភាគឯករាជ្យបានចាត់ទុករដ្ឋសភាថ្មីនេះថា "ខុសច្បាប់ទាំងស្រុង" ហើយក៏បានព្យាករដែរថា អាចមានចលាចលច្រើនទៀត លុះត្រាតែគណបក្សប្រជាជនកម្ពុជា និងគណបក្សសង្គ្រោះជាតិដោះស្រាយជម្លោះរបស់ខ្លួនឱ្យបានមុនរដ្ឋសភាចាប់ផ្តើមអនុម័តច្បាប់សិន។ លោកមានប្រសាសន៍ថា "ប្រជាពលរដ្ឋនឹងតវ៉ា ហើយនឹងមានការធ្វើបាតុកម្មទូទាំងប្រទេសប្រសិនបើរដ្ឋាភិបាលមិនឱ្យគណបក្សប្រឆាំងចូលរួមទេនោះ"។

គណបក្សសង្គ្រោះជាតិ បានទាក់ទាញអ្នកគាំទ្ររាប់ម៉ឺននាក់ឱ្យមកធ្វើការតវ៉ានៅក្រុងភ្នំពេញកាលពីប៉ុន្មានសប្តាហ៍ថ្មីៗនេះ ដើម្បីទាមទារឱ្យមានការស៊ើបអង្កេតឯករាជ្យលើការបោះឆ្នោតនេះ។ គណបក្សនេះលើកឡើងថា ខ្លួនប្រហែលជាអំពាវនាវឱ្យមានការធ្វើបាតុកម្មទៀតនៅពេលឆាប់ៗនេះ៕

*ប្រែសម្រួលដោយ: មូល គីមហឿន*

# វិធីថែទាំសុខភាពរបស់អ្នកជំងឺលើសឈាម

មនុស្សភាគច្រើនកើតជម្ងឺលើសឈាមដោយមិនដឹងខ្លួនជាច្រើនឆ្នាំ។ ព្រោះថា ការលើសឈាម ឬសម្ពាធឈាមលើស ជួនមិនបង្ករោគសញ្ញាឬវិបត្តិអ្វីទាំងអស់ អ្នកជម្ងឺមានសភាពធម្មតា។ ប៉ុន្តែគាត់អាចមានរោគសញ្ញាខ្លះ ដែលស្ដែងឡើង ដូចជាឈឺក្បាលនៅពេលយប់ ឬពេលងើបពីការទទួលទានដំណេកនៅពេលព្រឹកព្រលឹម ហ៊ឹងត្រចៀក អស់កម្លាំងគ្មានមូលហេតុ ឬវិលមុខជាដើម។ បើសិនជាលោកអ្នកដែលកើត





ជម្ងឺលើសឈាមមិនបានមកធ្វើការព្យាបាលឱ្យបានទាន់ពេលទេនោះ លោកអ្នកអាចនឹងជួបនូវបញ្ហាធ្ងន់ធ្ងរជាច្រើន ដូចជាជម្ងឺបេះដូង ជម្ងឺខ្សោយតម្រងនោម ដាច់សរសៃឈាមក្នុងខួរក្បាលជាដើម។ លើសពីនេះជម្ងឺលើសឈាមអាចបាត់ជីវិតថែមទៀតផង បើសិនជាលោកអ្នកមិនបានធ្វើការថែទាំសុខភាពឱ្យបានដិតដល់នោះ។

លោកវេជ្ជបណ្ឌិត សេង សើរី ឯកទេសជម្ងឺទឹកនោមផ្អែមនៅមន្ទីរពេទ្យព្រះកុសុម : និងប្រាប់ពីវិធីនៅក្នុងការថែទាំសុខភាពរបស់អ្នកជម្ងឺលើសឈាម ដើម្បីឱ្យលោកអ្នកជ្រាប និងយល់ឱ្យកាន់តែច្បាស់អំពីបញ្ហានេះ។

**ជម្ងឺលើសឈាម**

ជម្ងឺលើសឈាមគឺជា សម្ពាធឈាមនៅក្នុងខ្លួនរបស់មនុស្សឡើងខ្ពស់ ខុសពីធម្មតា ដែលអាចធ្វើឱ្យសរសៃឈាមក្នុងខួរក្បាលស្ទះឬដាច់ អាចធ្វើឱ្យមនុស្សយើងស្លាប់មួយចំហៀងខ្លួន។ ហើយនៅពេលដែលសម្ពាធឈាមឡើងខ្លាំង អាច ធ្វើឱ្យគាំងបេះដូងស្លាប់ភ្លាមៗតែម្ដង។ កាលណាសម្ពាធឈាមឡើងខ្លាំងក៏អាចធ្វើឱ្យបែកសរសៃឈាមនៅក្នុងភ្នែកខ្សោយតម្រងនោមជាដើម។

**វិធីថែទាំសុខភាពរបស់អ្នកជម្ងឺលើសឈាម**

ជម្ងឺលើសឈាមគឺទាមទារការថែទាំ និងការព្យាបាលអស់មួយជីវិត ហើយចំពោះវិធីថែទាំសុខភាពរបស់អ្នកជម្ងឺលើសឈាមមានបីវិធី ដូចជា :

**១ - របបអាហារ :** អ្នកជម្ងឺត្រូវកាត់បន្ថយចំណីអាហារណាដែលសម្បូរទៅដោយសារជាតិប្រៃ ជាតិស្ករ មិនត្រូវទទួលទានផ្អែមពេក។ ហើយសូមកាត់បន្ថយអាហារដែលសម្បូរទៅដោយជាតិខ្លាញ់ច្រើនពេក ត្រូវទទួលទានបន្លែ និងផ្លែឈើឱ្យបានច្រើន។

**២ - ការធ្វើលំហាត់ប្រាណ :** ការធ្វើលំហាត់ប្រាណដូចជាការដើរលឿនប្រមាណជា៣០នាទីនៅក្នុងមួយថ្ងៃឱ្យបានជាប្រចាំ វាមានសារៈប្រយោជន៍ខ្លាំងណាស់នៅក្នុងការជួយធ្វើឱ្យអ្នកជម្ងឺលើសឈាមមិនសូវឡើងទម្ងន់ខ្លាំងអាចជួយឱ្យសម្ពាធឈាមចុះបាន។

**៣ - ឱសថព្យាបាល :** អ្នកជម្ងឺត្រូវតែទទួលទានថ្នាំឱ្យបានទៀងទាត់ទៅតាមគ្រូពេទ្យណែនាំមិនត្រូវធ្វេសប្រហែសឡើយ។ ត្រូវធ្វើការណាត់ជួបជាមួយគ្រូពេទ្យជារៀងរាល់១ខែម្ដងឬ៣ខែម្ដង ដើម្បីប្រើថ្នាំ។ សូមចៀសវាងការប្រើថ្នាំឱ្យខ្លួនឯងផ្ទាល់។

**វិធីការពារជម្ងឺលើសឈាម**

ដើម្បីចៀសវាងការកើតជម្ងឺលើសឈាម លោកអ្នកមិនត្រូវទទួលទានស្រា បារីច្រើនហួសកំណត់នោះទេ"បន្តិចបន្តួចបាន" មិនត្រូវទទួលទានប្រៃពេក។ ហើយត្រូវថែរក្សាទម្ងន់កុំឱ្យធាត់ពេកត្រូវកាត់បន្ថយនូវភាពមួម៉ៅតានតឹង។ ហើយត្រូវចេះសម្រួលអារម្មណ៍ខ្លួនឯងកុំឱ្យឆាប់ខឹងច្រើនពេក។

**ដំបូន្មានអ្នកជំនាញ**

នៅកម្ពុជា ជម្ងឺលើសឈាមកើតមានច្រើនគួរឱ្យកត់សម្គាល់។ ជម្ងឺនេះកើតនៅលើប្រជាជនដែលចូលចិត្តទទួលទានប្រៃពេក។ ដូច្នេះ ហើយលោកអ្នកដែលមានអាយុចាប់ពី៣០ឆ្នាំទៅ៤០ឆ្នាំ មិនគួរទម្លាប់ទទួលទានអាហារប្រៃពេក ផ្អែមពេក ឬខ្លាញ់ច្រើនពេកនោះទេ។ លោកអ្នកមិនត្រូវមើលស្រាលចំពោះជម្ងឺលើសឈាមនោះទេ៕

## តមកពីទំព័រទី ១ ទីប្រឹក្សាក្រុងលីន លោក ហុង ណេត ទទួល...

វិច្ឆិកា ឆ្នាំ២០១៣ខាងមុខ ត្បិតមាន៤នាក់នឹងត្រូវជម្រុះចោលខណៈដែល៤នាក់ទៀត និងក្លាយជាជ័យលាភី ។

ទាក់ទិននឹងការបោះឆ្នោតបឋមនៅក្រុងលីន លោក ហុង ណេត ជាបេក្ខជនខ្មែរអាមេរិកាំងតែមួយរូបដែលឈរឈ្មោះឱ្យប្រជាជនបោះឆ្នោតគាំទ្រជាលើកទី២ ក្នុងតួនាទីជាទីប្រឹក្សាក្រុង ។ ចំណុចដែលគួរឱ្យគត់សម្គាល់ក្នុងចំណោមបេក្ខជន៨នាក់នេះ លោក ហុង ណេត ទទួលបានលំដាប់លេខ៣ ស្មើនឹងសម្លេងឆ្នោត៣២១០សម្លេងដែលត្រូវនឹង១៧%នៃសម្លេងឆ្នោតសរុប ។




គួរបញ្ជាក់ផងដែរ បេក្ខជនទាំង៨រូបដែលកំពុងឈរឈ្មោះជាទីប្រឹក្សាក្រុងលីនឆ្នាំ២០១៣នេះ មានរាយនាមដូចខាងក្រោម :

- -ហ្គរឌិន បាថុង (Gondon Barton)
- -ដេញ៉ូល ខេហៀល (Daniel Cahill)
- -ប្រិនឌិន គ្រីកថិន (Brendan Crighton)
- -ហុង ណេត (Hong Net)
- -រ៉ូប៊ឺតខ្លេយ វ៉លស៍ (Robert Clay Walsh)
- -ធ៉ល ក្រៅលី (Taul Crowley)
- -មីហ្គល ហ្វូណេស្ស៍ (Miguel Funez)
- -ខេធីរីណា ខៅនីស (Katerina Kaunis)

ក្នុងចំណោមបេក្ខជនទាំង៨នាក់ខាងលើមានម្នាក់ជាស្ត្រី គឺបេក្ខនារី ខេធីរីណា ខៅលី (Katerina Kaunis) ដែលជាបេក្ខនារីថ្មី ឈរឈ្មោះជាទីប្រឹក្សាក្រុង ។ ក្រៅពីនោះបេក្ខនារីទាំង៧នាក់ខាងលើសុទ្ធតែធ្លាប់ឈរឈ្មោះជាទីប្រឹក្សាក្រុងហើយ ៕

តមកពីទំព័រទី ៦

## សង្គ្រោះជាតិ : ទន់ភ្លន់ តែរឹងមាំ...

គ្រីតតែគួរឱ្យអាណិតដល់ព្រះរាជាអង្គ សីហមុនី នេះណាស់ព្រះអង្គបានទទួលកេរ្តិ៍ដំណែលពីព្រះបីតានរោត្តម សុីហនុ នូវមរតកមិនឯករាជ ហើយបើចង់អព្យាក្រឹត ក៏នៅក្នុងទ្រុងមាសរបស់គណបក្សប្រជាជនទៅហើយដែរ តែព្រះអង្គមានគុណសម្បត្តមួយ គឺគ្មានព្រះទ័យគង់ជាស្តេចផែនដីស្អីទេ តែដោយសារព្រះទ័យដឹងគុណដ៏ធំធេងដល់ព្រះបីតាព្រះមាតា ទើបទ្រង់ទទួលគ្រងរាជ្យនេះ ។ ព្រះរាជបំណងនេះ បើមានការប្តេជ្ញាព្រះទ័យច្បាស់លាស់ ក៏ជាគុណសម្បត្តិធំមួយដែរ ដោយសារតែពេលនេះជាឱកាសដំបូងបង្អស់តែមួយគត់ដែលបើកឱកាសឱ្យស្តេចផែនដីប្រើរដ្ឋធម្មនុញ្ញធ្វើសេចក្តីសម្រេច ប្រកបដោយយុត្តិធម្មមិនខ្លាចហ៊ុន សែន ខឹងស្រោចស្រង់ភាពទំនាស់នយោបាយជាតិនៃការបោះឆ្នោត ។ ហ៊ុន សែន នឹងគណបក្សប្រជាជនមិនអាចប្រកាន់ខឹងនឹងព្រះអង្គបានទេ ដោយក្រុមខ្លួនឯងកំពុងខ្វះអំណាចស្របច្បាប់ខ្វះប្រជាប្រិយភាពនឹងចុះខ្សោយដោយបែកបាក់ផ្ទៃក្នុងក៏ត្រូវការវរៈជនជាអាជ្ញាកណ្តាលម្នាក់មកជួយដោះស្រាយ ម្យ៉ាងទៀតពលរដ្ឋខ្មែរ ក៏អាចជាកម្លាំងកាពាររាជបល្លង្ករំដោះព្រះមហាក្សត្រខ្លួនពីគណ្តាប់ដៃគណបក្សប្រជាជននឹងបរទេសបានដែរ ឱ្យតែទ្រង់សព្វព្រះទ័យនាពេលនេះ ។

**ព្រឹត្តិការណ៍អនាគតៈ** លក្ខខណ្ឌមួយដែលច្បាស់លាស់ គឺភាពច្បាស់លាស់រឹងប៉ឹងរបស់ការទាមទារគណបក្សសង្គ្រោះជាតិគឺ "ឆែកសន្លឹកឆ្នោតដោយអង្គការឯករាជ" នេះគឺផ្តល់ការដកអំណាចរដ្ឋចេញពីដៃគណបក្សប្រជាជនជាស្វ័យប្រវត្តិដែលជាបុព្វហេតុនៃការ "ឡាំប៉ា" រហូតមកដល់ថ្ងៃនេះ បាតុកម្មនៃពលរដ្ឋម្ចាស់ឆ្នោតក៏មិនចប់រហូតដល់ទម្លាក់ ហ៊ុន សែន បាន ។ ហ៊ុន សែន ក៏មិនអាចទប់ចរន្តរកយុត្តិធម្មនេះ ហើយទៅកាន់អំណាចម្នាក់ឯងសាជាថ្មីក្នុងភាពរំជើបរំជួលជាប្រចាំបានដែរ ជាពិសេសនៅពេល អ.ស.ប. នឹងខ្លួនឯងដឹងថា "គេចាប់ដៃចោរគំពុងលួចក្នុងថង់ឆ្នោតបានទៅហើយ"។ ព្រឹត្តិការណ៍នេះនឹងបញ្ជូនសម រង្ស៊ី-កឹម សុខា ទៅកាន់អំណាចរដ្ឋនៅអនាគត បើមិនយូរក៏នៅឆាប់ៗនេះតែភាពទន់ភ្លន់នៃការចរចារបស់គណបក្សសង្គ្រោះជាតិអាចនឹងស្ថិតនៅលើចំណុចធំមួយ គឺរំដោះព្រះមហាក្សត្រពីដៃបរទេសនឹងគណបក្សប្រជាជនដោយផ្តល់តិត្តិយសដល់ព្រះអង្គអាចធានាសុវត្ថិភាពនឹងសម្បត្តិទ្រព្យដល់សមាជិកគណបក្សប្រជាជនណាដែលបានបានធ្វើអំពើឧក្រិដ្ឋក្រោមបញ្ជាការនៃអំណាចផ្តេចការកម្ពុជា ។



**តំរូះ** គំរូពីបូរំបូរាណនេះមានកម្លាំងខ្លាំងខ្លាណាស់ គឺព្រះសមណគោត្តមបានបង្ហាត់បង្រៀនសារៈរាប់ពាន់ម៉ឺនអង្គបន្តជាច្រើនជំនាន់រួចមកហើយព្រះអង្គប្រោសសត្វបង្ហាត់បង្ហាញផ្ចាញ់មារមិនឈប់ឈរតែសារៈខ្លះជាពុទ្ធបរិស័ទពុំបានយល់គំនិតបំរើសាធារណៈនេះទេ បែរជាបំរើប្រយោជន៍ផ្ទាល់ខ្លួនទៅវិញ ដែលជាហេតុមិនឱ្យកម្លាំងជាតិនោះកើតឡើងបាន ។ រីឯកម្លាំងដ៏រឹងមាំនៃសង្គមខ្មែរនាឆ្នាំ២០១៣ពេលនេះ គឺប្រាកដជាព្រឹត្តការណ៍ប្រវត្តិសាស្ត្រមានដើមកំណើតចេញពីករណីកិច្ចការពាររបស់ព្រះសង្ឃដែលមានជំនឿជ្រៅជ្រះលើព្រះធម្មភាពលះបង់ដ៏ស្មោះនៃប្រជាពលរដ្ឋនឹងមេដឹកនាំនៃគណបក្សសង្គ្រោះជាតិ ដើម្បីភាពចំរើនរុងចំរើនរបស់កម្ពុជា...ដោយសារតែការប្រើស្មារតីដឹកនាំសុច្ចរឹត-យុត្តិធម្ម-នឹងក្តីស្រឡាញ់ចង់ចែករំលែកសេចក្តីសុខឱ្យបានគ្រប់ៗគ្នានេះ ហើយទើបមហាបាតុកម្មនៃប្រជាជាតិគ្រប់ស្រទាប់កើតឡើងបាន ។ ជនខ្លៅតែងតែប្រើកម្លាំងហឹង្សារបស់រដ្ឋដើម្បីប្រយោជន៍ផ្ទាល់ខ្លួន រីឯប្រជាជាតិខ្មែរថ្ងៃនេះ បានបង្ហាញកម្លាំងអហឹង្សារបស់ខ្លួនដើម្បីសុច្ចរឹត-យុត្តិធម្មសម្រាប់ពលរដ្ឋខ្មែរទាំងមូល ៕

# វិស្វកម្មក្នុងចិត្តមនុស្ស
# The human inner engineering

តពីលេខមុន


និពន្ធដោយ : ម៉ៅ ច័ន្ទសំណុំ

គឺជាកំហឹងនេះតែម្ដងរូបគេ និងកំហឹង គឺជារូបតែមួយ ។ ដូច្នេះគេស្ថិតត្រាំនៅក្រោមឥទ្ធិពលរបស់កំហឹង ។ កំហឹងបង្កើតភាពវឹកវរក្នុងខ្លួនកំហឹងធ្វើភ្លៀងធ្វើផ្គរមកលើខ្លួនកំហឹងទន្ទ្រានន គរកាយនេះបង្កើតជាបញ្ហាការខាតបង់រាប់ម៉ឺនសែនជំពូក ចំពោះខ្លួនគេ និងអ្នកដទៃ ។ ពាក្យបូរាណខ្មែរ ពោលទុកមកថា : "ខឹងខូច ខឹងខាត" ប្រការនេះពិតប្រាកដណាស់ ។

សតិដឹងនេះជាបណ្ដូលជាដួងកែវ ជារតនៈសម្បត្តិរបស់មនុស្សយើងគ្រប់ៗគ្នា ។ មនុស្សយើងភាគច្រើនពុំដឹង ពុំយល់ ពុំស្គាល់ ទុករបស់នេះកប់ចោលជារៀងរហូតទៅ ។ សតិដឹងនេះមានមហិទ្ធិ អំណាច តេជៈ អាចលំអាតចិត្តមនុស្សអាចរំដោះចិត្តមនុស្សឱ្យរួចផុតពីទុក្ខក្រៀមក្រំភ័យព្រួយ បារម្ភ កំហឹង លោភលន់ ច្រណែនប្រចណ្ឌ ភាពតឹងតែងក្នុងអារម្មណ៍ រំជើបរំជួលក្នុងអារម្មណ៍ កាកសំណល់រឿងរ៉ាវ ពិសពុលពីអតីតកាលស្រែ្តះរាប់ពាន់ម៉ឺនសែនជំពូក ។ ហើយពេលដែលពពកខ្មៅនៃទុក្ខវេទនា រសាត់បាត់ពីផ្ទៃចិត្តពីអារម្មណ៍មនុស្សយើងហើយពេលនោះមេឃស្រឡះផ្ទៃចិត្តមនុស្សបានស្ងប់ ភ្លឺថ្លា មានរស្មីពណ្ណរាយ ។ មនុស្សទទួលសេចក្ដីសុខក្សេមក្សាន្ត សប្បាយ រីករាយ សុខុដុមរម្យនា សុខភាពខាងរឿងកាយកាន់តែប្រសើរឡើងៗ ពិសេសកើតប្រាជ្ញាភ្លឺថ្លា និងក្រេបជញ្ជក់រសជាតិជីវិតលើភពផែនដីនេះ ។ ពាក្យស្លោករបស់ព្រះពុទ្ធសាសនាមួយឃ្លាពោលទុកមកថា "គ្មានសេចក្ដីសុខឯណាស្មើនឹងការស្ងប់ចិត្តឡើយ" ។

### ភាគ III អ្នកត្រាស់ដឹងជាន់ខ្ពស់ និងទិសដៅកសាងខ្លួនមនុស្សគ្រប់ៗគ្នា

ដូចខ្ញុំរៀបរាប់ក្នុងភាគ២ស្រាប់ មានមនុស្សពីរប្រភេទមនុស្សសាមញ្ញ (មនុស្ស បូរាណ) និងមនុស្សទំនើប ឬអ្នកត្រាស់ដឹង ។ តាមការស្រាវជ្រាវលំអិតបន្ដអ្នកប្រាជ្ញសាសនា នានាបានបញ្ជាក់ថា អ្នកត្រាស់ដឹងនេះ មានពីរបែបទៅទៀត គឺអ្នកត្រាស់ដឹងជាន់ទាប និងអ្នកត្រាស់ដឹងជាន់ខ្ពស់ ។ ដូច្នេះមកដល់ពេលនេះយើងអាចបំបែកកំណត់ថា មានមនុស្ស៣ប្រភេទ **១-មនុស្សសាមញ្ញ ឬមនុស្សបូរាណ :** ពួកគេប្រើតែប្រព័ន្ធម៉េម៉ូរីតែមួយគត់ និងជាប់ឃុំនៅទីនោះ ។ ពួកគេជាអាយ៉ងឬទីងមោងរបស់ម៉េម៉ូរីនេះ តាមភាសាសាសនាគេពោលថា មនុស្សសាមញ្ញនេះ ទទួលរងចំហាយកម្មផលពីអតីតកាល ។ មនុស្សយើងស្ទើរតែគ្រប់គ្នាស្ថិតនៅក្នុងសភាពការណ៍ជាមនុស្សបូរាណបែបនេះ ។ តើអ្នកជ្រាប ឬទេ?

**២-អ្នកត្រាស់ដឹងជាន់ទាប ឬមនុស្ស ទំនើប :**

ពួកគេបានយល់យ៉ាងច្បាស់អំពីអត្ថប្រយោជន៍របស់សតិដឹង ឬចិត្តបរិសុទ្ធ ហើយការប្រើប្រាស់សតិដឹងនេះយ៉ាងទូលំទូលាយ និងជាប់ជានិច្ចសំរាប់រំដោះចិត្តខ្លួនគេ ដូចខ្ញុំជំរាបពីខាងលើស្រាប់ ។ ពួកគេពិតជារកឃើញសុភមង្គលដែលកើតឡើងអំពីការធ្វើវិស្វកម្មក្នុងចិត្តមនុស្សនេះ ។ គេមានប្រៀបជាងមនុស្សបូរាណដែលគិតតែរកសេចក្ដីសុខខាងក្រៅខ្លួននោះនេះ គឺជាអភិវឌ្ឍន៍ធនធានមនុស្សក្នុងសម័យទំនើបយើងនេះ ។

**៣-អ្នកត្រាស់ដឹងជាន់ខ្ពស់ :** ជនចុងក្រោយនេះ គេមានជំហ៊ាន និងត្រាស់ដឹងខ្ពស់ជាងមនុស្សជំពូកទី២ មានន័យថា ជននោះ នៅប្រើម៉េម៉ូរីប្រើសតិដឹង និងហួសពីនេះទៅទៀត គាត់អាចផ្ដាច់សតិខ្ពស់ផុតពីពិភពកាយ និងចិត្តយ៉ាងពិតប្រាកដអស្ចារ្យណាស់ ។

### តើផ្ដាច់សតិខ្ពស់ផុតអស្ចារ្យដូចម្ដេចទៅ?

ខ្ញុំសូមបំភ្លឺចំណុចនេះ តាមរឿងនិទានពិតៗជាក់ស្ដែងមួយកន្លងមក ។ លោក ប៉ាប៉ា ហ្សី ជាគ្រូសមាធិដ៏ល្បីល្បាញនៅប្រទេសឥណ្ឌា និងនៅទ្វីបអឺរ៉ុបក្នុងអំឡុងឆ្នាំ១៩៥០ ។ គាត់ បាននិយាយរៀបរាប់រឿងផ្ទាល់ខ្លួនពិសោធន៍ផ្ទាល់ខ្លួនជូនអ្នកយកព័តិមានដូចតទៅ :

តាំងពីតូចក្រូចឆ្មា លោក ប៉ាប៉ាហ្សី មានជំនឿលើព្រះអាទិទេពព្រះគ្រឹស្នាគាត់តែងនិយាយប្រាប់គេឯងថា គាត់បានឃើញព្រះគ្រឹស្នារស់នៅជាមួយនឹងគាត់មករត់លេងជាមួយគាត់រៀងរាល់ថ្ងៃ ។ គាត់សម្ដែងភាពប្រាកដក្នុងចិត្តណាស់ ក្នុងព្រឹត្តិការណ៍នេះ ។ ដំណាលតមកលោក ប៉ាប៉ាហ្សី បានជួបនឹងគ្រូគាត់ឈ្មោះលោក រ៉ាម៉ាណា ។ ថ្ងៃមួយគ្រូគាត់ សួរលោក ប៉ាប៉ាហ្សី ថា : ខ្ញុំឮថា ឯងបានឃើញព្រះគ្រឹស្នាជារៀងរាល់ថ្ងៃមែនឬទេ? បាទពិតមែនខ្ញុំទើបតែឡើងមកពីលេងនឹងព្រះអង្គមុននេះ ។ ប៉ាប៉ាហ្សី ឆ្លើយ ។ លោកគ្រូសួរបន្តថា : ពេលនេះ ខណៈនេះ តើឯងកំពុងតែឃើញព្រះគ្រឹះស្នាមែនឬទេ? បាទពុំឃើញព្រះគ្រឹះស្នាទេពេលនេះ ប៉ាប៉ាហ្សី ឆ្លើយ ។ លោកគ្រូបញ្ជាក់ថា : រូបគ្រឹះស្នាដែលឯងឯងបានឃើញក្នុងអារម្មណ៍នោះជូនឃើញជួនបាត់ជួនឃើញជួនបាត់ ដូច្នេះរូបព្រះគ្រឹះស្នានេះ តទៅលេខក្រោយ

# ជោគជតារាសីលោកអ្នក

## ទាំង១២ប្រចាំឆ្នាំរោង

**ឆ្នាំជូត** នៅក្នុងរយៈពេលនេះ លោកអ្នកទទួលលាភសក្ការៈពីសាច់ញាតិបងប្អូនដែលជិតស្និទ្ធ ។ ក្រៅពីនោះក៏នៅទទួលបានដំណឹងល្អដែលមានប្រយោជន៍ដល់ជាតិនិងការងាររបស់លោកអ្នកតទៅអនាគតទៀតផង ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញផលកម្រៃទទួលបានកាក់កបគ្រាន់បើ តែហាមកុំជួញដូរផ្លូវឆ្ងាញប្រយ័ត្នមានបញ្ហាដល់ខ្លួន ។ រីឯបញ្ហាស្នេហាគូស្នេហ៍អាចមានការរកាំរកូសគ្នាខ្លះ ប៉ុន្តែមិនធ្ងន់ធ្ងរនោះទេ ៕

**ឆ្នាំឆ្លូវ** អាចពោលបានថា លោកអ្នកមានសេចក្តីសុខក្នុងជីវិត និងការងារ ព្រោះវិបត្តិ និងភាពស្មុគស្មាញដែលមានកន្លងមកក៏បានធូរស្រាលឡើងវិញមួយកម្រិតផងដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ ទោះបីជាចេញទៅជួញដូរនៅទីណាក្តីគួរចៀសវាងការដាក់ទុនថ្មី ព្រោះអាចនាំឱ្យខាតបង់ ។ រីឯបញ្ហាស្នេហាគូស្នេហ៍ច្រើនប្រចណ្ឌខុសរឿង ៕

**ឆ្នាំខាល** លោកអ្នកអាចនឹងមានអារម្មណ៍ច្របូកច្របល់បន្តិចនៅក្នុងរយៈពេលនេះ ព្រោះកិច្ចការដែលថា នឹងទទួលបានផលល្អនោះ វាអាចមានការប្រែប្រួលដោយសារតែមានការរំខានពីអ្នកដទៃ ។ បើចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ អាចរកផលកម្រៃគ្រាន់ បើគួរជាទីគាប់ប្រសើរជាងមុន ។ រីឯបញ្ហាស្នេហា ពុំមានផលរមាស់អ្វីនោះឡើយ ៕

**ឆ្នាំថោះ** លោកអ្នកគួរប្រុងប្រយ័ត្នចំពោះការនិយាយស្តីបន្តិច ពីព្រោះអាចនឹងមានគូសត្រូវចាំចាប់ទោសកំហុសមូលបង្កាច់បង្ខូចកេរ្តិ៍ឈ្មោះរបស់លោកអ្នកឱ្យប្រែក្លាយទៅជាស្មុយអសោចិ៍ ។ សម្រាប់អ្នកប្រកបមុខរបររកស៊ីជួញដូរវិញមានក្រុមមនុស្សតាមឈ្នានីសច្រើន ដូចច្នេះត្រូវប្រយ័ត្នបន្តិចចៀសវាងការបរាជ័យ ។ រីឯបញ្ហាស្នេហាមានភាពចម្រូងចម្រាសដាក់គ្នាបន្តិចបន្តួច ៕

**ឆ្នាំរោង** លោកអ្នកនឹងទទួលបានទូវលាភសក្ការៈពីភាគហ៊ុនរកស៊ី និងមិត្តរួមការងារយ៉ាងច្រើនគួរឱ្យពេញចិត្ត ។ លើសពីនេះទៅទៀត គម្រោងការដែលបានត្រៀមទុកនឹងបានសម្រេចដូចបំណងទៀតផង ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ គួរជួញដូរនៅទីជិតៗទើបសមប្រកប ។ រីឯបញ្ហាស្នេហាគូស្នេហ៍ចេះស្តាប់ឱវាទគ្នា ៕

**ឆ្នាំម្សាញ់** រាល់កិច្ចការសព្វបែបយ៉ាងលោកអ្នកអាចជួបនឹងបញ្ហាខ្លះៗនាគ្រាដំបូង ប៉ុន្តែក្រោយមកមិនមានអ្វីជាឧបសគ្គរាំងទៀតឡើយ ។ ចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ មានការទិញចូលលក់ចេញគ្រាន់ បើអាចរកផលកម្រៃត្រឡប់មកផ្ទះវិញយ៉ាងត្រជាក់ចិត្ត ។ រីឯបញ្ហាស្នេហាមានភាពផ្អែមល្ហែម និងស្រស់ស្រាយប្រៀបដូចត្រីក្នុងទឹកនារដូវខែវស្សាដូច្នេះដែរ ៕

**ឆ្នាំមមី** រាល់ការស្មុគស្មាញដែលធ្លាប់កើតមានលើលោកអ្នកក្នុងពេលនេះ នឹងត្រូវអហោសិកម្មទាំងអស់ ហើយទ្រព្យដែលរបូតចេញពីដៃទៅនឹងវិលត្រឡប់មកវិញយ៉ាងគ្រប់គ្រាន់ ។ ចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ ត្រូវគិតគូរឱ្យបានច្បាស់លាស់មុននឹងដាក់ទុនថ្មី ទើបមិនខាតបង់រាល់ការចំណាយទាំងនោះ ។ រីឯបញ្ហាស្នេហាត្រូវចេះពូនជ្រោយចំណងស្នេហាដោយមានភាពផ្អែមល្ហែមទើបជាការប្រសើរ ៕

**ឆ្នាំមមែ** រាល់ការបំពេញការងារទាំងឡាយលោកអ្នកមិនមានបញ្ហាអ្វីចោទនោះទេ ប៉ុន្តែក្នុងនោះ សូមប្រយ័ត្នកុំយកអាសាមនុស្សសម្បុរសឱ្យសោះ ព្រោះនាំឱ្យកើតរឿងសៅហ្មងទៅថ្ងៃក្រោយ ។ សម្រាប់អ្នកប្រកបមុខរបររកស៊ីជួញដូរវិញ អាចសន្សំទុកបានខ្លះ ។ រីឯបញ្ហាស្នេហាចូរកុំយកភាពមានះចង់ចាញ់ឈ្នះប្រយ័ត្នកើតមានជម្លោះវិវាទឈានដល់ការប្រេះស្រាំ ៕

**ឆ្នាំវក** រាល់ការបំពេញការងាររបស់លោកអ្នកក្នុងរយៈពេលនេះសុទ្ធតែផ្តល់នូវអត្ថប្រយោជន៍ គួរឱ្យជាទីពេញចិត្តទាំងអស់គ្មានអ្វីមករាំងស្ទះឡើយ ហើយជាងនេះទៀត នោះគម្រោងការដែលបានត្រៀមទុកជាយូរមក ហើយក៏នឹងបានសម្រេចផងដែរ ។ បើជាអាជីវកររកស៊ីវិញ មានការរីកចម្រើនល្អូតលាស់ទៅមុខជាលំដាប់ ។ រីឯបញ្ហាគូស្នេហ៍ច្រើនយល់ចិត្តគ្នា និងនឹករលឹកគ្នាបើនៅឆ្ងាយ ៕

**ឆ្នាំរកា** ក្នុងរយៈពេលនេះលោកអ្នកជួបនឹងបញ្ហាខាងផ្លូវចិត្តមិនសូវជាសប្បាយរីករាយប៉ុន្មាននោះទេ តែប្រសិនបើចង់ទទួលផលពីការងារនោះ ចូរធ្វើចិត្តឱ្យត្រជាក់ ទើបបានសម្រេចដូចបំណង ។ បើជាអ្នកប្រកបរបររកស៊ីជួញដូរវិញ គឺមានការប្រទាំងប្រទើសជាមួយអ្នកមានមុខរបរដូចគ្នា ដូច្នេះគួរបើកចិត្តឱ្យទូលាយ ។ រីឯបញ្ហាស្នេហាមានការកាំចិត្ត ព្រោះតែម្នាក់ៗចង់ចាញ់ឈ្នះគ្នានោះឯង ៕

**ឆ្នាំច** រាល់កិច្ចការដែលលោកអ្នកបំងប្រាថ្នាជាយូរមកហើយនោះក្នុងរយៈពេលនេះ គឺបានសមដូចបំណង ហើយគ្មានអ្វីមករារាំងនោះទេ ហើយរាល់ការបំងយាយីពីមនុស្សដែលមានបំណងមិនល្អមកលើលោកអ្នកនោះក៏មិនបានសម្រេចដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញអាចពង្រីកអាជីវកម្មឱ្យធំបន្ថែមទៀតបាន ។ ឯបញ្ហាស្នេហាគូស្វាមីភរិយាមានភាពសុខដុមរមនាគ្មានផលរមាស់អ្វីឡើយ ៕

**ឆ្នាំកុរ** លោកអ្នកមានភ័ព្វសំណាងល្អក្នុងការងារទទួលរឿងឡើងតួនាទីឬប្រាក់បៀវត្សរ៍បន្ថែម ។ ជាងនេះទៀតនោះ ប្រសិនបើចង់ពឹងពាក់អ្នកមានយសស័ក្តិខ្ពង់ខ្ពស់ក្នុងរឿងអ្វីមួយនឹងបានដូចបំណងផងដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញអាចរកប្រាក់ចំណូលចិញ្ចឹមគ្រួសារបានដោយស្រួលទេ មិនមានអ្វីមករាំងស្ទះឡើយ ។ រីឯបញ្ហាស្នេហាគូស្នេហ៍រមែងចេះអត់ឱនឱ្យគ្នា ៕

តមកពីទំព័រទី ១៣

## គណបក្សសង្គ្រោះជាតិចង់បានតំណែង...

សភារបស់គណបក្សប្រឆាំងនឹងទទួលយកអាសនៈនៅក្នុងរដ្ឋសភាឡើយ ប៉ុន្តែលោកស្រីមានប្រសាសន៍ថា អាសនៈទាំងនេះនឹងត្រូវបានបំពេញនៅទីបំផុត។

លោកស្រីបានថ្លែងថា "អាសនៈទាំងនេះ គឺបានមកពីសំឡេងឆ្នោតដែលប្រជាពលរដ្ឋខ្មែរបោះឆ្នោតគាំទ្រ ហើយប្រជាពលរដ្ឋបានបោះឆ្នោតឱ្យបេក្ខជនតំណាងរាស្ត្ររបស់គណបក្សសង្គ្រោះជាតិ។ ហេតុដូច្នេះហើយ អាសនៈទាំងនេះ គឺជាអាសនៈដែលគួរតែត្រូវបានកាន់កាប់ដោយសមាជិកសភារបស់គណបក្សសង្គ្រោះជាតិ"។

សមាជិកសភានៃគណបក្សសង្គ្រោះជាតិផ្សេងៗទៀតក៏បានផ្តល់សញ្ញាផងដែរថា ការធ្វើពហិការមិនចូលរួមប្រជុំសភានេះគឺមិនមែនធ្វើឡើងរហូតនោះទេ។ លោក អ៊ូ ច័ន្ទរិទ្ធ សមាជិកសភាមកពីគណបក្សសង្គ្រោះជាតិបានមានប្រសាសន៍ថា នៅពេលគណបក្សប្រជាជនកម្ពុជាបោះជំហានទៅមុខនៅក្នុងការបង្កើតរដ្ឋាភិបាលនោះ គណបក្សសង្គ្រោះជាតិក៏បាន "ផ្លាស់ប្តូរជំហាររបស់ខ្លួន" ដែរ ប៉ុន្តែលោកបានបដិសេធមិនបរិយាយថា តើអ្វីទៅជាជំហារថ្មីរបស់គណបក្សសង្គ្រោះជាតិឡើយ។

លោកបានលើកឡើងថា "ពួកគេ ឱ្យគណបក្សប្រជាជនកម្ពុជាមិនព្រមឈប់ឡើយ ហេតុដូច្នេះហើយ យើងចាំបាច់ត្រូវតែផ្លាស់ប្តូរជំហាររបស់យើង។ ប្រសិនបើគ្មានសម័យប្រជុំ ឱ្យនៅក្នុងរដ្ឋសភាទេនោះ យើងនឹងផ្អាកហើយចរចា។ ប៉ុន្តែថ្ងៃនេះឱ្យគណបក្សប្រជាជនកម្ពុជា បានបើកសម័យប្រជុំ ហើយធ្វើដំណើរឆ្ពោះទៅមុខ"។

លោក សម រង្ស៊ី បានប្រកាសនៅលើទំព័រហ្វេសប៊ុករបស់លោកកាលពីម្សិលមិញថា គណបក្សសង្គ្រោះជាតិនឹងបើកសន្និសីទកាសែតមួយនៅម៉ោង៩ព្រឹកនេះ "ដើម្បីថ្កោលទោសការធ្វើរដ្ឋប្រហាររដ្ឋធម្មនុញ្ញពីសំណាក់គណបក្សប្រជាជនកម្ពុជា"។

លោក កែម ឡី អ្នកវិភាគនយោបាយឯករាជ្យបានមានប្រសាសន៍ថា ឱកាសនៃកិច្ចចរចាលើកក្រោយរវាងគណបក្សទាំងពីរ គឺមានតិចតួចណាស់ក៏ប៉ុន្តែ លោកបានលើកឡើងថា លោកជឿជាក់ថាសមាជិកសភារបស់គណបក្សសង្គ្រោះជាតិ នឹងទទួលយកអាសនៈរបស់ខ្លួននៅក្នុងរដ្ឋសភាក្នុងពេលឆាប់ៗដើម្បីពុះពារធ្វើយ៉ាងណាឱ្យមានការធ្វើកំណែទម្រង់នៅក្នុងរដ្ឋសភា ហើយឆ្លៀតឱកាសនេះបន្តដាក់សម្ពាធទៅលើគណបក្សប្រជាជនកម្ពុជាតាមរយៈមហាបាតុកម្ម។ លោក កែម ឡី បានមានប្រសាសន៍បន្ថែមថា "ពួកគេនឹងចូលរួមនៅក្នុងរដ្ឋសភា ហើយនឹងរួមដៃគ្នា ដើម្បីជំរុញឱ្យមានកំណែទម្រង់តាមការចង់បានរបស់ខ្លួន"។

*(រាយការណ៍បន្ថែមដោយ ហ៊ុល រស្មី, យួន ណារីម និង ផន បុប្ផា) ប្រែសម្រួលដោយ ស៊ា ស៊ុយឈាង*

# ខ្មែរអ្នកជាតិនិយម

**តពីលេខមុន**

ឈើនៅពេញព្រៃតែខ្មែរអត់ផ្ទះនៅទឹកនៅក្បែរមាត់តែខ្មែរអត់ទឹកផឹក ។ ខ្មែរជាអ្នកបង្កើតផលដល់បានផ្លែផ្កាបារាំងទារពន្ធអាករប្រមូលយកទៅចិញ្ចឹមយួន និងពលរដ្ឋបារាំងដើម្បីឱ្យជិះជាន់ខ្មែរយ៉ាងព្រងើយ ។ល។

**មហាឃាតុកម្ម**

ក្រុមអ្នករាជានិយមដែលមានលោក សឺន ង៉ុកថាន់ ជាបង្គោលបានខំប្រឹងធ្វើសកម្មភាពទាមទារយកឯករាជ្យពីបារាំងយ៉ាងពេញទំហឹង ដោយបានផ្អែកទៅលើកត្តាពយ៉ាងគឺ :

**១**-លទ្ធផលនៃការផ្សាយកាសែតនគរវត្ត និងធម្មទេសនារបស់ក្រុមព្រះសង្ឃបានដាស់សតិសម្បជញ្ញៈខ្មែរឱ្យមានការភ្ញាក់រលឹកមានស្មារតី និងព្រលឹងជាតិចូលខ្លួនឡើងវិញហើយ ឃើញថា ខ្មែរក្រោកឈរបម្រុងដើរទៅមុខហើយរង់ចាំតែពេលវេលាប៉ុណ្ណោះ ។

**២**-ជប៉ុនកំពុងមានឫទ្ធិអំណាចយ៉ាងខ្លាំងនៅឥណ្ឌូចិន ឯបារាំងវិញកំពុងតែបរាមុខ ហើយខ្មែរកាន់តែស្គាល់មារយាទអាក្រក់របស់បារាំង ។

**៣**-ព្រឹត្តិការណ៍ថ្ងៃទី១៧ កក្កដា ១៩៤២ បារាំងបានបង្គាប់លោក អ៊ឹង អ៊ី នាយករដ្ឋមន្ត្រី និងលោក ទា សាន រដ្ឋមន្ត្រីក្រសួងមហាផ្ទៃ និងធម្មការឱ្យនិមន្តលោកគ្រូអាចារ្យ ហែម ចៀវ ទៅដោះស្បង់ចីពរបង្ខំឱ្យស្លៀកពាក់ខោអាវនៅក្រសួងមហាផ្ទៃ រួចប៉ូលិសបារាំងក៏នាំលោកទៅរថយន្តយកបាត់ទៅដោយចោទប្រកាន់ថា លោកបានទេសនាធ្វើវិទ្ធង្សនាប្រឆាំង នឹងអំណាចបារាំង ជាមេបំបះបំបោរបន្តកេរមរតកពីអាចារ្យស្វា និងពោរកំបោរ ។ ក្នុងពេលបន្តបន្ទាប់គ្នានោះ បារាំងក៏បានចាប់លោក នួន ដួង យកទៅឃុំឃាំងផងដែរ ។

ប្រសិនបើលោកអ្នកស្អប់បារាំង ក៏ស្អប់ក្នុងការស្រលាញ់ ហើយលោកតែងមានគំនិតចង់យកវប្បធម៌បារាំងមកផ្សព្វផ្សាយជួយកូនខ្មែរឱ្យរៀនសូត្រ ដើម្បីឱ្យមានតម្រិះវិជ្ជាកសាងប្រទេសខ្មែរឱ្យចំរើនរុងរឿង ដូចអរិយប្រទេសទាំងឡាយក្នុងសាកលលោក ។ លោក សឺន ង៉ុកថាន់ មិនបានយកបារាំងជាសត្រូវទេ ព្រោះលោកយល់យ៉ាងច្បាស់ថា ដល់ពេលណាបារាំងត្រូវដកខ្លួនចេញពីប្រទេសកម្ពុជាពេលនោះខ្មែរប្រាកដជាត្រូវការតស៊ូប្រឆាំងនឹងចក្រព័ត្តិអាអាណានិគមជិតបង្កើយ គឺសៀម និងយួន ដែលតែងតែមានគំនិតលោភលន់ចង់ទន្ទ្រានវាតទីយកទឹកដីខ្មែរជានិច្ច ព្រោះគេមានគម្រោងការលេបត្របាក់ប្រទេសខ្មែរយូរណាស់មកហើយ គេថែមទាំងបានដាក់ចលនាគេឱ្យធ្វើការអនុវត្តន៍ទៀតផង តាំងតែពីឆ្នាំ១៩៣០កន្លងមកម្ល៉េះ ។

អាស្រ័យហេតុនេះហើយ បានជាក្នុងសម័យនោះ កាសែតនគរវត្តពុំទាន់បានចេញមុខប្រឆាំងនឹង



និពន្ធដោយ **ឡឹក សំអឿន** ហៅ "ផ្កាយព្រឹក"

អំណាចបារាំងនៅឡើយទេ គឺគ្រាន់តែធ្វើការអំពាវសុំឱ្យបារាំងបន្ធូរបន្ថយការគ្រប់គ្រងឱ្យសម ដូចសន្ធិសញ្ញាឆ្នាំ១៨៨៣ មុនការភ្ជង់កស្តេចខ្មែរ និងចំពុះទង់ប៉ុណ្ណោះឯង ។ ម្ល៉ោះហើយសកម្មភាពរបស់លោក សឺន ង៉ុកថាន់ បានត្រឹមតែប្តូរស្តេច សោយរាជពីស៊ីសុវត្ថិ មុនីរ៉េត មកជានរោត្តម សីហនុ តែប៉ុណ្ណោះ ។ ម្យ៉ាងវិញទៀត ប្រសិនបើក្រុមលោក សឺន ង៉ុកថាន់ចេញមុខប្រឆាំងនឹងបារាំងដោយកម្លាំងឃោរឃៅក្នុងសម័យនោះ ប្រាកដជារាជសម្បត្តិរបស់ព្រះបាទសីហនុពុំអាចកើតមានបានឡើយ ។

កាសែតនគរវត្តបានត្រឹមតែអប់រំប្រជាពលរដ្ឋខ្មែរ ឱ្យមានសេចក្តីភ្ញាក់រលឹកតាមផ្លូវញ្ញាតាមលំអានព្រះពុទ្ធសាសនាតែប៉ុណ្ណោះ ហើយគ្រាន់តែពន្យល់នូវកំហុស និងចំណុចខ្សោយទាំងឡាយដែលខ្មែរយើងបានប្រព្រឹត្តខុសកាលពីក្រោយសម័យមហានគរ សមដូចសម្តីបារាំងតែងបានជៀលត្មេះយើងជាញយៗថា ខ្មែរជាសាសន៍ល្ងង់ ខ្លៅ មិនស្គាល់មាតុភូមិជាអ្វី ឬឯករាជ្យជាអ្វីផងទេ ។ គេថាខ្មែរចូលចិត្តពឹងផ្អែកលើអ្នកដទៃខ្មែរកាន់ពុទ្ធសាសនារាប់ពាន់ឆ្នាំមក ហើយនាំគ្នាសូត្រតាមគម្ពីរបាលីបិដកកោកៗ ទាំងលោកសង្ឃទាំងគ្រហស្ថ ក៏ប៉ុន្តែអត់យល់ថាម៉េចទេ ។ល។ ដូច្នេះកាសែតនគរវត្តបានបបួលគ្នារិះរកមធ្យោបាយដកស្រង់ពុទ្ធវចនៈខ្លះៗ ដែលមាននៅក្នុងគម្ពីរពុទ្ធសាសនាយកមកអធិប្បាយពន្យល់ប្រជាពលរដ្ឋឱ្យយល់ច្បាប់ ហើយឱ្យប្រតិបត្តិតាម ឧទាហរណ៍ : **អត្តនោ នាថោ កុសលា ធម្មា អកុសលា ធម្មា អព្យាកតា ធម្មា** ។ល។ ក្រៅពីការអប់រំតាមកាសែតនគរវត្តក្រុមលោក សឺន ង៉ុកថាន់ ក៏បានប្រាស្រ័យទាក់ទងយ៉ាងជិតស្និទ្ធជានិច្ចកាលជាមួយព្រះសង្ឃអ្នកមានតម្រិះវិជ្ជាជាន់ខ្ពស់ ដើម្បីប្តូរយោបល់គ្នាក្នុងការអប់រំប្រជាពលរដ្ឋឱ្យយល់បញ្ហាប្រទេសជាតិ សាសនា រាជបល្ល័ង្ក ។ ទាំងអស់គ្នាបានប្រៀបធៀបប្រទេសទៅនឹងរទេះ ។ តួរទេះដែលអាចទៅមុខកើត លុះត្រាតែមានកង់មានអ្នកអូសទាញ និងមានអ្នកបរ ។ ពុទ្ធចក្រ និងអាណាចក្រ ទុកដូចជាកង់រទេះសម្រាប់ឱ្យវិលទៅជាមួយតួរទេះ ។ ពុទ្ធជាភារៈលើបព្វជិតពុទ្ធសាសនិកឯអាណាចក្រជាភារៈលើរដ្ឋាភិបាលគ្រហស្ថ ។ ចក្រ ឬអំណាចទាំងពីរនេះត្រូវតែវិលទៅជាមួយគ្នាជាដរាប ប្រសិនបើកង់ណាមួយមិនវិលកង់ឯទៀតក៏មិនវិល ហើយតួរទេះក៏មិនកម្រើកទៅមុខដែរ ។ ម្យ៉ាងវិញទៀត ប្រជារាស្ត្រទាំងមូលសុខចិត្តស្លាប់រស់ជាមួយពុទ្ធសាសនាតាំងពីយូរលង់មកហើយ ។ គ្រាមានអាសន្នអន់ក្រខ្មែរតែងតែយកវត្តយកព្រះសង្ឃជាទីពឹងផ្អែកទាំងផ្លូវកាយទាំងផ្លូវចិត្ត ។

ដោយហេតុនេះហើយ បានជាលោក សឺន ង៉ុកថាន់ ក្តីលោកគ្រូអាចារ្យ ហែម ចៀវ ដែលជាសាស្ត្រាចារ្យសាលាបាលីជាន់ខ្ពស់សម័យនោះក្តី បណ្ឌិតអ្នកប្រាជ្ញដទៃទៀតក្តី បានបង្កើតគំនិតឱ្យមានកម្មវិធីទេសនានៅក្នុងបន្ទាយកងពលទាហានជើងក្រហម និងទាហានជើងខ្មៅ ដើម្បីអប់រំទាហានឱ្យដូចកងទ័ពបារាំង និងទ័ពបរទេស ដែលគេតែងតែមានចារ្យខាងសាសនាគ្រិស្តទេសនាប្រដៅទាហានរបស់គេ ។ កាលនោះបារាំងចេះតែញុះញង់ទាហានទាហានជើងក្រហម និងទាហានជើងខ្មៅឱ្យឈ្លោះគ្នា ។ ដូច្នេះលោក សឺន ង៉ុកថាន់ ក៏ប្រឹងចាត់ព្រះសង្ឃដែលជាអ្នកប្រាជ្ញខាងទេសនាឱ្យនិមន្តទៅទេសនាអប់រំទាហានគ្រប់បន្ទាយ ។ ព្រះសង្ឃដែលល្បីល្បាញខាងទេសនាជំនាន់នោះ គឺលោក អាចារ្យ ហែម ចៀវ, សូ ហាយ, ប៉ាំង ខាត់, ខៀវ ជុំ, អ៊ុក ជា ។ល។

ក្រុមលោក សឺន ង៉ុកថាន់ ថែមទាំងបានបង្កើតសមាគមមួយឈ្មោះ"**សមាគមពុទ្ធមាមិកជន**"ដែលអាចឱ្យលោកងាយទាក់ទងប្រាស្រ័យជាមួយពុទ្ធបរិស័ទទាំងពុទ្ធជិតទាំងគ្រហស្ថ ហើយស្នើសុំឱ្យមានកម្មវិធីទេសនារៀងរាល់ថ្ងៃសីល (កាលនោះខ្ញុំអាយុ៨ឆ្នាំជាក្មេងវត្តនៅឡើយ) ទូទៅពេញព្រះរាជាណាចក្រកម្ពុជា។ ក្រោយពេលចង្ហាន់ថ្ងៃត្រង់លោកគ្រូចៅអធិការតែងយកកាសែតនគរវត្តមកអាន រួចហើយអធិប្បាយពន្យល់ពុទ្ធបរិស័ទទាំងចាស់ទាំងក្មេងឱ្យយល់ច្បាស់នូវពុទ្ធវចនៈដ៏មានខ្លឹមសារមិនដែលខានថ្ងៃសីលណាមួយឡើយ ។ មិនតែប៉ុណ្ណោះនៅពេលមានបុណ្យធំៗ ដូចជាបុណ្យផ្កា, កឋិន, ចូលឆ្នាំជាដើមគេសង្កេតឃើញព្រះសង្ឃដែលជាគ្រូអាចារ្យដែលមានឈ្មោះល្បីល្បាញតែងនិមន្តទៅទេសនាគ្រប់ភូមិស្រុក ។ សកម្មភាពទេសនារបស់ព្រះសង្ឃនៅគ្រប់ទិសទីនេះ ប្រៀបបីដូចគេទូងស្គរ ឬដួងដាក់សាធារណជនខ្មែរឱ្យភ្ញាក់រលឹកឱ្យមានសតិសម្បជញ្ញៈជាតិយ៉ាងរហ័សហើយច្បាស់លាស់មែនទែនរហូតដល់អាជ្ញាធរបារាំងស្អប់ និងចងគំនុំរករឿងព្រះសង្ឃខ្មែរជាងគេ ដោយចោទប្រកាន់ថា លោកសង្ឃជាឈ្លើងជញ្ជក់ឈាមរាស្ត្រ ។

នៅខែមិថុនា ឆ្នាំ១៩៤០ កងទ័ពអាល្លឺម៉ង់ដ៏បានវាយលុកចូលរាតត្បាតប្រទេសបារាំងតែក្នុងរយៈពេលពីរបីថ្ងៃប៉ុណ្ណោះ ជាហេតុឱ្យសាធារណរដ្ឋទី៣ នៃប្រទេសបារាំងរលំបះជើងភ្លាម ហើយសេនាប្រមុខប៉េតាំង ក៏បានចុះហត្ថលេខាសុំចុះចាញ់អាល្លឺម៉ង់ដ៏ នៅថ្ងៃទី ១៦ ខែមិថុនា ឆ្នាំ១៩៤០ ។ នៅពេលនោះហើយ ដែលលោក សឺន ង៉ុកថាន់ និងក្រុមរបស់លោកកើតកង្វល់ព្រួយបារម្ភជាខ្លាំង ចំពោះវាសនាអនាគតរបស់ប្រទេសខ្មែរ ហើយលែងមានការទុកចិត្តសទៅលើបារាំងជាអាណាព្យាបាលទៀតហើយ ។ ដូច្នេះខ្លួនលោកព្រមទាំងសហការីជិតស្និទ្ធពីររូបទៀត គឺលោក ប៉ាច ឈឺន និងលោក ស៊ឹម វ៉ា បាននាំគ្នាទៅជួប រ៉េស៊ីដង់ស៊ុបេរីយើរបារាំង ទីបួដូដោយសម្ងាត់ ដើម្បីសម្តែងនូវក្តីព្រួយបារម្ភ និងនូវគោលជំហររបស់ក្រុមលោកថា បារាំងអស់មានសមត្ថភាពការពារព្យាបាលប្រទេសកម្ពុជាតទៅទៀតហើយបារាំងត្រូវតែប្រញាប់ប្រគល់ទឹកដីខ្មែរមកឱ្យខ្មែរកាន់កាប់ខ្លួនឯងវិញ ។ សេចក្តីស្នើនេះ បានប្រព្រឹត្តទៅដោយអហឹង្សា និងសមហេតុផលដែលលោក សឺន ង៉ុកថាន់ បានបញ្ជាក់ថា ខ្លួនលោកនឹងក្រុមរបស់លោកនៅតែចូលចិត្តបារាំងជានិច្ច ។

បន្ទាប់ពីសាធារណរដ្ឋទី៣ របស់បារាំងបានរលំរលាយទៅ បារាំងចោលម្សៀតបានប្រគល់ទឹកដីខ្មែរមួយចំនួនទៅឱ្យសៀមតាមសន្ធិសញ្ញាបារាំង - សៀម ឆ្នាំ១៩០៧ ។ ពេលនោះឯងដែលលោក សឺន ង៉ុកថាន់ និងក្រុមរបស់លោកអស់មានទុកចិត្តរលីងទៅលើបារាំងបរោចោរអប្បល័ក្ខណ៍ រួចបាននាំគ្នាបង្កើតក្រុមនយោបាយសកម្មមួយ ចំពេលដែលស្តេចក្មេងនរោត្តម សីហនុ ឡើងសោយរាជ្យបន្តពីស្តេចមុនីវង្ស ដែលនឹងធ្វើពិធីរាជភិសេកនៅថ្ងៃទី៣១ តុលា ឆ្នាំ១៩៤១ ក្រោមអធិបតីភាពនៃអគ្គទេសាភិបាលបារាំង ដឺគូ ។ នៅពេលដែលកើតគំនិតចង់បែកចេញពីបារាំងនោះ លោក សឺន ង៉ុកថាន់ និងក្រុមរបស់លោកបានសម្រេចចិត្តថា ចាំបាច់ត្រូវដើរតាមមាគ៌ាមួយជាស្វ័យប្រវត្តិ គឺត្រូវតែឃ្លាតចេញពីរាជវាំងបន្តិចៗម្តង ពីព្រោះស្តេចក្មេងថ្មីកំពុងជាប់នៅក្នុងទ្រង់ដៃករបស់បារាំងពុំអាចមានឱកាសរើខ្លួនរួចឡើយ ។ ប៉ុន្តែទោះជាដូច្នោះក៏ដោយគេបានឃើញថា ចាប់តាំងពីឆ្នាំ១៩៤០ រហូតដល់ឆ្នាំ១៩៤៥ ទាំងក្រុមរាជវាំងទាំងក្រុមរាជានិយមនៅតែមានសាមគ្គីធ្វើកិច្ចការរួមគ្នាដដែលគ្រាន់តែចែកមុខនាទីគ្នាធ្វើការតែប៉ុណ្ណោះ ។ ក្រុមរាជវាំងធ្វើការប្រឆាំងនិងបារាំងដោយលាក់មុខដោយមានលោក ស៊ឹម វ៉ា មហាក្សត្រីយានី កុសុមៈ និងលោក ប៊ូ ហ៊ាង ជា មេដឹកនាំ ។ ឯក្រុមអ្នកជាតិនិយមមានលោក សឺន ង៉ុកថាន់ ជាមេក្លោងប្រឆាំង និងបារាំងយ៉ាងចេញមុខ ។

នៅពេលដែលសង្គ្រាមលោកលើកទី២ (១៩៣៩-១៩៤៥) កំពុងឆេះឆាបនោះ គេសង្កេតឃើញកាសែតនគរវត្តឆ្លៀតឱកាសចាប់ផ្តើមលួចក្តិច និងខាំអំណាចអាណានិគមនិយមបារាំងកាន់តែខ្លាំងៗឡើងជាលំដាប់ព្រមតាំងខំប្រឹងបំភ្លឺសមតិញសាធារណជនខ្មែរឱ្យកាន់តែភ្ញាក់រលឹក និងឱ្យចេញមុខតស៊ូដណ្តើមយកសិទ្ធិសេរីភាពរបស់ខ្លួនពីបារាំងមកវិញដោយឥតមានញញើត ។ នៅឆ្នាំ ១៩៤២ លោក សឺន ង៉ុកថាន់ និងក្រុមរបស់លោកបានសម្រេចចិត្តជាឯកឆ្ឆ័ន្ទថា កាសែតនគរវត្តតែមួយមិនគ្រប់គ្រាន់ទេ ត្រូវតែបង្កើតកម្លាំងនយោបាយសកម្មចេញមុខឱ្យកាន់តែខ្លាំងថែមទៀត **តទៅលេខក្រោយ**

# ម៉ាស្សាចាប់សរសៃជួយសុខភាព

**នៅពេលធ្វើការងារកាន់តែមមាញឹកលោកអ្នកតែងមានអារម្មណ៍ម្នរហ្មងតួបផ្សំនឹងវ័យកាន់តែវិវត្តន៍លោកអ្នកតែងមានអាការចុករោយដៃជើង ស្ពឹកស្រពន់ខ្លួនប្រាណជាមិនខាន ។ ការធ្វើម៉ាស្សាចាប់សរសៃអាចជួយបំបាត់ការឈឺសន្លាក់ការចុករោយខ្លួនប្រាណ និងជួយបំបាត់ស្ត្រេស ។**

ការម៉ាស្សាចាប់សរសៃនេះវិធីសាស្ត្រមួយកំពុងពេញនិយមសម្រាប់មនុស្សនាសម័យបច្ចុប្បន្ន។ ម៉ាស្សា មានប្រយោជន៍អ្វីខ្លះ?

សូមប្រិយមិត្តអ្នកអានធ្វើការស្វែងយល់ពីវិធីសាស្ត្រនៃការធ្វើម៉ាស្សានេះ ជាមួយយើងខ្ញុំតាមរយៈការជួបសម្ភាសន៍ជាមួយលោកស្រី ហេង ជាន ម្ចាស់ហាងកែសម្ផស្ស ប៊ីប៊ី។



## របៀបធ្វើម៉ាស្សាចាប់សរសៃ

ការម៉ាស្សាចាប់សរសៃជាបច្ចេកទេសមួយដែលប្រើដៃ ម្រាមដៃ ដើម្បីបំបាត់ ឬព្យាបាលការឈឺសន្លាក់ដៃ សន្លាក់ជើង ចុករោយខ្លួនប្រាណបំបាត់ អាការស្ពឹកស្រពន់នានាជាដើម។ ដំណាក់កាលដំបូងអ្នកជំនាញធ្វើម៉ាស្សាចាប់យកក្រែមមានជាតិប្រេង ឬហ៊ីរតិចមកលាបលើកន្លែងដែលត្រូវម៉ាស្សា។ នៅពេលម៉ាស្សាគេចាំបាច់ត្រូវប្រើក្រែមប្រភេទនេះ ដើម្បីឱ្យសរសៃទន់ស្បែកមានជាតិសំណើមងាយស្រួលក្នុងការធ្វើម៉ាស្សាចាប់សរសៃ និងធ្វើឱ្យក្ដៅស្រួលខ្លួនផង។ ប្រសិនបើយើងមិនប្រើក្រែមទេ ស្បែកអាចរលាក ឬរលាត់នៅពេលធ្វើម៉ាស្សា។ បន្ទាប់មកទើបអ្នកជំនាញយកម្រាមដៃឈ្លីលើកន្លែងដែលត្រូវម៉ាស្សាដូចជាដងខ្លួន ដៃជើង បាតដៃ បាតជើងជាដើមដោយធ្វើចលនាឃីតៗតាមបច្ចេកទេសម៉ាស្សាចាប់សរសៃ។

## អត្ថប្រយោជន៍នៃការធ្វើម៉ាស្សា

ការម៉ាស្សាអាចជួយសម្រួលឱ្យសរសៃឈឺតឈាមដើរស្រួល និងបំបាត់នូវការតានតឹងក្នុងអារម្មណ៍ផងដែរ។ សម្រាប់អ្នកដែលអង្គុយធ្វើការងារច្រើន ការងារមមាញឹកមិនមានពេលគ្រប់គ្រាន់ក្នុងការហាត់ប្រាណ ដើម្បីថែរក្សាសុខភាព ជាពិសេសទប់ស្កាត់ការចុករោយខ្លួនប្រាណអាចធ្វើការម៉ាស្សានេះ ដើម្បីឱ្យស្រួលខ្លួនឡើងវិញ។ លោកអ្នកដែលធ្វើការនៅក្នុងម៉ាស៊ីនត្រជាក់យូរពេកអាចធ្វើឱ្យមិនស្រួលខ្លួនមិនបែកញើសត្រូវធ្វើម៉ាស្សាហើយស្ទីមខ្លួន ដើម្បីឱ្យបែកញើសបញ្ចេញជាតិពុលពីក្នុងខ្លួន ដើម្បីឱ្យស្រួលខ្លួន។ នៅពេលធ្វើម៉ាស្សាខ្លួនហើយ គេច្រើនស្ទីមខ្លួនជាមួយជាតិថ្នាំ ដើម្បីឱ្យបែកញើសបញ្ចេញជាតិពុល និងជួយឱ្យសរសៃឈាមរត់ស្រួលផងដែរ។

## ដំបូន្មានអ្នកប្រឹក្សា

ការម៉ាស្សាចាប់សរសៃអាចធ្វើទៅបាន ហើយប្រសិទ្ធភាពចំពោះលោកអ្នកដែលមានអាការឈឺសន្លាក់បន្តិចបន្តួចប៉ុណ្ណោះ។ ប្រសិនបើលោកអ្នកមានជម្ងឺសន្លាក់ធ្ងន់ធ្ងរការធ្វើម៉ាស្សាមិនមានប្រសិទ្ធភាពទេ លោកអ្នកគួរប្រញាប់អញ្ជើញទៅជួបពិគ្រោះជាមួយគ្រូពេទ្យជំនាញ។ ម្យ៉ាងទៀតលោកអ្នកគួរស្វែងរកសេវាចាប់សរសៃដែលមានជំនាញច្បាស់លាស់។ បើជ្រើសរើសយកការថែរក្សាសុខភាពតាមបែបស្ទីម និងម៉ាស្សាគួរធ្វើក្នុងមួយសប្ដាហ៍ពីរដងជាការប្រសើរ។ ជាងនេះទៅទៀតលោកអ្នកគួរហាត់ប្រាណបន្ថែមដើម្បីឱ្យសុខភាពរបស់លោកអ្នកកាន់តែរឹងមាំមានអាយុកាន់តែយឺនយូរ និងសម្រស់ស្រស់ស្អាត៕



# ភ្ញៀវជាតិ និងអន្តរជាតិ ចូលចិត្តទៅលេងកំពង់ឆ្នាំង







**កំពង់ឆ្នាំង:** ខេត្តកំពង់ឆ្នាំងគឺជាតំបន់ទេសចរណ៍ដ៏ទាក់ទាញមួយមានធម្មជាតិស្រស់បំព្រងដែលធ្វើអោយភ្ញៀវទេសចរណ៍ជាតិ និងអន្តជាតិមិនអាចទៅហួសបាន ។ តំបន់ទេសចរណ៍ដែលភ្ញៀវអន្តរជាតិចាប់អារម្មណ៍នោះ គឺដងទន្លេសាប ភ្នំនាងកង្រី ផ្ទះបណ្តែតលើទឹក និងការធ្វើស្មូនឆ្នាំងវត្ថុអនុស្សាវរីយ៍របស់អ្នកស្រុកភូមិអណ្តូងឬស្សីក្រៅពីនោះនៅមានតំបន់ទេសចរណ៍នានាជាង២០កន្លែងផ្សេងៗទៀត ។

លោក ស៊ីវ រុន ប្រធានមន្ទីរទេសចរណ៍ខេត្តកំពង់ឆ្នាំងបាននិយាយអោយអ្នកយកព័ត៌មានយើងដឹងនៅព្រឹកថ្ងៃទី២៧ ខែសីហានេះថា ខេត្តកំពង់ឆ្នាំងមានតំបន់ទេសចរណ៍ចំនួន២៤ទីតាំងនៅក្នុងក្រុងកំពង់ឆ្នាំងមានសណ្ឋាគារ ៧ ផ្ទះសំណាក់៥ ភោជនីយដ្ឋាន១២ អាហារដ្ឋាន៥ កាណូតទេសចរណ៍៦គ្រឿង ម៉ូតូកង់៣ ជាង១០គ្រឿង និងរថយន្តជាច្រើនគ្រឿងទៀត សំរាប់បំរើការក្នុងវិស័យទេសចរណ៍នៅក្នុងខេត្ត ។

តំបន់ដែលភ្ញៀវទេសចរណ៍អន្តជាតិចាប់អារម្មណ៍ជាងគេនោះ គឺកន្លែងធ្វើស្មូនក្អមឆ្នាំង និងវត្ថុអនុស្សាវរីយ៍នៅភូមិអណ្តូងឬស្សី ក្នុងឃុំស្រែថ្មី ស្រុករលាប្អៀរ និងតំបន់ទេសចរណ៍តាមដងទន្លេសាបមានតំបន់ផ្ទះបណ្តែតលើ ទឹក ការនេសាទត្រី ។ល។

លោក ស៊ីវ រុន អោយដឹងទៀត ថា តាមរបាយការណ៍បូកសរុបរបស់មន្ទីរទេសចរណ៍ខេត្តនៅក្នុងឆមាសទី១ ឆ្នាំ២០១៣នេះ ភ្ញៀវទេសចរណ៍មកទស្សនាក្នុងខេត្តមានភ្ញៀវបរទេសចំនួន១៨១៦នាក់ ភ្ញៀវជាតិចំនួន១២.៣៩២នាក់នៅក្នុងខែកក្កដា កន្លងមកនេះភ្ញៀវបរទេសមានចំនួន២៨៣នាក់ភ្ញៀវជាតិមានចំនួន២០៦៣នាក់ គឺមានចំនួនកើនឡើង៥.២១ភាគរយជាងខែមុន និងឆមាសឆ្នាំមុនៗ ។

កំណើនឡើងនៃចំនួនភ្ញៀវទេសចរណ៍ គឺអាស្រ័យដោយប្រទេសជាតិមានសុខសន្តិភាព អាជ្ញាធរស្រុកខេត្តក្រុមហ៊ុនទេសចរណ៍ក្នុងស្រុក មគ្គុទ្ទេសក៏ ទេសចរណ៍ នគរបាល ទេសចរណ៍ និងប្រជាពលរដ្ឋនៅតាមតំបន់ទេសចរណ៍អាជីវករមានការរាក់ទាក់ទទួលភ្ញៀវទេសចរណ៍បានល្អធ្វើអោយភ្ញៀវមានសន្តិសុខ និងសុវត្ថិភាពក្នុងពេលមកដើរលេងកំសាន្តបានយ៉ាងរីករាយ ។

អាជ្ញាធរខេត្តមន្ទីរទេសចរណ៍ខេត្ត សូមអំពាវនាវដល់ប្រជាពលរដ្ឋអាជីវកទាំងអស់នៅតាមតំបន់ទេសចរណ៍ ក្នុងខេត្តកំពង់ឆ្នាំងមេត្តាចូលរួមលើកស្ទួយវិស័យទេសចរណ៍យើងធ្វើអោយទីក្រុងស្អាតរមណីយដ្ឋានស្អាតសេវាល្អនោះ ទើបភ្ញៀវទេសចរណ៍របស់យើងចូលចិត្តពួកគេ និងផ្សព្វផ្សាយដល់មិត្តភក្តិបងប្អូនគេមកលេងកំសាន្តក្នុងខេត្តយើងទៀតនោះឆ្នាំងបាយប្រជាពលរដ្ឋយើងនិងមិនស្ងួតឡើយ ៕



